





K H M E R B I L I N G U A L B I W E E K L Y N E W S P A P E R

VOLUME 1 | ISSUE 05 | DECEMBER 10th- 25th 2007 | ADVERTISING (562) 313-2129 | WWW.THEKHMER POST.COM


# អនិច្ចាកូនខ្មែរក្នុងសង្គមសិក្សាអាមេរិកាំង

## * តើឪពុកម្តាយត្រូវគិតយ៉ាងណាដើម្បីអនាគតសិក្សារបស់កូន ?

***ដោយ : មាឌ សុវណ្ណារ៉ា***

ស្ថិតិអំពីការសិក្សារបស់កូនខ្មែរ-អាមេរិកាំង បានបង្ហាញពីអត្រាទាបនៃការសិក្សារបស់យុវជនខ្មែរដែលជាគ្រោះថ្នាក់បំផុតសំរាប់សហគមន៍ខ្មែរចំពោះភាពអវិជ្ជា និងការមិនវិវឌ្ឍន៍នៃជីវភាពគ្រួសាររបស់ពួកគេ នាថ្ងៃអនាគត ។

ខណៈដែលប្រទេសមហាអំណាចសេដ្ឋកិច្ច-យោធាមួយនេះ កំពុងតែបង្កើនថវិកាជាតិក្នុងការចំណាយទៅលើវិស័យសិក្សាធិការយ៉ាងខ្ពស់ ដែលជាក់ស្តែងគ្រាន់តែក្នុងរដ្ឋ California តាមរបាយការណ៍ឆ្នាំ២០០៧ នេះបានបង្ហាញថា ការចំណាយថវិកាជិត៥០%ទៅលើផ្នែកសិក្សាអប់រំ ។

ស្ថិតិដែលចង្អុលបង្ហាញដោយសហគមន៍និស្សិតខ្មែរ UCLA KORE (Khmer Outreach Retention Education) ឱ្យដឹងថា អត្រា៥៦% មានកំរិតសិក្សាទាបជាងវិទ្យាល័យ, ៣០% បានទទួលសញ្ញាប័ត្រវិទ្យាល័យ,៧% បានទទួលបរិញ្ញាប័ត្រ (Bachelor's Degree)និង២%នៃជនជាតិខ្មែរបានទទួលសញ្ញាប័ត្រអនុបណ្ឌិត (Master Degree)។ ( តទៅទំព័រទី២៩ )

## ជួយខ្ញុំផង...បេះដូងបានសម្លាប់ជីវិតខ្ញុំហើយ!

***ដោយ : ស្រីនាថ***

សំរែកដង្ហោយហៅរកការជួយសង្គ្រោះគួរឱ្យអាណិតអាសូរពីកុមារីអាយុ៩ឆ្នាំ ឈ្មោះ តែង ដារិក ក្នុងសម្លេងដែលគ្មានកម្លាំងកំហែងសុខភាព ទន់ខ្សោយទឹកមុខ និងរាងកាយស្លេកស្លាំងបានបង្ហើបសំដីដោយភាពក្តុកក្តួលអួលដើមកខ្សាវៗក្នុងន័យ "ជួយជីវិតខ្ញុំផង...ខ្ញុំមិនព្រមទទួលយកសេចក្តីស្លាប់នៅឡើយទេ" "I Refuse to die" ។

ដារិក ថ្លែងថា នាងមានជីវិតដ៏លំបាកបំផុតក្នុងការដកដង្ហើមដង្ហក់ដូចមនុស្សកើតហឺតក្នុងការរស់នៅដែលមិនអាចរត់លេងដើរកំសាន្តបានឆ្ងាយ ក្រៅតែពីរង្វង់ជុំវិញផ្ទះ ឬក៏ធ្វើកិច្ចការអ្វីដូចជីវិតកុមារដទៃបានឡើយ ។

ដារិក មានជម្ងឺបេះដូងប្រហោងធំចំនួន២កន្លែង

( តទៅទំព័រទី២៣ )



## បទវិភាគសង្គម "យល់ញាតិឃ្លាតច្បាប់" ?

***ដោយ: ពិន សំខុន*** ***(តពីលេខមុន)***

មានមនុស្សតិចតួចណាស់ដែលបានដឹងពីប្រវត្តិនៃកម្ពុជាច្បាស់លាស់ តែទោះបីជាបានដឹងក៏ដោយក្តីក៏ពុំអាចមានលទ្ធភាពនឹងជំរាបសាធារណជនខ្មែរឱ្យបានដឹងបានដែរ ដោយសារប្រវត្តិនោះជាជាប់ទាក់ទិន

(តទៅទំព័រទី១២)



●●●វត្តអាយរាប់ អាចារ្យចាយមិនអាប់នៅឡុងប៊ិច មើលពីចំងាយវត្តអាយរាប់ហាក់ដូចជាជំរកដ៏ជាទីប្រសើរបំផុតរបស់ពុទ្ធបរិស័ទខ្មែរឡុងប៊ិច... ទោះជាមិនទាន់មានវិហារក្តី ក៏ជាទីស្ងប់ស្ងាត់សំរាប់លោកតាលោកយាយបងប្អូនក្មេងចាស់ប្រុសស្រី ធ្វើបុណ្យសន្សំកុសលសន្សំសីល នៅពីក្រោយម្លប់ពោធិព្រៃដ៏ត្រសុមក្សាន្តដូចនៅលើភ្នំព្រះសុមេរពិត ។តែ...បើមើលទៅជិត គឺងងឹតមុខដូចសម្លឹងទ្វារគុកពីខាងក្នុង... ដោយថា លុយវត្តវាហាក់ដូចជាដុះជើង ដុះស្លាប ឬដុះកន្ទុយហួររពុយចេញពី"កុង"របស់វត្តមិនដឹងថា វាដើរវាហោះហើរ ឬវាហែលទឹកហែលគោកលោកអាចារ្យលួចគោ ធ្វើស្រែលើខ្នងពុទ្ធបរិស័ទ ដែលពួកគាត់ស្រលាញ់ពុទ្ធសាសនា...ទេសនាម្តងៗរាប់ម៉ឺនដុល្លារ ឥឡូវហារមាត់និយាយក៏មិនចេញមានតែសើចស្ញេញមើលមុខគ្នា ព្រោះថា ឱ្យតែទារបញ្ជីរប្រាក់ គណៈកម្មការចេះតែខឹង...ថាសួរធ្វើអី គេចេះធ្វើការហើយ... គេខំធ្វើការណាស់សព្វថ្ងៃ...ជិតបានវិហារហើយបែរជាសើយតូចដាក់គេ បំបែកបំបាក់ផ្ទៃក្នុង...ដូច្នេះធ្វើម្តេចគេមានកំលាំងធ្វើការតទៅទៀត ? ពុទ្ធបរិស័ទមិនចង់ភ្ជាត់ស្នៀតមួយលើកជាពីរលើក ក៏បានរួមគ្នាសុំធ្វើសវនាការជាមួយលោកធំៗក្នុងវត្ត... ដែលប្រហែលជារឹធទៅរឹធមកទាល់តែម្ខាងៗប៉ើងអត់កន្លែងជ្រកមិនខាន ។

មើលទៅម្តងណេះអ្នកឡើងចាង គឺមិនមែនលោកតាចៅអធិការទេ ហើយ"លោកធំៗ"ក៏មិនមែនសំដៅទៅរកព្រះសង្ឃដែរ ពោលគឺប្រហែលជាអាចារ្យមួយដំបរស្វាក្រេះកេះកញ្ជើរលុយវត្តទាល់តែធ្លាយធ្លុះស៊ីជុះម៉ឺនសែនពីលើដល់ក្រោមតាមចង្កោមឪពុកកូនពីររូប... លោក ពៅ សាវ៉ែន ជាកូន និងជាប្រធានពីមុខ និងអាចារ្យ វ៉ែន ជាឪពុក និងជាប្រធានពីក្រោយ... ព្រោះមិនអាចដឹងថា នរណាជាប្រធានមែនទែននរណាជាប្រធានលេងៗរបស់គណៈកម្មការដែលមិនបានទទួលសំលេងឆ្នោតពីពុទ្ធបរិស័ទចំណុះជើងវត្តក្នុងកំឡុងពេល១១ឆ្នាំកន្លងមកនេះឡើយ ។ យោងតាមមាត្រាទី៤ នៃលក្ខន្តិកៈពុទ្ធិកសមាគមវត្តវិប្បសនារាមមហាសន្និបាតរបស់សមាជិកសកម្ម...ដែលជាគ្រឹះស្ថានកំពូលរបស់សមាគមត្រូវធ្វើឡើងរៀងរាល់ឆ្នាំ នៅថ្ងៃអាទិត្យ នៃទី០៤ មករា...ប៉ុន្តែ អនិច្ចាអាចារ្យអត់ចាំ...សមាជិកសកម្មចេះតែដេកចាំរកាំភ្នែក ដើម្បីបោះឆ្នោត...មួយឆ្នាំហើយមួយឆ្នាំទៀត...គិតទៅម្តៃពីរឆ្នាំ ភ្ជាត់ស្នៀតពីរដង...ថា ដប់មួយឆ្នាំមុនដំបូងវាអត់មានរបៀបរបបម្តងរួចមកហើយ...ចុះដប់មួយឆ្នាំក្រោយមកទៀតអ្នកដែលបានដេញពួកមុនម្តេចបានជានៅចោលម្សៀតគ្មានគោរពច្បាប់សមាគមធ្ងន់ជាងពួកមុនទៅទៀត ?

យោងតាមខ្មែរមួយក្រុមដែលកំពុងសុំចូលជាសមាជិកវត្ត... និយាយថា គណៈកម្មការ ទើបធ្វើត្រឹមត្រូវតាមច្បាប់បានពីរឆ្នាំប៉ុណ្ណោះ... ហើយគណៈកម្មការពីរឆ្នាំចុងក្រោយមិនដេញដោលពីគណៈកម្មការមុន ដោយថាបងប្អូនខ្មែរត្រូវមានធម៌មេត្តា...ដែលធ្វើឱ្យអ្នកចំណុះជើងវត្តរិតតែឆ្ងល់ឡើង ព្រោះថា អាចារ្យ វ៉ែន កាន់ការវត្តដប់មួយឆ្នាំមកហើយ... នេះគឺមិនបានសេចក្តីថាអាចារ្យ វ៉ែន លើកលែងទោសឱ្យអាចារ្យ វ៉ែន ។/

# ថ្ងៃ ៧ មករា ជាថ្ងៃរំដោះ

# ឬ ថ្ងៃយួនឈ្លានពាន?

●●●យោងតាមការវិភាគមួយរបស់វិទ្យុអាមេរិក ផ្សាយជាខេមរៈភាសា បានឱ្យដឹងថា ក្រុមអ្នកជំនាញកិច្ចការនយោបាយនៅឥណ្ឌូចិន មួយចំនួនបានស្រាវជ្រាវ ហើយនិពន្ធសៀវភៅបង្ហាញឱ្យដឹងថា មូលហេតុចម្បងជំរុញឱ្យសាធារណរដ្ឋសង្គមនិយមយៀកណាមបញ្ជូនកងទ័ពវាយលុយផ្តួលរំលំរបបកម្ពុជាប្រជាធិបតេយ្យ ឬខ្មែរក្រហមឱ្យបែកខ្ចាត់ខ្ចាយ ដោយឥតក្រែងរអាមហាអំណាចណាមួយនោះ មកពីបក្សកុម្មុយនីស្តកម្ពុជាក្រោមការដឹកនាំរបស់ ប៉ុល ពត មិនចង់នៅក្រោមចំណុះនៃបក្សកុម្មុយនីស្តយៀកណាម ។

ការមិនទុកចិត្តគ្នារវាងយុទ្ធមិត្តកុម្មុយនីស្តទាំងពីរនេះ ផ្តើមឡើងតាំងពីមុនឆ្នាំ១៩៧០ ហើយលេចចេញជាគោលការណ៍នៅក្នុងសមាជបក្សកុម្មុយនីស្តកម្ពុជា ខែកញ្ញា ឆ្នាំ១៩៧១ សង្គ្រាមរវាងកម្ពុជា និងយៀកណាមដែលចុងក្រោយពលរដ្ឋខ្មែរ រួមទាំងបរទេសភាគច្រើនហៅថ្ងៃ៧ មករា ១៩៧៩ ថា ជាថ្ងៃបរទេសឈ្លានពានទឹកដី ខ្លះទៀតហៅថា ជាថ្ងៃរំដោះទឹកដីខ្មែរពីផ្លុកឈាមនោះ មិនមែនបណ្តាលមកពីមហាអំណាចខាងក្រៅ ដូចជា សហរដ្ឋអាមេរិក សូវៀត និងចិន មានផែនការសម្ងាត់ចង់បង្កើតឱ្យមានស្ថានការណ៍ដូច្នោះ ដូចដែលក្រុមកុម្មុយនីស្តទាំងសងខាងប្រកាសអះអាងនោះទេ ។

អ្នកនិពន្ធម្នាក់អធិប្បាយថា សង្គ្រាមក្នុងទឹកដីកម្ពុជាផ្ទុះឡើង ដោយសារការតម្រង់ទិសដៅនយោបាយរវាងបក្សកុម្មុយនីស្តទាំងពីរមិនស៊ីសង្វាក់គ្នា ឬមិនចូលផ្លូវគ្នា ។ ម្យ៉ាងទៀតអ្នកទន់ខ្សោយជាងគេនោះមិនបានត្រិះរិះជិតដល់ ។

លោកនាយករដ្ឋមន្ត្រី ហ៊ុន សែន រួមនឹងសមាជិកបក្សប្រជាជន ភាគច្រើនធ្លាប់បានហៅថ្ងៃ៧ មករា ថា ជាថ្ងៃខ្មែររស់សារជាថ្មីឡើងវិញ ហើយពលរដ្ឋខ្មែរបានឃើញពន្លឺថ្ងៃ ៧ មករា នោះក៏ដោយសាររណសិរ្សសាមគ្គីសង្គ្រោះជាតិកម្ពុជា ដែលចាប់បដិសន្ធិនៅថ្ងៃ២ ធ្នូ ១៩៧៨ ឬ ចលនារំដោះទឹកដីនោះដែរ ។

លោកនាយករដ្ឋមន្ត្រី ហ៊ុន សែន បានថ្លែងបែបនេះថា : "បើគ្មាន ២ ធ្នូ គ្មានថ្ងៃ៧ មករា ហើយបើគ្មាន ៧ មករា គឺគ្មានថ្ងៃនេះទេ ។... អាហ្នឹងនិយាយត្រង់ជាមួយគ្នាយ៉ាងច្បាស់ ។ ប្រជាជននៅក្នុងទូទាំងប្រទេសកំពុងទទួលរងនូវការកាប់សម្លាប់ពីសំណាក់ពួក ប៉ុល ពត ។ ប្រជាជនដែលនៅសេសសល់រស់រានមានជីវិតកំពុងតែទទួលការគំរាមកំហែងដល់អាយុជីវិត និងបង្ខំឱ្យធ្វើពលកម្មយ៉ាងទម្ងន់" ។

ខ្មែរដទៃទៀតដូចជាលោក គង់ គាំ អនុប្រធានគណបក្ស សម រង្ស៊ី មានទស្សនៈផ្ទុយទៅវិញចំពោះការចូលកាន់កាប់កម្ពុជាពីសំណាក់កងទ័ពប្រជាជនបដិវត្តន៍ យៀកណាម ។

( តទៅទំព័រទី០៩ )

## ទំព័រហ្វីឡាដែលហ្វីយ៉ា

# ពាណិជ្ជកម្មសហគមន៍អាស៊ីនៅហ្វីឡាដែលហ្វីយ៉ា

### ផ្សារខ្មែរ:



មណ្ឌលដែលប្រមូលផ្តុំពាណិជ្ជករខ្មែរ ច្រើនជាងគេនៅហ្វីឡាដែលហ្វីយ៉ា គឺស្ថិតនៅលើផ្លូវលេខ៧ ផ្នែកខាងត្បូងនៃទីក្រុងនេះ ។ នៅលើផ្លូវនោះ គេអាចរកទិញគ្រឿងទេសសំរាប់ធ្វើម្ហូបអាហារមិនចាញ់នៅស្រុកខ្មែរទេ គ្រឿងបន្លែ បង្កាត្រីសាច់ ក៏មានដាក់លក់ប្រជែងគ្នាមិនមានខ្វះមានទាំងអស់លក់ និងកាត់សំលៀកបំពាក់របៀបខ្មែរវត្ថុអនុស្សាវរីយ៍របស់ប្រើប្រាស់ផ្ទាល់ ឬគ្រឿងប្រដាប់សំរាប់បុណ្យទានគ្មានចន្លោះ រីឯខ្សែភាពយន្ត ឬចំរៀងទិញ ឬជួលថតរូប ឬថតវីដេអូក៏មានតាំងបង្ហាញលក់ជូនភ្ញៀវដែរ ។

ផ្លូវលេខ៧ បានប្រែសោភណ្ឌភាពក្រែលដែរនាពីរបីឆ្នាំចុងក្រោយនេះ ដោយការតាំងលំអហាង ឬប៉ាយរៀបចំក្នុងហាងឱ្យគួរចាប់ចិត្តតែផ្លូវនោះតូចចង្អៀតពិបាករកកន្លែងចតឡាន ហើយភាពស្អាតប្រណិតនោះក៏ពុំទាន់ដល់កំរិតនៅឡើយដែរ ។

រីឯផ្នែកខាងជើងគេឃើញមានកន្លែងខ្មែរ ធ្វើពាណិជ្ជកម្មខ្លះដែរ ដូចជាប្រមូលគ្នាធ្វើពាណិជ្ជកម្ម នៅម្តុំផ្លូវ OLD YORK ជិតពេទ្យ EINSTEIN តែមិនធំទេ រីឯនៅផ្លូវ Risingsun ជ្រុងផ្លូវ ADAM គេអាចរកគុយទាវភ្នំពេញ ឬបាយស្រូបបានដែរ ។

សហគមន៍ពាណិជ្ជករខ្មែរនៅ ហ្វីឡាដែល ហ្វីយ៉ានេះ ពុំទាន់មានបង្កើតជាសមាគមន៍ការពារផលប្រយោជន៍ពាណិជ្ជកម្មខ្លួនឱ្យដូចសហគមន៍ចិននៅឡើយទេ ។ ហើយវិទ្យុខ្មែរអាមេរិកាំង បានកើតពាឆ្នាំ ហើយពុំមានការទទួលការគាំទ្រ ឬប្រើប្រាស់សម្រាប់សហគមន៍ទេ ។

### ផ្សារចិន :



ផ្សារចិនឈ្មោះថា ឆាយណា ថោន CHINA TOWN សម្គាល់ដោយក្លោងទ្វារចិននោះ ស្ថិតនៅម្តុំផ្លូវលេខ៨ ខាងជើងកណ្តាល ក្រុងហ្វីឡាដែលហ្វីយ៉ា ។ ចំនួនសហគមន៍ចិននោះ តូចជាងខ្មែរទេ តែរកស៊ីស្វាហាប់ចងគ្នាជាចង្កោមពាណិជ្ជកម្មមានអ្នកចេះច្រើន ហើយសម្រុកចូលឱ្យមានតំណាងនៅសាលាក្រុងទៀតផង ។ វិទ្យុចិន ផ្សាយរាល់ថ្ងៃជូនព័ត៌មានដល់ពួកគេ ហើយកាសែតក៏សម្បូរថែមទៀត ។

### ផ្សារយួន :



សហគមន៍យួន ឬវៀតណាម ក៏ជាសហគមន៍មានជោគជ័យមួយទៀតបន្ទាប់ពីចិនក្នុងការរកស៊ី ។ សហគមន៍នេះមានចង ក្រងជាសមាគមពាណិជ្ជករធំរកស៊ីនៅម្តុំផ្លូវវ៉ាស៊ីនតោន និងផ្លូវប្រដ Broad នាខាងត្បូងកណ្តាលក្រុងហ្វីឡាដែលហ្វីយ៉ានេះ ។ សហគមន៍យួន ឬវៀតណាមនេះ គេមានទូរទស្សន៍ និងកាសែតសំរាប់ពង្រីកពាណិជ្ជកម្មរបស់គេ ។ មណ្ឌលពាណិជ្ជកម្មយួន មាននៅរាយប៉ាយ ច្រើនកន្លែង តែមណ្ឌលនៅលើផ្លូវវ៉ាស៊ីនតោននេះ បានត្រូវសហគមន៍ខ្មែរប្រើសម្រាប់ធ្វើរាត្រីសមោលស ឬការកូនចៅស្ទើររៀងរាល់រាត្រីថ្ងៃសៅរ៍ ឬអាទិត្យ ។

### កំណត់ :

នៅហ្វីឡាដែលហ្វីយ៉ានេះ មានប្រជាពលរដ្ឋដើមកំណើតខ្មែរ និងខ្មែរក្រោមប្រមាណបីម៉ឺននាក់ បើតាមជំរឿនប្រជាជនឆ្នាំ២០០០ គឺជាជនជាតិភាគតិចចំនួនខ្ពស់ទីពីរបន្ទាប់ពីពួកស្ពែនីស ។ បន្ទាប់មកជនជាតិភាគតិចទី៣ គឺវៀតណាម ទី៤ គឺលាវ រីឯពួកចិនត្រូវគេរាយការណ៍ថា កំពុងតែនាំមករកស៊ីនៅហ្វីឡានេះ កាន់តែច្រើន គួរឱ្យកត់សំគាល់ ។ រីឯពួកសាសន៍កូរ៉េ មានចំនួនតិចតួច ក៏ប៉ុន្តែ ដណ្តើមផ្សារ ចិន យួន ខ្មែរ បានយ៉ាងច្រើនគួរសមពួកនេះពូកែរកស៊ីណាស់ ។/

●●●●●●●





# ដំណាក់ការថ្មីនៃខ្មែរក្រោម

●●●ខ្មែរក្រោម និងសហគមន៍ជនជាតិភាគតិចនៅ ស.រ.អា បានធ្វើការសម្រេចជោគជ័យដ៏ត្រចេះត្រចង់មួយ ដោយក្នុងរយ:ពេល១១ឆ្នាំ ចុងក្រោយនេះគំនិតថ្មីមួយបានផុសឡើង គឺជនជាតិកុលសម្ព័ន្ធបានក្រោកឡើងទាមទារសិទ្ធិក្នុងការរស់នៅកាន់កាប់ដីធ្លីរៀបចំរចនាសម្ព័ន្ធគ្រប់គ្រងកុលសម្ព័ន្ធខ្លួនទៅតាមចិត្តដែលកុលសម្ព័ន្ធចង់បាន ។ ការទាមទារនេះ បានត្រូវធ្វើឡើងដោយពួកស្បែកក្រហមអាមេរិកាំង ចំពោះរដ្ឋាភិបាលអាមេរិកាំង រួចហើយទៅទាមទារដល់អង្គការសហប្រជាជាតិថែមទៀត ។ សហព័ន្ធខ្មែរកម្ពុជាក្រោមបានចូលរួមក្នុងដំណើរការទាមទារនេះអស់រយ:ពេលច្រើនឆ្នាំជាមួយនឹងកុលសម្ព័ន្ធនៃប្រទេសឯទៀតៗដែលនៅក្នុងស្ថានភាពដូចគ្នា ។



ថ្នាក់ដឹកនាំខ្មែរកម្ពុជាក្រោម

ថ្ងៃ១៣ កញ្ញា ឆ្នាំ២០០៧ កន្លងទៅនេះ ដឹកនាដោយមេធាវី ប្រូស សារេ អ.ស.ប បានចេញសេចក្តីសម្រេចចិត្តដោយការបោះឆ្នោតក្នុងចំណោមប្រទេសប្រមាណ១៥០ទទួលស្គាល់ថា ថាស្របច្បាប់ឱ្យផ្តល់សិទ្ធិស្មើមុខដូចពលរដ្ឋឯទៀតៗទាំងអស់ ហើយនឹងផ្តល់សិទ្ធិឱ្យមានការគ្រប់គ្រងជារចនាសម្ព័ន្ធរដ្ឋដោយខ្លួនឯងបាន ។

ទីក្រុងហ្វីឡាដែលហ្វីយ៉ា នាថ្ងៃសៅរ៍ ទី០១ ធ្នូនេះ កុលសម្ព័ន្ធខ្មែរកម្ពុជាក្រោមបានទទួលភារ:ជាម្ចាស់ផ្ទះ ហើយប្រមូលគ្នាពីគ្រប់ទិសទីប្រមាណ៥០០នាក់មករៀបចំពិធីអបអរសាទរនឹងថ្ងៃ១៣ កញ្ញា ២០០៧ នេះ ដោយមានដំណាង អ.ស.ប និងឯកអគ្គរដ្ឋទូតជាច្រើនចូលរួមផង ។ **ខ្មែរប៉ុស្តិ៍**




# ពីរចនាសម្ព័ន្ធ "កុលសម្ព័ន្ធ" ទៅ "រដ្ឋបាលជាតិ"

**រៀបរៀងដោយ : ពិន សំខុន**

កាលពីលេខមុនយើងបានចាប់ផ្តើមព្រឹត្តិការណ៍ប្រវត្តិសាស្ត្រខ្មែរនៅដើមសង្គ្រាមលោកលើកទីពីរ ដែលពេលនោះស្តេចខ្មែរ គឺព្រះអង្គម្ចាស់នរោត្តម សីហនុ បានត្រូវតែងតាំងដោយបារាំងនៃរបបយោធានិយម "វីស៊ី" ឱ្យឡើង គ្រងរាជ្យបន្តពីជីតាព្រះអង្គព្រះនាម ស៊ីសុវត្ថិ មុនីវង្ស ។ រីឯលោក សឹង ង៉ុកថាញ់ ជាយុវបញ្ញាវន្តមកពីប្រទេសបារាំង ក៏ធ្វើការការតស៊ូប្រឆាំងបារាំងយ៉ាងខ្លាំងក្លា ហើយមានជំនឿថា ជប៉ុននៃរបបយោធានិយម "ព្រះអាទិត្យរះ" មួយទៀតនោះ មុខជាអាចជួយលោកឱ្យរំដោះពីនឹមអនានិគមនិយមបារាំង បាន ។ ក៏ប៉ុន្តែប្រវត្តិសាស្ត្រលេខមុនបានបង្ហាញថា ប្រទេសខ្មែរបានត្រូវបាត់បង់ផ្នែកខាងជើងរបស់ខ្លួន ដោយបារាំងប្រគល់ភូមិភាគនោះទៅឱ្យសៀម ដែលមានរបបយោធានិយមដូចគ្នា ។

សង្គ្រាមលោកលើកទីពីរ ដែលផ្តើមនៅអឺរ៉ុបឆ្នាំ ១៩៣៩ ក៏បានត្រូវបញ្ចប់ទៅវិញនាឆ្នាំ១៩៤៥ ។ លោកអ្នកអានជាច្រើនបាននៅចងចាំលទ្ធផលនៃសង្គ្រាមរំលាយលោកនោះ ដោយសារភាពសាហាវក្នុងការសម្លាប់មនុស្សរបស់វា ។ តើវាសនាកម្ពុជាត្រូវរាប់បញ្ចូលក្នុងចំណោមអ្នកឈ្នះ ឬអ្នកចាញ់? ។

**១៩៤២ :** -(ថ្ងៃ ១៨ កក្កដា) ចាប់ខ្លួនអាចារ្យ ហែម ជាវ និង នួន ឌួង ដែលបានសច្ចាថា ប្រឆាំងនឹងបារាំង និងទាហានខ្មែរដែលបំរើបារាំង ។

-(ថ្ងៃ ២០ កក្កដា) មានបាតុកម្មដ៏ធំមួយដែលបារាំងហៅថា "បះបោរឆ័ត្រ" Revolte Des Ombrelles ដែលមនុស្សប្រមាណ២០០នាក់ចូលរួមបាតុកម្មនៅទីក្រុងភ្នំពេញ ដើម្បីប្រឆាំងនឹងបារាំង ។ នៅក្នុងនោះព្រះសង្ឃប្រមាណ៥០០អង្គបាំងឆត្រពណ៌លឿងយ៉ាងព្រោងព្រាត ។ ពេលនោះលោក សឹង ង៉ុកថាញ់ ជាមួយក្រុមរបស់លោកបានទាមទារឱ្យមានទំនាក់ទំនងរឹតតែជិតស្និតជាមួយជប៉ុន និងទាមទារឱ្យមានរបបគ្រប់គ្រងជា "រាជានិយមបែបសង្គមនិយម" ។ ពីបាតុកម្មនោះ មានបាតុករ២០០ ត្រូវបានចាប់ខ្លួន ខ្លះទៀត គេចខ្លួន ក្នុងនោះមានអាចារ្យ មៀន ជាគ្រូសាលាបាលីនៅវត្តឧណ្ណាលោម បានភៀសខ្លួនទៅនៅវត្តយាយទេព ខេត្តកំពង់ឆ្នាំង ដែលនៅទីនោះ លោកបានបង្កើតចលនាសម្ងាត់របស់បក្សកុម្មុយនីស្តឥណ្ឌូចិន ហើយប្តូរឈ្មោះលោកជា សឹង ង៉ុកមិញ ។

**កាសែត "នគរវត្ត" ត្រូវបានបិទទ្វារ**

-(ថ្ងៃ ៤ សីហា) លោក សឹង ង៉ុកថាញ់ គេចខ្លួនទៅបាងកក ប្រទេសសៀម ហើយសុំអន្តរាគមន៍ពីទ័ពជប៉ុន ។

-(ថ្ងៃ ១៩ ធ្នូ) អាចារ្យ ហែម ជាវ និង នួន ឌួង ទទួលការកាត់ទោសអស់ជីវិត ហើយត្រូវបញ្ជូនទៅគុកកោះត្រឡាច, នៅទីនោះពួកគាត់បានជួបនឹងអ្នកទោសដទៃឯទៀត ដែលប្រមូលមកដាក់ទោសអស់ជីវិតដែរ ដូចជាលោក ផាំ វ៉ាន់ដុង ជាដើម ។

-(ថ្ងៃ ២៦ ធ្នូ) លោក សឹង ង៉ុកថាញ់ ទៅដល់ក្រុង TOKYO ដើម្បីគាំទ្រនយោបាយពង្រីកឥទ្ធិពលជប៉ុននៅទ្វីបអាស៊ី ។

**១៩៤៤ :**- (២ មករា) កំណើតព្រះអង្គម្ចាស់ នរោត្តម រណឫទ្ធិ

-(៣០ មករា) គឺជាថ្ងៃដែលលោកឧត្តមសេនីយ៍ ដឺហ្គោល មេចលនា រំដោះជាតិបារាំងក្នុងរង្វង់ "រួបរួមបារាំង" ប្រកាសពីជំហរអនាគតនយោបាយបារាំងស្តីពីអនានិគមដែលបារាំងត្រួតត្រា ។

សកម្មភាពពួកឥស្សរៈនៅបាងកកយ៉ាងមមាញឹក នៅលើទឹកដីបាត់ដំបង និងសៀមរាប ដែលសៀមកាន់កាប់ ។

**១៩៤៥ :** -(៧ កុម្ភៈ) យន្តហោះ US B-29 ទម្លាក់គ្រាប់បែកនៅភ្នំពេញលើវត្តឧណ្ណាលោម បណ្តាលឱ្យសុគតព្រះសង្ឃ២០អង្គ និងគ្រហស្ថច្រើនទៀត លោក ទូ សាមុត គ្រូបង្រៀនសាលាបាលី ដែលបានចូលរួមក្នុងបាតុកម្ម "ឆ័ត្របះបោរ" ឆ្នាំ១៩៤២ បានភៀសខ្លួនទៅស្រុកយួន ហើយចូលជាសមាជិកកុម្មុយនីស្តនៅទីនោះ ។

-(៩ មិថុនា) ជប៉ុនបានចូលមកកាន់កាប់ឥណ្ឌូចិន ហើយកម្លាំងបារាំងនៅស្ទើរទាំងអស់បានត្រូវចាប់ខ្លួន ។

-(១២ មិថុនា) ព្រះបាទនរោត្តម សីហនុ ប្រកាសលុបចោលសន្ធិសញ្ញាបារាំង-ខ្មែរ ហើយប្រកាសបូរណភាពនៃកម្ពុជា ហើយនិងចូលរួម "ចលនាវិកចំរើនរួមគ្នា និងមហាកុម្ភមិភាគអាស៊ីខាងកើត" ។ បន្ទាប់មក សីហនុ បានបង្កើតរដ្ឋាភិបាលមួយដែលព្រះអង្គជានាយករដ្ឋមន្ត្រី ។

-(២៤ មិថុនា) លោកឧត្តមសេនីយ៍ ដឺហ្គោល ចេញសេចក្តីថ្លែងការណ៍អំពីសេរីភាពរបស់ឥណ្ឌូចិន ហើយបញ្ចូលឥណ្ឌូចិនទៅក្នុងសហព័ន្ធបារាំង ។

-(១៣ មេសា) សម្តេចនរោត្តម សីហនុ កោតសរសើរជ័យជំនះនៃ "**អាណាចក្រព្រះអាទិត្យរះ អ្នករំដោះប្រជាពលរដ្ឋនៅអាស៊ី**" សំដៅទៅរកជប៉ុនដែលកំពុងតែឈ្នះសង្គ្រាម ។

-(៣០ មេសា) លោក សឹង ង៉ុកថាញ់ ត្រឡប់មកភ្នំពេញវិញ ហើយទទួលតំណែងជារដ្ឋមន្ត្រីការបរទេស ក្រោម "របបព្រះអាទិត្យរះ" ។

-(ខែមិថុនា) ក្រុមឥស្សរៈបានចាប់កំណើតនៅបាត់ដំបង ។

-(១៨ មិថុនា) អធិរាជយួន បាវដាយប្រកាសឯករាជ្យ និងឯកភាពយួន នៅតុងកឹង នៅអណ្ណាម និងទឹកដីដទៃទៀត ។

-(២៥ មិថុនា) ព្រះបាទនរោត្តម សីហនុ ថ្លែងការណ៍ហៅពីសិទ្ធិកម្ពុជានៅក្នុងឥណ្ឌូចិន ។

-(៩ សីហា) យុវជន៧នាក់មិនសប្បាយចិត្តនឹងព្រះមហាក្សត្រដែលពួកគេយល់ថា ឥតធ្វើអ្វីទាំងអស់សម្រាប់រំដោះជាតិ ក៏លបចូលព្រះបរមរាជវាំងវេលាយប់ចាប់មន្ត្រីស្ទើរតែទាំងអស់ ហើយទាមទារឱ្យស្តេចដាក់រាជ្យ ។ អ្នកធ្វើរដ្ឋប្រហារនេះបានត្រូវគាំទ្រដោយព្រះសង្ឃបាតុករ(ដូចជាអាចារ្យ មៀន ជាដើម) និងសមាគមអតីតសិស្សសាលាស៊ីសុវត្ថិផង តែត្រូវលោក សឹង ង៉ុកថាញ់ ចាប់ខ្លួនបាន ។ ក្រោយមកយុវជន៥នាក់បានគេចខ្លួនពីគុករួច ហើយរត់ទៅវៀតណាម ចុះចូលបក្សកុម្មុយនីស្តទាំងអស់ ។

-(ថ្ងៃ ១៤ សីហា ១៩៤៥) លោក សឹង ង៉ុកថាញ់ បានឡើងជានាយករដ្ឋមន្ត្រី ។

-(ថ្ងៃ ១៤ សីហា) ជប៉ុនត្រូវចាញ់សង្គ្រាម ដោយការទម្លាក់គ្រាប់បែកបរមាណូរបស់ទ័ពសម្ព័ន្ធមិត្ត (ALLIE) លើប្រទេសជប៉ុន ។ នៅប្រទេសបារាំង អគ្គមេបញ្ជាការបារាំង ឧត្តមសេនីយ៍ ប៉េតាំង ត្រូវកាត់ទោសប្រហារជីវិត ។

-(ថ្ងៃ ២៨ កញ្ញា) សីហនុ ផ្ញើចុតហ្មាយទៅឧត្តមសេនីយ៍បារាំង **ធើរ អាសង់យេ** (Thirry Argentiev) ដែលជាអធិការជាន់ខ្ពស់ប្រចាំឥណ្ឌូចិន ស្នើឱ្យមានការចរចាដើម្បីឯករាជ្យនៅកម្ពុជា ។

(១ តុលា) ឧត្តមសេនីយ៍ ឡឺក្លែ (LECLERC) មកដល់ព្រៃនគរ ។

(៨ តុលា) ទ័ពអង់គ្លេស តំណាងសម្ព័ន្ធមិត្ត (ALLIE) មកដល់ភ្នំពេញ ក្រោមបញ្ជាការវរសេនីយ៍ឯក មូរី (Li.Col Murray) លោកមានភារកិច្ចដកអាវុធពីទ័ពជប៉ុន (១៥ តុលា) ឧត្តមសេនីយ៍ ឡឺក្លែ មកដល់ភ្នំពេញ ចាប់ខ្លួនលោក សឹង ង៉ុកថាញ់ ហើយបញ្ជូនទៅដាក់គុកឯស្រុកបារាំង ។ លោករដ្ឋមន្ត្រីការពារជាតិ ឃិម ទិត បានចុះចូលនឹងបារាំង រីឯលោក ប៉ាច ឈឺន រដ្ឋមន្ត្រី សេដ្ឋកិច្ចបានរត់ចូលព្រៃ ។

-(១៧ តុលា) រដ្ឋាភិបាលព្រះអង្គម្ចាស់ មុនីរ៉េត ។

-(២៣ តុលា) ព្រះបាទនរោត្តម សីហនុ យល់ព្រមទទួលអានលិខិតដែលរៀបរៀងដោយបារាំង ដែលនៅក្នុងនោះព្រះអង្គត្រូវប្រកាសថា "ស្មោះត្រង់ នឹងពលរដ្ឋខ្មែរ និងប្រទេសបារាំង ហើយជួយជម្រុញគម្រោងបង្កើតសហព័ន្ធឥណ្ឌូចិន នៅក្នុងក្របខណ្ឌនៃចលនារួបរួមបារាំង UNION FRANCAISE" ។/



# ចោលសាលាពីរឆ្នាំ ហួសពេលហើយទេដឹង ?

**ដោយៈ ពិន សំខុន**

នេះជាសំណួររបស់សិស្សពីរនាក់ដែលជាមិត្តនឹងគ្នា ហើយបានបោះបង់សាលារៀនពីរឆ្នាំម្នាក់រួចហើយ ។ ម្នាក់ឈ្មោះ ណារិទ្ធ អ៊ុក ម្នាក់ទៀតឈ្មោះ នីឡា ភ្លើន (១៦) ទាំងពីរនាក់មានសាក់ពេញខ្លួនស្លៀកសំលៀកបំពាក់ធំលើសខ្លួន ខោធ្លាក់ក្តិតលើរបូតពីខ្លួន ពាក់មួកជាប្រចាំ ឬក៏ទាញអាវមកគ្របក្បាល ដែលជាម៉ូដរបស់ពួកយុវជនជាទូទៅនៅហ្វីឡាដែលហ្វីយ៉ានេះ ។ ក៏ប៉ុន្តែរូបថតដែលបានបង្ហាញពីរូបអ្នកទាំងពីរថ្ងៃនេះពុំមានបង្ហាញអ្វីដែលយើងរៀបរាប់ពីលើមកនោះទៀតទេ ណារិទ្ធ និង នីឡា មានសំលៀកបំពាក់ក្រុង ហើយទទួលសញ្ញាប័ត្រកោតសរសើរដ៏សំខាន់ពីសាលាដែលខ្លួនបានចូលរៀនកាលពី៦ខែមុនមកនោះទៀតផង ។

ជាទូទៅកូនសិស្សវិទ្យាល័យជាច្រើន កាលបើបោះបង់សាលារដ្ឋមួយហើយ អាចសាកល្បងទៅចូលសាលារដ្ឋមួយទៀត ដែលមាននយោបាយសាលាដូចគ្នា ហើយសិស្សនោះនឹងបោះបង់សាលាសារជាថ្មីម្តងទៀត ដែលជាហេតុធ្វើឱ្យមានជាប់ទាក់ទិនទៅនឹងការកោះហៅរបស់តុលាការដល់សាមីខ្លួន និងមាតាបិតាជាញឹកញាប់ ។ នីឡា និង ណារិទ្ធ ពុំបានគេចផុតពីករណីនេះទេ ក៏ប៉ុន្តែពួកគេបានទៅជួបនាយកសាលាពីរផ្សេងគ្នា ដែលជាសាលាសំរាប់អប់រំអ្នកមានបញ្ហានៅសាលារដ្ឋផ្សេងៗ ។

នីឡា និងម្តាយ ឪពុក បានទៅសាលា MULTI-CULTURAL ACCADEMIC ខែ កក្កដា កន្លងទៅ នៅហ្វីឡាដែលហ្វីយ៉ា ខាងជើង ។ លោកនាយកសាលា ដុកទ័រ ធុយ បានដាក់លក្ខខណ្ឌមួយចំនួនឱ្យ នីឡា ទទួល លោកថា "បើអ្នកទទួលបាន អ្នកនឹងមានជោគជ័យ តែបើទទួលមិនបានទេ អ្នកមិនអាចរៀនសាលានេះបានទេ" ហើយដើម្បីឱ្យអាចទទួលលក្ខខណ្ឌនោះបាន


រូបថត (ឆ្វេងទៅស្តាំ) ដាលីន, នីឡា, ណារិទ្ធ

លោកនាយកសាលាបានអនុញ្ញាតឱ្យបងស្រីឈ្មោះ ដាលីន (DALINE) ដែលរៀនថ្នាក់ប្រហែលគ្នាឱ្យមករៀនជាមួយដែរ ដើម្បីឱ្យជួយដាស់គ្នាពេលព្រឹក ពេលម្តាយឪពុកទៅធ្វើការពេលព្រហាម ។

រីឯ ណារិទ្ធ វិញ មានចំណូលចិត្តទៅរកភ្លេង និងចំរៀងរ៉ាប់ គេសរសេរចម្រៀងផង គេតែងភ្លេងទៀត ហើយចម្រៀងរបស់គេពីរបទ បានត្រូវផ្សាយតាមវិទ្យុរួចហើយទៀតផង ។ នៅ $E_3$ CENTER ណារិទ្ធ បានចុះឈ្មោះថ្នាក់ "កែលំអសួនច្បារ" និងថ្នាក់ "វិទ្យុផ្សាយសម្លេង" បន្ថែមលើមុខវិជ្ជាផ្សេងៗដែលត្រូវរៀនរាល់ថ្ងៃ ។ ការពេញចិត្តនឹងសាលារៀនឡើងវិញនេះ បានធ្វើឱ្យ ណារិទ្ធ ក្លាយជាអ្នកណែនាំសិស្សឯទៀត ដែលបោះបង់សាលាឱ្យមកចូលរៀនបានឥឡូវនេះសិស្សខ្មែរប្រមាណ២០នាក់ បានមកចុះឈ្មោះចូលរៀនរួចហើយ ។ ថ្ងៃ១៥ វិច្ឆិកា នេះ ណារិទ្ធ នីឡា និងដាលីន បានទទួលសញ្ញាប័ត្រកោតសរសើរពីនាយកសាលារៀងៗខ្លួន មួយៗម្នាក់ពីការខិតខំរៀនទៀងទាត់ និងរៀនពូកែនៅសាលាថ្មីនេះ នៅចំពោះមុខថ្នាក់ដឹកនាំសាលាក្រុង និងប្រធានអង្គភាពនានា ។ ម្តាយឪពុក នីឡា ដាលីន និងណារិទ្ធ មានសេចក្តីត្រេកអរនឹងការផ្លាស់ប្តូររបស់កូនជាអនេក ហើយពួកគាត់នឹកស្មានថា "ប្រហែលជាហួសពេលកែកូនបានហើយ តែតាមពិតពួកគេនៅមានសំណាងច្រើននៅឡើយសោះ" ។/




# ថ្ងៃដែលអ្នកកាន់សាសនាចម្រុះមកគាំទ្រព្រះពុទ្ធសាសនា

**ដោយ : ពិន សំខុន**

កាលពី២លេខមុនយើងបានលើកអំពីមេដឹកនាំធំៗនៃសាសនាផ្សេងៗ សញ្ជាតិខុសគ្នាតែនាំគ្នាលើកដំកើនសាសនារបស់**ព្រះពុទ្ធសាមណគោត្តម**ដោយមិនបានបោះបង់សាសនារបស់ខ្លួន ហើយនាំគ្នារៀបចំថែរក្សាបច្ចេកវិទ្យា ដែលព្រះសម្មាសម្ពុទ្ធបានបង្រៀនកាលពីជាង២៥០០ឆ្នាំមុន ឱ្យរឹតតែបានត្រឹមត្រូវឡើង ។ នៅភាគទី៣នេះ យើងលើកអំពីការចាប់អារម្មណ៍របស់មនុស្ស ដែលប្រារព្ធពិធីដែលប្រមូលជំនឿកាន់តែច្រើន គឺ **វិបស្សនាកម្មដ្ឋាន** នេះ តើអ្វី ទៅដែលធ្វើឱ្យមេសាសនាទាំងអស់នោះចុះសម្រុងគ្នាលើបច្ចេកវិទ្យារបស់ព្រះពុទ្ធអង្គទៅវិញ ?

**រដ្ឋម៉ាសឈូសែត ខែមិថុនា ឆ្នាំ២០០៦**

នៅក្នុងមជ្ឈមណ្ឌលដ៏សំខាន់មួយនៃក្រុង **សែលប៊ីន** មនុស្ស២០០នាក់ បានចុះឈ្មោះចូលអង្គុយធម៌ (ពាក្យដែលខ្មែរយើងសំដៅទៅរកវិបស្សនា) ក្នុងនោះមានយុវជនចន្លោះ១៨ ទៅ២៥ឆ្នាំប្រមាណ៤០%ពី២៥ ទៅ៤៥ ប្រមាណជា៤០%ទៀត អាយុលើសពីនោះប្រមាណ២០%តែប៉ុណ្ណោះ ។ ក្នុងចំនួននោះ មានអាស៊ីរួមទាំងខ្មែរផង មាន៥នាក់ និងព្រះសង្ឃមួយអង្គ (ជាខ្មែរ) ចូលរួមផងដែរ ។ នៅលើចំនួននោះ គេត្រូវបន្ថែម**អ្នកបំរើព្រះធម៌ស្ម័គ្រចិត្ត** ចំនួនប្រមាណ២០នាក់ទៀត ដែលជាផ្នែកមួយរួមគ្នាដែរនៃចលនាវិបស្សនានេះ ។ យើងលើកចំនួនមនុស្សដែលចូលរួមអង្គុយធម៌នៅក្នុងមជ្ឈមណ្ឌលតែមួយ ដែលមានកម្មវិធីជាប្រចាំ ហើយខែខ្លះកម្មវិធីអង្គុយ១០ថ្ងៃនេះ មានដល់ទៅ២ ដងថែមទៀត តើចំនួនមនុស្សប៉ុន្មានសែននាក់ដែលនាំគ្នាអង្គុយធម៌នៅលើ ពិភពលោកក្នុងមួយឆ្នាំៗ? ហើយខ្លះមកអង្គុយបានច្រើនដងក្នុង១ឆ្នាំ ទាំងនេះ ជាសញ្ញាវិជ្ជមានដ៏សំខាន់សំរាប់ព្រះធម៌របស់ព្រះពុទ្ធ ។

ចម្ងល់ជាច្រើនបានធ្វើឱ្យសាធារណជនរកចម្លើយមិនបាន ដូចជា **បង្រៀន មិនឱ្យទប់សេចក្តីសេចក្តីស្រលាញ់ ឬស្អប់មិនឱ្យរក្សានៅក្នុងអារម្មណ៍ទេ សូម្បីតែអរព្រះគុណដល់ព្រះពុទ្ធក៏មិនអាចធ្វើបានផងនោះ តើមនុស្សនោះបានពីណាមក ?** ដូចជាម្យ៉ាងទៀតជា **បើមួយថ្ងៃៗអង្គុយធ្មេចភ្នែកមិនឱ្យនិយាយមិនឱ្យមើលស្តាប់ តើនឹងរៀនអ្វីចេះពីណាមក ?** ឬក៏ជ្រៅជាងនេះទៅទៀតថា **អង្គុយធម៌នឹងនាំឱ្យចម្រើននូវសទ្ធា ចំរើននូវការអត់ឱន ដូច្នេះប្រើចំរើនទៅរករបៀបឱ្យមានទៅរកការយោគយល់អំពើបាបនោះមិនមែនជាសញ្ញានៃការវិនាសទេឬ? ។**

មនុស្សម្នាក់ៗដែលបានទៅអង្គុយធម៌នៅ **សែនប៊ីន** នាខែមិថុនា ឆ្នាំ២០០៦ បានទទួលចម្លើយលើចម្ងល់ទាំងអម្បាលម៉ាណនោះគ្រប់គ្នា តែភាគច្រើនពុំអាចពន្យល់ពីហេតុច្បាស់លាស់បាន ក៏ប៉ុន្តែមនុស្សម្នាក់ៗបានទទួលស្គាល់នូវការផ្លាស់ប្តូរសភាវៈក្នុងខ្លួន យ៉ាងជាក់ស្តែង ។

**កំពង់គរ ខេត្តកណ្តាល ឆ្នាំ១៩៩៧**

បុរសចំណាស់ម្នាក់អាយុប្រមាណ៦០ឆ្នាំ នៅពេលមកដល់មជ្ឈមណ្ឌលវិបស្សនាកម្មដ្ឋានដឹកនាំដោយព្រះគ្រូសំពោធិ ព្រះនាម ហូតុងហូ គាត់សម្រាកថ្ងៃត្រង់ស្រមុកស្កប់ស្កល់គ្រូបង្រៀនម្នាក់ទៀតដែលមានតែសម្រាកនៅជាប់គ្នា បានត្រូវតានោះមមើ ហើយទាត់លោកគ្រូនោះមួយជើងយ៉ាងដំណំតានោះនៅបន្តដំណេកដោយគ្មានដឹងថាមានអ្វីកើតឡើងទេ ។ នៅពេលដែលគាត់ភ្ញាក់ឡើង ហើយបានដឹងរឿងក៏សុំទោសលោកគ្រូបង្រៀន ហើយនិយាយថា **ការមមើរបស់ខ្ញុំនេះស្ទើរជាជម្ងឺទៅហើយ ខ្ញុំមមើរៀងរាល់យប់ដើរជល់សសរផ្ទះបែកក្បាលក៏មាន ដូច្នេះខ្ញុំត្រូវចងជើងភ្ជាប់នឹងគ្រែដេកក្រែងខ្ញុំមមើដើរចេញទៅក្រៅ ហើយអាចធ្លាក់ពីលើផ្ទះស្លាប់បាន** ។ នៅពីរភាត្រីដំបូងគាត់មមើហើយរ៉ាយរ៉ាប់រឿងយ៉ាងច្រើន ហើយច្បាស់លាស់ទៀត តែថ្ងៃទី៣រហូតទៅស្រាប់តែកាមមើនិយាយក៏បាត់ស្ងាត់ឈឹងរហូតដល់ថ្ងៃបញ្ចប់ ។ ចាប់ពីពេល ដែលដឹងថា គាត់លែងមមឹមមើដូចមុនទៀតហើយនោះ គាត់ក៏ឈប់ចងជើងនឹងគ្រែគាត់ទៀតហើយ ។ មនុស្សជាច្រើនបានសំដែងសេចក្តីត្រេកអរដោយអារម្មណ៍ស្ងប់បានកើតឡើង ហើយមួយចំនួនទៀតនិយាយថា ជម្ងឺសន្លាក់ដៃ សន្លាក់ជើងបានធូរស្បើយហើយ ។ ជម្ងឺជរាសន្លាក់ដៃជើង បានត្រូវមនុស្សជាច្រើនណាស់ពិពណ៌នាថា បានកើតជម្ងឺនេះច្រើនឆ្នាំមើលមិនជាបែរជាមកសះស្បើយគ្រាន់តែបានអង្គុយអនុវត្តតាមគ្រូវបស្សនាចំនួន១០ថ្ងៃតែប៉ុណ្ណោះ ។

**ប្រមាណ១០ឆ្នាំមុន**

ស៊ីដន នៅ ហ្វ៊ីឡាដែលហ្វីយ៉ា នេះ បានមកដល់ ស.រ.អា ភ្ជាមនាំទាំងជម្ងឺរលាកស្រោមខួរក្បាល និងរលាកក្រពះមកពីកម្ពុជាជាមួយផង ជម្ងឺនេះបានធ្វើឱ្យស៊ីដន ពិការពុំអាចទៅធ្វើការងារអ្វីបាន ហើយប្រើថ្នាំជាប្រចាំកាន់តែច្រើនទៅៗ ។ មកដល់ជិតថ្ងៃដែលពេទ្យត្រូវវះបារម្ភនឹងការវះកាត់នោះ ក៏សម្រេចចិត្តទៅអង្គុយវិបស្សនាដោយមានការធានាឱ្យចូលមកប្រណិប័ត្តព្រះ-ធម៌ថា "មកនេះពុំមានបំណងមកព្យាបាលជម្ងឺអ្វីមួយនោះទេ គឺមកប្រគល់ខ្លួនធ្វើតាមព្រះធម៌ចំនួន១០ថ្ងៃតែប៉ុណ្ណោះ" ។ នៅពេលចប់ហើយត្រឡប់មកវិញ គ្រូ-ពេទ្យមានការភ្ញាក់ផ្អើលជាខ្លាំង ដោយជម្ងឺរលាកក្រពះនិងរលាកស្រោមខួរក្បាលពុំដឹងជាទៅណាអស់ ហើយការវះកាត់នោះ ក៏ត្រូវខកខានរហូតមកដល់សព្វថ្ងៃនេះ ។ ស៊ីដន បានត្រឡប់ទៅ"អង្គុយធម៌"វិញច្រើនដងដើម្បីជំរះភាពល្អក់ខ្វល់នៅក្នុងអារម្មណ៍បង្កើនចិត្តធម៌នឹងចំណេះឥឡូវនេះក្លាយទៅជាអ្នកធ្វើការយ៉ាងខិតខំហើយជួយយកអាសារអ្នកដទៃបានច្រើនផង ។

**ឆ្នាំមុននេះ**

ស្ត្រីខ្មែរម្នាក់រស់នៅស្រុកបារាំងមានគ្រោះរថយន្តយ៉ាងដំណំកញ្ចក់ឡានជាកំទេចតូចៗបានខ្ទាតមកចោះសាច់មុខនាងយ៉ាងខ្ទេចខ្ទាំ ។ ដោយសារជំនាញរបស់ពេទ្យបារាំងមុខរបួសរបស់នាងជាច្រើនកន្លែងបានត្រូវព្យាបាលជាគួរឱ្យសរសើរលើកលែងតែនៅលើផ្ទៃមុខដែលកំទេចច្រើនរយគ្រាប់បានចោះមុខធ្វើឱ្យជាដូចដើមមិនបាន ។ ពេទ្យតម្រូវឱ្យនាងមកធ្វើការវះកាត់ម្តងបន្តិច ដើម្បីឱ្យអាចកែទម្រង់សម្ផស្សវិញបានខ្លះ ។ ស្ត្រីនោះមានប្តីជាអ្នកប្រារព្ធវិបស្សនាយ៉ាងខ្ជាប់ខ្ជួន បានណែនាំនាងដែលជាមនុស្សចូលចិត្តមិនចប់ឈប់ ហើយបោះបង់ការងាររកស៊ីឱ្យទៅធ្វើវិបស្សនាជាមួយគ្នាម្តង នាងក៏សុខចិត្តទៅ**អង្គុយធម៌**មួយអាទិត្យមកក៏ទៅជួបវេជ្ជបណ្ឌិតនិយាយពីការវះកាត់ជាបន្តទៅទៀត ពេទ្យក៏សួរភ្លាមថា "នាងបានថ្នាំអ្វីប្រើបានជាមុខនាងជាស្ទើរអស់រលីងទៅហើយដូច្នេះ?" នាងឆ្លើយថា "គ្មានថ្នាំអ្វីគ្មានធ្វើអ្វីក្រៅតែពីទៅធ្វើការ**អង្គុយធម៌១០ថ្ងៃនោះទេ**" ។ គួរចំឡែកមុខរបួសស្នាមក្រហោងក្រហូងលើផ្ទៃមុខបានត្រឡប់មករាបស្មើពុំអាចមើលដឹងថាមានរបួសអ្វីទេ នាងបានឧទ្ទានប្រាប់មិត្តភ័ក្តិថា នៅពេលអង្គុយនោះ មុខនាងចេញរមាស់យ៉ាងខ្លាំងស្ទើរទ្រាំ មិនបានតែលោកគ្រូបានផ្តាំថា **កុំឱ្យប៉ះពាល់ ឬកេះអ្វីឱ្យសោះ វានឹងបានទៅវិញដោយឯកឯង...** ។ ពីរបីថ្ងៃបន្ទាប់ពីផ្តើមអង្គុយសំណាក់ធម៌មកភាពរមាស់ ក៏បាត់ទៅវិញដោយឯកឯងមែនហើយចុងបញ្ចប់ស្បែកផ្ទៃមុខក៏រាបស្មើឡើងវិញដោយមិនអាចពន្យល់បាន ។

នៅមានឧទាហរណ៍ជាក់ស្តែងច្រើនរយទៀត ខ្ញុំពុំអាចពិពណ៌នាអស់នៅពេលនេះ គ្រាន់តែសុំជូនការសង្កេតមួយថា នៅហ្វីឡាដែលហ្វីយ៉ានេះ មនុស្សជំទង់និងមនុស្សចាស់ជាច្រើនរយនាក់បាននាំគ្នាប្រណិប័ត្តនូវបច្ចេកវិទ្យារបស់ព្រះពុទ្ធនេះ ហើយបានទទួលនូវលទ្ធផលជាក់ស្តែងគ្រប់ៗគ្នា ។ គេអាចឃើញអ្នកទាំងនោះបានផ្លាស់ប្តូររូបរាងកាយពីទុរនទុរាមកជាស្វាហាប់ពីនិយាយគ្មានទំនុកចិត្តលើខ្លួនឯងមកជាមនុស្សមានចំណេះដឹងជំនឿអាចទុកចិត្តបានប្តូរពីចរិតអ្នកស៊ីផឹកមកជាអ្នកចេះថែខ្លួនឯង និងជួយទុកចិត្តបានប្តូរពីភាពធ្លាប់កោងកាចមកអាចយល់ពីការលំបាករបស់អ្នកដទៃបាន...។ល។ ហើយសង្គមនេះកំពុងតែរីកដុះដាលនៅហ្វីដែលហ្វីយ៉ា និងនៅតំបន់ឯទៀតជាច្រើនសម្រាប់សហគមន៍ខ្មែរ ។

ចាប់តាំងពីឆ្នាំ២៥០០ នៃការទស្សន៍ទាយរបស់គម្ពីរនានាដែលនិយាយថា "ពេលនោះសាសនានឹងបានរស់ឡើងខ្ពស់ម្តងទៀត" គឺជាការពិតមួយដែលកំពុងតែកញ្ជ្រោលយ៉ាងខ្លាំងឡើងវិញ ដោយមនុស្សគ្រប់សាសនាបានមើលឃើញគុណប្រយោជន៍នៃការរកឃើញរបស់ព្រះសម្មាសម្ពុទ្ធថា ជាវិទ្យាសាស្ត្រជាប្រាកដ ពី-ព្រោះ **"នរណាប្រតិបត្តិនោះនឹងបានបុណ្យ"** ។ ក៏ប៉ុន្តែសាវ័ករបស់ព្រះលើកនេះពុំមែនជាព្រះសង្ឃទៀតទេ ។ នៅពេលដែលខ្ញុំលើកប្រយោគកាលពីវគ្គទី១ថា លោកគ្រូ អ៊ូ បាឃិន ដែលជាចៅអធិការគ្រូរបស់លោក ហ្គោ-អិនកា នោះ មានការកែរតម្រូវពីសំណាក់សិស្សសំខាន់ៗនៃវិប្បសនាថា "ការពិតលោក អ៊ូបាឃិន នោះជាគ្រហស្ថទី១ ជាមន្ត្រីជាន់ខ្ពស់ដ៏ល្បីល្បាញនៃប្រទេស ភូមាដោយសាវ័កគាត់ជាមនុស្សស្មោះត្រង់ជាមនុស្សឧស្សាហ៍បំផុត ហើយប្រកាន់ការអនុវត្តន៍នូវក្បួនវិប្បសនាយ៉ាងខ្ជាប់ខ្ជួន គឺនៅពេលដែលលោក អ៊ូ បាឃិន បានទៅជួបព្រះសង្ឃមួយអង្គព្រះនាម សៃយ៉ាដោ ដែលប្រកាន់ក្បួនរបស់ព្រះពុទ្ធមិនដែលដាច់នោះ ក៏លោកមានសេចក្តីជ្រះថ្លានឹងសទ្ធាក្នុងការទទួលផ្សព្វផ្សាយព្រះធម៌នេះជាបន្តមក ។ ឥឡូវនេះពន្លឺនៃធម៌របស់ព្រះពុទ្ធនេះ បានធ្លាក់មកដល់ដៃរបស់គ្រហស្ថម្នាក់ទៀតឈ្មោះ ហ្គោ-អិនកា ដែលកំពុងណែនាំចែកជូនព្រះធម៌ដ៏ប្រពៃនេះពេញទាំងសកលលោក ។

សព្វថ្ងៃនេះ លោក ហ្គោអិនកា មានលទ្ធភាពបង្រៀនបច្ចេកវិជ្ជានេះដល់មនុស្សរាប់សែនលាននាក់ដោយប្រើខ្សែអាត់ ប្រើស៊ីឌី ឬវីដេអូ ដើម្បីចៀសវាងការបកប្រែខុសពីគ្រូមួយទៅគ្រូមួយទៀតបាន...រីឯគ្រូនៅប្រចាំមជ្ឈមណ្ឌលនីមួយៗ គេហៅថា **លោកគ្រូជំនួយ** ដែលសុទ្ធតែបានរៀនសូត្រវិជ្ជានេះ ជ្រៅជ្រះច្រើនឆ្នាំហើយមានការតែងតាំងពីលោក ហ្គោអិនកា ថែមទៀងផង ។

នៅសហរដ្ឋអាមេរិកនេះ បច្ចេកវិជ្ជារបស់ព្រះពុទ្ធកំពុងតែត្រូវក្រុមសាសនាកាតូលិកជាច្រើនទទួលស្គាល់ការបង្ហាត់បង្ហាញដល់ពួកគេ គឺជាគុណប្រយោជន៍មួយ ។ ឥឡូវដោយគេត្រូវរំងាប់អំពើហឹង្សាដែលគុកនៃសហដ្ឋនេះ លែងទៅជាថ្នាំសំរាប់ព្យាបាលមនុស្សទៅហើយនោះ គេបានយកវិប្បសនាទៅអនុវត្តន៍លើឧក្រិដ្ឋជននៅក្នុងគុកសំខាន់...ហើយបានទទួលលទ្ធផល តែមនុស្សពីខាងក្នុងខ្លួនបានយ៉ាងប្រសើរ ។ នៅប្រទេសឥណ្ឌាគុកដ៏ធំមួយនៅ**"ទីហា"** បានក្លាយទៅជាគំរូទៅហើយ : មនុស្សកាចសាហាវដែលយកការសម្លាប់សត្រូវមកដោះស្រាយបែរជាទៅសុំទោសគ្រួសារអ្នករងគ្រោះដោយស្នាដៃខ្លួន ឯងទៅវិញ អ្នកផឹកស្រា ជក់កញ្ឆា បែរជាអាចបញ្ឈប់ការញៀនរបស់ខ្លួនបានសេចក្តីស្រលាញ់អាចកើតឡើងក្នុងខ្លួនមនុស្សចិត្តអាក្រក់...ដែលគេបានយកមកបង្ហាញសាធារណជន ដោយឌីវីឌីមួយឈ្មោះ "CHA NGING FROM INSIDE" ការប្តូរដែលចេញពីក្នុងខ្លួន ។

ការពន្យល់ច្រើនទំព័រនេះ ពុំស្មើនឹងការសាកល្បងដោយខ្លួនឯងម្តងនោះទេ ។ លើកក្រោយយើងនឹងលើកយកស្នាដៃរបស់ស្នេរម្នាក់ ដែលបានស្គាល់ការអនុវត្តន៍ព្រះធម៌ច្រើនដង គឺលោក **សំណុំ** ។

**តទៅលេខក្រោយ**

# អំណាចលុយនាំភាពវឹកវរនៅវត្តវិប្បសនារាម

ដោយ : មាជ សុវណ្ណារ៉ា

ពុទ្ធបរិស័ទប្រកាន់.គណៈកម្មការប្រកែក. ព្រះ-សង្ឃសុំមិនមានយោបល់ ព្រោះតែការចោទប្រកាន់រឿងលុយកាក់ដែលក្រុមអាចារ្យមួយក្រុមរបស់វត្តវិប្បសនារាមចាយវាយខុសប្រក្រតី ដោយរូបភាពបិទបាំងមិនរាយការណ៍ពីចំណូលចំណាយ និងការមិនគោរពតាមលក្ខន្តិកៈពុទ្ធិកសមាគមខ្មែរវត្តវិប្បសនារាមក្រុង Long Beach ។ ខណៈដែលព្រះចៅអធិការវត្ត ដែលជាស្ថាបនិកកសាងវត្ត តាំងពីឆ្នាំ ១៩៨៥ ត្រូវបានគេបំបិទសិទ្ធិមិនឱ្យដឹង ឮអ្វីទាំងអស់ក្រោមការគំរាមកំហែងនោះ ។

ក្រុមអាចារ្យមានឈ្មោះ ពៅ វ៉ែន និង ពៅ សារ៉ែន ជាអ្នកគ្រប់គ្រងលុយកាក់វត្តមិនបង្ហាញមុខជាសាធារណៈ ដើម្បីបំភ្លឺដល់ការចោទប្រកាន់របស់ពុទ្ធបរិស័ទទេ ។ ទូរស័ព្ទរបស់លោកទាំងពីរ ដែលជាកូន និងឪពុកខ្មែរប៉ុស្តិ៍ពុំអាចទាក់ទង ដើម្បីសុំចម្លើយបានទេនៅថ្ងៃអាទិត្យនេះ ។

ពុទ្ធបរិស័ទ កាលពីថ្ងៃអាទិត្យនេះ និយាយចោទប្រកាន់ថា អាចារ្យ កែម ឆែម និងអាចារ្យ ពៅ វ៉ែន ដែលមានកូន ពៅ សារ៉ែន កាន់កាប់លុយកាក់ដែលពុទ្ធបរិស័ទផ្តល់សទ្ធាជ្រះថ្លាក្នុងការបរិច្ចាគ ដើម្បីកសាងវត្ត និងប្រាក់ពន្ធដារ ដែលរដ្ឋាភិបាលមិនឱ្យបង់ ព្រោះតែជាអង្គការមិនគិតកម្រៃ (Non Profit) ដោយយកលុយកាក់ទាំងនោះទៅប្រើប្រាស់ខុសទំនងមិនឱ្យសមាជិក ឬពុទ្ធបរិស័ទដឹងឮថា ជាការប្រមាថ និងខុសលក្ខន្តិកៈពុទ្ធិកសមាគម ។

ដោយការចោទប្រកាន់នោះ លោក អ៊ុំ ផល បានអះអាងថា ពួកអាចារ្យទាំងបីរូបខាងលើកំពុងតែប្រើអំណាចផ្តាច់ការប្រើសិទ្ធិរំលោភលក្ខន្តិកៈរបស់ពុទ្ធិកសមាគម ដោយតាំងខ្លួនជាប្រធានគណៈកម្មការ ដោយខុសច្បាប់១១ឆ្នាំមកហើយមិនមានការបោះឆ្នោតម្តងណាឡើយ ទោះបីលក្ខន្តិកៈតម្រូវឱ្យបោះឆ្នោតគណៈកម្មការ១ឆ្នាំម្តងក៏ដោយ ប៉ុន្តែ ពួកគេពុំបានអនុវត្តគោលការណ៍ទេ ។ ដូចជាបញ្ហាលុយក្រុមអាចារ្យទាំងនោះមិនបានរាយការណ៍ឱ្យសមាជិកគណៈកម្មការ និងពុទ្ធបរិស័ទដឹងឮ ថា តើចំណូលចំណាយអ្វីខ្លះ ក្នុង១ឆ្នាំម្តងៗទេដែរ ។ ។

អ្នកសកម្មប្រយុទ្ធតវ៉ាដើម្បីតម្លាភាពវត្តខ្មែរ លោក សុទ្ធ ប៉ាលីន និយាយប្រាប់ខ្មែរប៉ុស្តិ៍ឱ្យដឹងថា ការនាំគ្នាជីកឫសគល់ពីបញ្ហាលុយកាក់មិនមែនជាការនាំមកនូវការបំបែកបំបាក់គ្នាបង្កវិទ្ធស្សនាវត្តនោះទេ គឺយើងចង់ឱ្យមានភាពត្រឹមត្រូវដើម្បីសង្គមខ្មែរ បម្រើសាសនាក្នុងផ្លូវទៀងត្រង់ទៅរកការអភិវឌ្ឍន៍ ដូចជាបញ្ហាលុយកាក់ចំណូលថវិការវត្តជាង៩ម៉ឺនដុល្លារ និងប្រាក់បានពីការជួលផ្ទះអគារដែលលុយវត្តទិញបាន

(តទៅទំព័រទី២០)



បរិវេណវត្តអារាម



ព្រះចៅអធិការវត្ត គូ ម៉ៅ



ពុទ្ធបរិស័ទស្តាប់ការស្នើសុំគណៈកម្មការបំភ្លឺរឿងលុយកាក់



មីង កែច រៀបរាប់ភាពមិនប្រក្រតីរបស់អាចារ្យ វ៉ែន

# ធនាគារមួយកំពុងចរាចរសែកអង្គរវត្ត និងមនុស្សអុំទូក

**ដោយ : ស្រីនាថ**

ធនាគារមួយឈ្មោះ Golden Coast Bank ដែលគេអួតអាងថា ជាធនាគារខ្មែរកើតមានដំបូងនៅលើទឹកដីអាមេរិក បានចេញចរាចរសែកដែលរំលេចដោយរូបប្រាសាទអង្គរវត្ត និងរូបមនុស្សអុំទូកឱ្យដល់អតិថិជនជាលក្ខណៈសែកបុគ្គល ឬជាអ្នកជំនួញ ។ ដែលបំណងនេះត្រូវបានមន្ត្រីធនាគារមួយនេះអះអាងថា ដើម្បីទាក់ទាញភ្ញៀវខ្មែរ ឬបរទេសក្នុងការបើកកុងចាយវាយ ឬសន្សំប្រាក់ខ្ចីប្រាក់ផងនោះ ។ និងជាមួយនេះផងដែរពួកមន្ត្រីនៃធនាគារនោះបានឱ្យដឹងថា កំពុងជួយធ្វើការផ្សព្វផ្សាយពីវប្បធម៌ អរិយធម៌ខ្មែរ ដែលរូបប្រាសាទអង្គរវត្តជាតំណាងនៃដួងព្រលឹងខ្មែរសម័យមហាអំណាចសេដ្ឋកិច្ចនៃតំបន់អាស៊ី និងជាទីតំបន់អច្ឆរិយវត្ថុដ៏អស្ចារ្យក្នុងពិភពលោក និងរូបមនុស្សអុំទូកចង់សបញ្ជាក់ពីវីរភាពក្នុងប្រវត្តិសាស្ត្រពីភាពអង់អាចក្លាហានរបស់ទាហានក្នុងសង្គ្រាមសឹកការពារសត្រូវឈ្លានពាននាអតីតកាលសតវត្សរ៍ទី១១ នៃរាជអង្គរបូរីត្រួតត្រាដោយព្រះបាទជ័យវរ្ម័នទី៧ ។

អ្នកស្រី សទ្ធា សាន នាយកគ្រប់គ្រងអតិថិជននៃធនាគារខ្មែរនោះបានអះអាងថា ការចរាចរជាសែកមានរូបអង្គរវត្ត ឬព្រះរាជពិធីបុណ្យអុំទូកបានផ្តើមចាប់តាំងពីខែវិច្ឆិកាកន្លងទៅនេះ បំណងទាក់ទាញភ្ញៀវខ្មែរ ឬបរទេសក្នុងការរកស៊ីជាមួយធនាគារយើងដូចជាការបើកកុងចាយវាយ ឬសន្សំប្រាក់ខ្ចីប្រាក់ ។ និងក៏ចង់បង្ហាញទៅសហគមន៍ខាងក្រៅថា ខ្មែរក៏មានធនាគារមួយអាចរកស៊ីជាលក្ខណៈអន្តរជាតិបានដែរ ។




អ្នកស្រី សិទ្ធា សាន ដែលជាប្រធានក្រុងខ្មែរផងនោះ បានអះអាងថា រូបប្រាសាទអង្គរវត្តជាដួងព្រលឹងនៃជាតិខ្មែរ ដែលពិភពលោកជាតិសាសន៍ណាក៏គេស្គាល់ខ្មែរ នៅពេលគេឃើញនិមិត្តរូបប្រាសាទអង្គរវត្ត ។ ដូច្នេះការដែលធនាគារ Golden Coast Bank យករូបប្រាសាទអង្គររំលេចក្នុងសែក គឺបំណងជួយលើកកំពស់នូវវប្បធម៌ អរិយធម៌ខ្មែរ និងក៏ជាការជួយផ្សព្វផ្សាយក្នុងលក្ខណៈទាក់ទាញភ្ញៀវទេសចរទៅកាន់ប្រទេសកម្ពុជាផងដែរ ។

រូបប្រាសាទអង្គរវត្តក៏ត្រូវបានពួកឈ្មួញបរទេសជារឿយៗតែងតែគេញយកផលប្រយោជន៍ដោយល្មើសច្បាប់ដាក់ទង់ជាតិខ្មែររូបអង្គរលើកប៉ាល់ដឹកទំនិញគេចពន្ធដូចជាជនជាតិកូរ៉េខាងជើងជាដើម និងថ្មីៗនៅប៉ុន្មានខែឆ្នាំនេះ ពួកឈ្មួញយួននៅស្រុកបារាំងបានឆ្លៀតគេញប្រើប្រាស់រូបប្រាសាទអង្គរវត្តដាក់លើខ្នង Phone កាតទូរស័ព្ទ ដើម្បីជំនួញជួញដូររបស់ខ្លួនដោយមិនអៀនខ្មាស ។ ប្រាសាទអង្គរវត្តកំពុងតែក្លាយខ្លួនទៅជាទីកន្លែងឧស្សាហកម្មទេសចរណ៍គ្មានផ្សេង ដែលទាញភ្ញៀវអន្តរជាតិក្នុងឆ្នាំ២០០៧នេះជិត២លាននាក់ទៅកំសាន្ត ។ នេះបើតាមការអះអាងរបស់លោករដ្ឋមន្ត្រីទេសចរណ៍ ថោង ខុន បានអះអាងប្រាប់ខ្មែរប៉ុស្តិ៍ឱ្យដឹងដោយលោករីករាយដំណឹងថ្មីនេះថា មានធនាគារខ្មែរបានយករូបអង្គរវត្តទៅប្រើប្រាស់ក្នុងបំណងល្អ ដើម្បីលើកតម្កើងជាតិយើង ។

ធនាគារខ្មែរនេះបានបើកបំរើសេវាកម្មអតិថិជនកាលពីខែ សីហា ឆ្នាំ២០០៧ ដែលមន្ត្រីបំរើការងារនិយាយថា មានភ្ញៀវជាខ្មែររកស៊ីជាមួយប្រមាណ៦០% និងភ្ញៀវបរទេស៤០% ៕

## បណ្ណាល័យ Mark Twain...

របស់ឪពុកម្តាយគេតាមរយៈការអានសៀវភៅនោះ ។

បណ្ណាល័យ Mark Twain បានសម្ពោធឱ្យប្រើប្រាស់កាលពីខែកញ្ញាឆ្នាំនេះ ដែលមានទំហំធំទូលាយបំពាក់ទៅដោយសំភារៈបច្ចេកទេសទំនើបក្នុងតម្លៃជាង១៣លានដុល្លារនោះ គឺនៅចំកណ្តាលក្រុងខ្មែរផ្លូវ Anaheim ដែលក្រុមខ្មែរយើងបានរួមថវិកាគ្នា ដោយដាក់វិភាគទានឱ្យបាន១៥ម៉ឺនដុល្លារ សំរាប់ប្តូរយកទីកន្លែងមួយផ្នែកពីបណ្ណាល័យនេះ ក្នុងការរៀបចំឱ្យក្លាយទៅជាមណ្ឌលវប្បធម៌ខ្មែរមួយ ។

អ្នកស្រី Su San បានថ្លែងថា បើបងប្អូនចង់ជួយឧបត្ថម្ភថវិកា សូមទាក់ទង ឬផ្ញើ Checks or Money Orders ទៅកាន់ Friends of The Long Beach Public Library 101 Pacific Ave

Long Beach, CA 90822

ឬទៅ The Mark Twain Library,1401 East Anaheim Street, Long Beach, CA 90813 ៕/

## ថ្ងៃ ៧ មករា ជាថ្ងៃរំដោះ ឬ...

លោក គង់ គាំ មានប្រសាសន៍យ៉ាងដូច្នេះថា :"ប្រជាពលរដ្ឋភាគច្រើនណាស់ គេយល់ឃើញថា មកពី២ ធ្នូ មកពី៧ មករា មកពី យៀកណាម មកពីកុម្មុយនីស្តហ្នឹង ហើយដែលធ្វើឱ្យបាត់ឯករាជ្យបាត់បូរណភាពទឹកដី បាត់សេចក្តីថ្លៃថ្នូរ បាត់ជីវភាពចម្រុងចម្រើនទាំងអស់ហ្នឹង" ។

លោក ប៉ែន សុវណ្ណ អតីតមេដឹកនាំខ្មែរម្នាក់ទៀត ដែលកាន់ តំណែងជាប្រមុខបក្ស និងប្រមុខរដ្ឋាភិបាល សាធារណរដ្ឋប្រជាមានិតកម្ពុជាឆ្នាំដំបូងនៃការត្រួតត្រារបស់កងទ័ពយៀកណាមនិយាយថា ការជួយរំដោះខ្មែរជាគុណបំណាច់ដ៏ប្រពៃហើយ ប៉ុន្តែ ខ្មែរចង់មានសិទ្ធិសេរីភាពជ្រើសរើសវាសនាខ្លួនដោយខ្លួនឯង ។

លោក ប៉ែន សុវណ្ណ បានមានប្រសាសន៍ថា :"ថ្ងៃ៧ មករានេះ... យើងមិនភ្លេចទេគុណរបស់គេ ប៉ុន្តែយើងត្រូវបដិសេធត្រូវប្រឆាំងនឹងគំនិតអាក្រក់របស់ យៀកណាម ដែលបានយក និងកំពុងយកប្រទេសកម្ពុជាហ្នឹងធ្វើជាអាណានិគម" ។

ក្នុងសៀវភៅ : ហេតុអ្វីយៀកណាមឈ្លានពានប្រទេសកម្ពុជាវប្បធម៌មិនយោបាយ និងមូលហេតុនៃសង្គ្រាម ?

បណ្ឌិត ស្តែហ្វិន ម៉ូរីស្ត វិភាគឃើញថា យៀកណាមត្រូវការសន្តិភាពបរិបូណ៌ ដើម្បីកាត់បន្ថយការចំណាយលើវិស័យយោធា និងទាក់ទាញជំនួញ ព្រមទាំងជំនួញពីបរទេសបន្ទាប់ពីធ្វើសង្គ្រាមអស់រយៈពេល៣០ឆ្នាំទៅហើយនោះ ។ ប៉ុន្តែលោកថា មេដឹកនាំហាណូយនៅរក្សាទិសដៅមួយដែលព្យាយាមចង់បានជាច្រើនទសវត្សរ៍មកហើយនោះ គឺការត្រួតត្រាកម្ពុជា បើបញ្ចូលនយោបាយក្នុងជួរថ្នាក់ដឹកនាំបក្សកុម្មុយនីស្តកម្ពុជាយកគំរូតាមប្រទេសលាវមិនបានសម្រេចផលមធ្យោបាយយោធាជាជម្រើសតែមួយគត់ដើម្បីឱ្យបានសម្រេចទិសដៅនេះ ។

ប៉ុល ពត កាលនៅរស់ធ្លាប់ប្រៀបធៀបវិបត្តិយោធារវាងកម្ពុជាប្រជាធិបតេយ្យ និងវៀតណាមដូច្នេះ :"ខ្ញុំស្នើថា ឱ្យមានកិច្ចព្រមព្រៀងសន្ធិសញ្ញាមិត្តភាពសហការរវាងគ្នាកម្ពុជា និងយួន តែយួនមិនឆ្លើយតប ហើយយួនវាយប្រហារយើងនៅតាមព្រំប្រទល់ ដូច្នោះទាំងអស់គ្នាគឺថា ទ្រាំលំបាក...។ ហើយគេថា យើងខ្ញុំវាយយួនតើវាយយ៉ាងម៉េចខ្មែរតូចប៉ុណ្ណឹងមានអាវុធប៉ុណ្ណឹងចង់តែរស់នៅសុខសាន្ត" ។

ប៉ុន្តែសម្តេចនរោត្តម សីហនុ ធ្លាប់មានបន្ទូលនៅឆ្នាំ ១៩៧៥ ថាពួកខ្មែរក្រហមទូលព្រះអង្គថា នឹងទៅយកកម្ពុជាក្រោមមកវិញ ។

ប្រវត្តិវិទូខ្លះទៀតនិយាយថា ដោយសាររឿងទាមទារទឹកដីនោះហើយ ទើបក្រុមខ្មែរក្រហមវាយប្រហារបំផ្លិចបំផ្លាញភូមិស្រុកក្នុង ខេត្តតៃនីញ ដែលរដ្ឋអំណាចយៀកណាម នាំអ្នកកាសែតហុងគ្រី ឈ្មោះ កាន់ឌ័រ ដូរ៉ា ទៅថតរូប ។

ដើមខែឧសភា ១៩៧៥ យោធាខ្មែរក្រហមវាយប្រហារលើកោះមួយចំនួនដែលយៀកណាមកាន់កាប់ក្នុងឈូងសមុទ្រថៃ ដោយទាមទារថា ជាកោះខ្មែរ តែបារាំងប្រគល់ទៅឱ្យយៀកណាម ហើយក្រោយមកកាន់កាប់ដោយយៀកណាមខាងត្បូង ។

ថ្វីបើភ្ញាក់ខ្លួនមិននឹកស្មានថា ខ្មែរក្រហមហ៊ានធ្វើដូច្នោះក្តីកងទ័ពកុម្មុយនីស្តយៀកណាមវាយតបតវិញ និងយកកោះទាំងនោះកាន់កាប់វិញទាំងស្រុង ព្រមទាំងចាប់ទាហានខ្មែរក្រហម៣០០នាក់ ជាឈ្លើយសឹកទៀតផង ។

លើសពីនេះទៅទៀត យៀកណាមប្រើកម្លាំងសឹកវាយយកកោះពូឡូវៃកាន់កាប់ទៀតនៅដើមខែមិថុនា ១៩៧៥ ។

ក្រោយថ្ងៃជ័យជំនះ ១៧ មេសា ១៩៧៥ ខ្មែរក្រហមមានយោធា២៣០នាក់ កងវរសេនាតូច ឬគិតជាចំនួនមនុស្សមានពី៥៥.០០០ទៅ៦០.០០០នាក់ ។ រីឯយៀកណាមមាន៦៨៥.០០០នាក់ កងនាវាចរណ៍មាន៣.០០០នាក់ កងទ័ពអាកាស១២.០០០នាក់ រួមនឹងយន្តហោះចម្បាំងគ្រប់ប្រភេទ២៦៨គ្រឿង ។

ខ្មែរក្រហមគន់គូរប៉ាន់ស្មានខុសចំពោះយុទ្ធសាស្ត្រក្រុងហាណូយ ព្រោះយល់ថា មហាមិត្តចិន ជាអ្នកទប់យៀកណាម បាន ។

អតីតឧបនាយករដ្ឋមន្ត្រី និងជារដ្ឋមន្ត្រីការបរទេសខ្មែរក្រហមលោក អៀង សារី បានថ្កោលទោសអតីតយុទ្ធមិត្តរបស់មុនថ្ងៃ៧ មករា ថា ព្យាយាមបំផ្លាញផលបដិវត្តន៍របស់ប្រជាជនកម្ពុជាដែលខំប្រឹងប្រែងដណ្តើមបានយ៉ាងលំបាក ។

លោក អៀង សារី បានថ្លែងយ៉ាងដូច្នេះថា :"ទន្ទឹមនឹងចក្រពត្តិអាមេរិក យួន ឈ្លានពានវៀតទីលេបទឹកដីបានធ្វើឱ្យសកម្មភាពបំផ្លាញកម្ពុជាប្រជាធិបតេយ្យយ៉ាងមមាញឹក និងឃោរឃៅកាចសាហាវបំផុតនេះ គឺមកពីយួនមានមហិច្ឆតាពីយូរមកហើយចង់យកកម្ពុជា និងបំបាត់ពូជសាសន៍កម្ពុជាក្នុងប្រវត្តិសាស្ត្រ ។ មិនយូរប៉ុន្មានមកដល់មានសង្គ្រាមលោកលើកទី២ យួនបានលេបទឹកដីកម្ពុជា ហៅថា កម្ពុជាក្រោម ដែលមានផ្ទៃដីចំនួន៦៥.០០០គីឡូម៉ែត្រក្រឡា និងប្រជាជន ដែលសព្វថ្ងៃមានជិត៤លាននាក់" ។

ការប៉ះទង្គិចគ្នាដោយអាវុធឥតឈប់ឈរនៅតាមព្រំដែនកម្ពុជា យៀកណាម បានជំរុញឱ្យមេដឹកនាំហាណូយអត់ទ្រាំមិននិយាយស្តីតទៅទៀតលែងបាន ។

ពណ៌នាអំពី អៀង សារី ប្រាប់ឯកអគ្គរដ្ឋទូតសូវៀតថ្ងៃទី១៦ វិច្ឆិកា ១៩៧៦ នាយករដ្ឋមន្ត្រី ផាំ វ៉ាន់ដុង ថា នរណាក៏ដឹងថា អៀង សារី និយមទៅខាងចិនដែរ ។ ប៉ុន្តែកុម្មុយនីស្តយៀកណាមនៅតែមានសង្ឃឹមដូចគ្រាដើមដំបូងជានិច្ចថា ហាណូយ អាចមានឥទ្ធិពលនៅក្នុងជួរដឹកនាំខ្មែរក្រហម ព្រោះគេយល់ថា យៀកណាមជាអ្នកជួយបង្កើតនិងទំនុកបំរុងបក្សកុម្មុយនីស្តកម្ពុជាជាច្រើនទសវត្សរ៍មកហើយ ។

ហាណូយ ជឿថា ខ្មែរក្រហមនឹងគោលការណ៍នយោបាយនិយមទៅរកយៀកណាមដូចជាប្រទេសលាវមិនខាន ។

ផាំ វ៉ាន់ដុង អធិប្បាយបន្ទាប់ពីអតីតប្រធានសភាប្រជាជន នួន ជា ឡើងជំនួស ប៉ុល ពត ជានាយករដ្ឋមន្ត្រី ខែកញ្ញា ១៩៧៦ថា យៀកណាម ងាយធ្វើការងារជាមួយ នួន ជា ជាងមេខ្មែរក្រហមដទៃ ព្រោះលោកស្គាល់ នួន ជា ច្បាស់ជាងអ្នកដទៃ ។

ឡេ ស្វ៊ាន់ មេបក្សកុម្មុយនីស្តយៀកណាម ក៏មានទស្សនៈដូច ផាំ វ៉ាន់ដុង ដែរ ។ គាត់ថា មេខ្មែរក្រហមទាំងអស់សុទ្ធតែអាក្រក់មានតែ នួន ជា ទេ ជាមនុស្សមានទស្សនៈនិយមទៅរកយៀកណាមហើយមនុស្សនេះហើយជាមនុស្សរបស់យៀកណាម ព្រោះ នួន ជា គឺជាមិត្តសម្លាញ់របស់គាត់ផ្ទាល់ ។

ក្រុងហាណូយ ក៏បាយគន់គូរខុសដែរ ប៉ុល ពល និយាយថា ហាណូយមានមនុស្សបំរុងផ្សេងទៀតទុក

(តទៅទំព័រទី៣១)

# ល្បែងឆ្នោតទាក់ទាញភ្ញៀវក្នុងរបររកស៊ី

**ដោយ : ស្រីនាថ**

កាលពីសប្តាហ៍មុនក្រុមហ៊ុន Phnom Penh Express លក់ សំបុត្រយន្តហោះ និងផ្ញើប្រាក់ទៅកាន់ប្រទេសកម្ពុជា ឬវៀតណាម បានផ្តើមកម្មវិធីចាប់ឆ្នោតផ្សងសំណាងជាលើកដំបូងរបស់ខ្លួន បន្ទាប់ពីក្រុមហ៊ុននេះបានបើករបររកស៊ីអស់រយៈពេល៣ឆ្នាំ ដែលម្ចាស់អះអាងថា ជាការធ្វើដើម្បីលើកទឹកចិត្តអតិថិជន និងបង្កើនទំនាក់ទំនងគ្នា ដែលបានជួយគាំទ្រក្នុងការទិញសំបុត្រយន្តហោះ និងផ្ញើប្រាក់ទៅកាន់ប្រទេសកម្ពុជា ។ ខណៈដែលមានការរិះគន់ពីបណ្តាទីភ្នាក់ងារទេសចរណ៍លក់សំបុត្រយន្តហោះដទៃទៀតថា ក្រុមហ៊ុន Phnom Penh Express កំពុងតែធ្វើហួសហេតុពេកហើយ ។

ប៉ុន្តែប្រតិកម្មនេះ ត្រូវបានលោក គៀត វ៉ាសនា ម្ចាស់ក្រុមហ៊ុន Phnom Penh Express និយាយថា វាជាការធម្មតាទេក្នុងផលរបររកស៊ី ការជួញដូរត្រូវតែរិះរកវិធីសាស្ត្រគ្រប់បែបយ៉ាងដើម្បីទាក់ទាញអតិថិជនឱ្យមកកាន់កន្លែងខ្លួន ដោយគ្មានអ្នកណារិះគន់អ្នកណាបានទេ ឱ្យតែយើងឈរលើគោលការណ៍ត្រឹមត្រូវតាមផ្លូវច្បាប់ មិនបោកប្រាសក្នុងផ្លូវអាក្រក់ ។

អ្នករិះគន់និយាយាថា Phnom Penh Express បញ្ចុះតម្លៃ សំបុត្រយន្តហោះហួសហេតុពេក ដែលធ្វើឱ្យពួកគេពិបាករកស៊ី និងទទួលយកបានពីភ្ញៀវជាមួយនឹងក្រុមហ៊ុនយន្តហោះក្នុងឋានៈយើងជាភ្នាក់ងារដូចគ្នា ។






អ្នកអាជ្ញាកណ្តាលបានឱ្យយោបល់ថា ជាការពិបាកដែរថា អ្នកណាខុស ឬអ្នកណាត្រូវក្នុងផលរបររកស៊ី ព្រោះភ្ញៀវកាលណាឃើញក្រុមហ៊ុនណាលក់ថោក តែងតែចង់បានទៅខាងនោះហើយជាមួយជំនាញទាក់ទាញភ្ញៀវតាមវិធីសាស្ត្រជាអ្នកសេដ្ឋកិច្ចជំនួញ ។ តួយ៉ាង ដូចជាភ្នាក់ងារលក់សំបុត្រយន្តហោះអញ្ចឹង គេគួរតែមានជាសមាគមទេសចរណ៍មួយដើម្បីស្រុះស្រួលគ្នាដើរទៅរកផ្លូវ ឬច្រកតែមួយ គឺការឯកភាពតម្លៃគ្នាតែមួយ បើយើងចង់ឃើញការរកស៊ីជំនាញដូចគ្នាដោយមិនចង់ឱ្យភ្នាក់ងារណាមួយដួលរលំនោះ ។

ថ្ងៃផ្សងសំណាងនាឱកាសថ្ងៃបុណ្យអុំទូក អកអំបុក សំពះព្រះ ខែ ២៥ វិច្ឆិកា នៅទីស្នាក់ការក្រុមហ៊ុន Phnom Penh Express គេឃើញមនុស្សម្នាជិត២០០នាក់បានទៅកាន់ទីនោះដើម្បីចាប់ឆ្នោតយកសំណាងរង្វាន់៤ដំណាក់ កាលដែលរង្វាន់លេខ១បានទៅឈ្មោះ យូ ប្រពៃ បានសំបុត្រយន្តហោះទៅមកកម្ពុជាឬក៏អាចដូរយកលុយក៏បាន ។ រីឯរង្វាន់លេខ២ បានទៅឈ្មោះ លឹម សៀង ទូរស័ព្ទ Nokia N95 និង គីម សួន រង្វាន់លេខ៣ ទូរស័ព្ទដៃម៉ាក Motorola V3, រីឯ រង្វាន់លេខ៤ បានទៅឈ្មោះ លឹម លក្ខិណា កាតទូរស័ព្ទចំនួន៥០កាត ដែលកាត១តម្លៃ $5 ដុល្លារ ។

ចំណែកអ្នកដែលគ្មានសំណាងនាឱកាសនោះ ក៏ត្រូវបានជូនរង្វាន់លើកទឹកចិត្តម្នាក់១កាត ទូរស័ព្ទតម្លៃ៥ដុល្លារផងដែរ ជាមួយអាហារថ្ងៃត្រង់មួយពេល ។

ក្រុមភ្ញៀវនាពេលនោះ និយាយថា វាជាការសប្បាយមួយដែលអ្នករកស៊ីចេះច្នៃឱ្យមានកម្មវិធីឆ្នោតផ្សងសំណាងដើម្បីលើកទឹកចិត្តដល់ភ្ញៀវដូចជាពួកគាត់ដែលរាល់ខែ ឬមួយឆ្នាំម្តង ឬ២ដង តែងតែផ្ញើលុយទៅបងប្អូន និងទិញសំបុត្រយន្តហោះទៅលេងស្រុកទេស ។

ហើយក្រុមភ្ញៀវទាំងនោះ ក៏បានរិះគន់ផងដែរថា អ្នកឈ្នះឆ្នោតទាំង៤នាក់មិនមានវត្តមាននាពេលនោះទេ ។ ដូច្នេះ ម្ចាស់ក្រុមហ៊ុនគួរចាត់ទុកជាមោឃៈមិនទទួលយកដើម្បីទុកឱកាសឱ្យអ្នកមកចាប់បន្តរហូតទាល់តែអ្នកចូលរួមនឹងត្រូវ ទើបកម្មវិធីសប្បាយ ។ ហើយអ្នកឈ្នះបានរីករាយនៅមុខអ្នកមិនឈ្នះរង្វាន់ដើម្បីឱ្យអ្នកកាសែតបានថត ឬចុះជាព័ត៌មានជួបជាមួយអ្នកសំណាងបានហេងត្រូវឆ្នោតទាំងនោះ ។

ម្ចាស់ក្រុមហ៊ុននិយាយថា នេះជាបទពិសោធន៍ដំបូងត្រូវតែមានការរិះគន់ខុស ឬត្រូវ ដើម្បីជាការកែលំអរថ្ងៃពិធីក្រោយៗទៀត ។/






ចាប់បើកហើយ! ការត្រើរាំកំសាន្ត!




For info.
(562) 400-7678
Fri. & Sun. $5
Expt.Sat.$10



# New Band in Khmer Town

ROSMANNEE RESTAURANT 1223 E. Anaheim St., Long Beach, CA 90813
Started: 11-30-07 to 12-31-07 8:00 pm to 1:00 pm
Except. Sun. 8:00 pm - 12:00pm

Proper attire & Must be 21

# "យល់ញាតិឃ្លាត..."?

នឹងអ្នកកាន់អំណាចផ្តាច់មុខនៃកម្ពុជា ។

ជាមួយប្រវត្តិសាស្ត្រដែលភ្ជាប់ក្នុងកាសែតថ្ងៃនេះ យើងបានឃើញថា នាចុងបញ្ចប់នៃសង្គ្រាមលោកលើកទី២ ប្រទេសជប៉ុនបានសារភាពចុះចាញ់ទ័ពសម្ព័ន្ធមិត្ត ដោយសារគ្រាប់បែកបរិមាណូ២គ្រាប់បានកំទេចកម្លាំងពង្រីកទឹកដីរបស់ជប៉ុន នៅហ៊ីរ៉ូស៊ីម៉ា និង ណាកាសាគី មក គឺជាទោសដ៏ធ្ងន់ធ្ងរមួយដែលពលរដ្ឋជប៉ុនត្រូវទទួលយកដោយបង្ខំ រីឯអ្នកគាំទ្រជប៉ុននៅកម្ពុជា គឺលោក


សម្តេចព្រះនរោត្តម សីហនុ


លោក សឺង ង៉ុក ថាញ់

នាយករដ្ឋមន្ត្រី សឺង ង៉ុកថាញ់ បានត្រូវបារាំងនាំខ្លួនយកទៅដាក់ពន្ធនាគារឯស្រុកបារាំងទៅ ។ ចំណែកឯនៅប្រទេសបារាំងវិញប្រមុខរដ្ឋាភិបាលយោធាបារាំង គឺឧត្តមសេនីយ៍ ប៉េតាំង បានត្រូវរដ្ឋាភិបាលរំដោះកាត់ទោសប្រហារជីវិត គឺជាការអនុវត្តន៍នូវច្បាប់រដ្ឋមួយដែលមានលក្ខណៈឯករាជ្យនៅក្រៅកណ្តាប់ដៃនៃអាជ្ញាធរ ។ សម្តេចនរោត្តម សីហនុ ឡើងគ្រងរាជ្យថ្មីថ្មោង ដោយសារបារាំង , ជប៉ុន យោធានិយមបានត្រឹមទទួលទណ្ឌកម្មឱ្យអានលិខិតសុំទោសដល់ពលរដ្ឋខ្លួនឯង និងដល់រដ្ឋអំណាចបារាំងថ្មី បើទោះបីដីកម្ពុជាផ្នែកខាងជើងបានត្រូវកាត់ទៅឱ្យសៀមរួចហើយក្តី ។

ប្រជាជាតិខ្មែរ ក្រោយពីជប៉ុនចុះចាញ់ទៅពុំបានដឹងរឿងពិតល្អ ឬអាក្រក់ប៉ុណ្ណានោះទេ ដោយសារអ្នកចេះដឹងខ្មែរមានតិចតួច ហើយខ្មែរជាប្រទេសក្រត្រូវការពឹងផ្អែកលើអ្នកចេះ អ្នកមានទ្រព្យ និងអ្នកមានអំណាច ម្ល៉ោះហើយការនាំកម្ពុជាទៅចូលជាមួយយោធានិយមជប៉ុន ឬការបាត់បង់ភាគខាងជើងនៃកម្ពុជាពុំបានត្រូវរាស្ត្រខ្មែរពិចារណាឱ្យបានត្រឹមត្រូវ ហើយអ្នកចេះដឹង និងអ្នកមានអំណាចពុំអាចមានកំហុសបានឡើយ ។ ហេតុទាំងនេះហើយដែលខ្មែរច្រើនទទួលខ្លួនថា "ខ្មែរស៊ុបទ្រពមិនចោលចែចូវ "បានន័យថា មិនវាយតម្លៃយកត្រូវ ឬខុសជាធំទេ តែយកការចំណេញ ឬខាតមកជាមូលដ្ឋានទៅវិញ ។ ការបោះបង់កិច្ចពិចារណារកត្រូវ ឬខុស ហើយយកអ្វីផ្សេងជាសំខាន់ទៅវិញនោះ បានធ្វើឱ្យប្រជាជាតិខ្មែរមានការលំបាកនឹងក្លាយជាអ្នកគោរពច្បាប់ និងក្លាយជានីតិរដ្ឋ ។ វប្បធម៌នេះ បានធ្វើឱ្យអ្នកនយោបាយអ្នករៀនចេះច្រើន អ្នកមានសម្បត្តិឆ្លៀតយកឱកាសសម្រាប់ពង្រឹងប្រយោជន៍ផ្ទាល់ខ្លួនបានយ៉ាងងាយស្រួលតាំងពីច្រើនតំណរមនុស្សរួចមកហើយ ។ ឧទាហរណ៍ជាក់ស្តែងដែលជាប្រវត្តិសាស្ត្រខ្មែរ ពុំបានបង្រៀនអ្វីដល់អនាគតខ្មែរដូចជា "មន្ត្រីខ្មែរក្រណាស់ បើមិនពុករលួយខ្លះរស់យ៉ាងម៉េចកើត" ឬក៏ថា "ដើម្បីកុំឱ្យឈ្លោះគ្នាអាចមានសង្គ្រាម ដូច្នោះបង្កើតឱ្យមាននាយករដ្ឋមន្ត្រីខ្មែរដល់ទៅពីរកន្លែងស្មើគ្នាទៅ ទើបបានសុខ" ឬក៏និយាយទៀតថា "អាយួនជាក្រពើវង្វេងបឹងខ្ញុំជួយវាទាល់តែអស់រាជបល្ល័ង្ក វាឥតដឹងគុណខ្ញុំទេ"...ខណៈពេលដែលវប្បធម៌ត្រូវ និងខុស ពុំបានជ្រួតជ្រាបក្នុងសង្គមខ្មែរបានច្រើននោះទេ ភាពយោគយល់នឹងក្លាយទៅជាទន្លះសម្រាប់បង្កើតអ្នកនយោបាយដែលមិនបំរើជាតិអ្នកចេះដឹងពុំអាចជាបញ្ញវន្ត រីឯអ្នកមាននឹងមិនក្សោះខ្សត់...ច្បាប់មុខជាមិនអាចកាត់ទោសអ្នកខុសទាំងនោះបានជាមិនខាន ។

អត្ថបទយល់ញាតិឃ្លាតច្បាប់នេះ គ្រាន់តែចង់បង្ហាញពីឧទាហរណ៍ដែលយើងបានទទួលពីអតីតកាលអំពីការយោគយល់គ្នានេះថា "តើខ្មែរយើងទទួលទារុណកម្មប៉ុណ្ណាហើយ ?" តើអនាគតទៅ "តើអតីតកាលដ៏ជូរចត់របស់យើងនឹងបង្រៀនយើងឱ្យគេចពីភាពអហិងហោចនេះ រួចបានឬទេ?"...ទំនងជាតែវប្បធម៌នេះមិនទាន់បានទេ ដោយសារនៅសល់ឧទាហរណ៍មួយជាក់ស្តែងនាពេលនេះថា "ពួកខ្មែរក្រហមក៏ជាអ្នកស្នេហាជាតិ" បើទោះជាលទ្ធផលនៃការគ្រប់គ្រងជាតិជិត៤ឆ្នាំ បានធ្វើឱ្យពលរដ្ឋខ្លួនឯងបាត់បង់ជីវិតអស់២លាននាក់ក៏ដោយក្តី ។/




# KHMER STAR GIFT SHOP 1

**1911 E. 10th Street • Long Beach, CA 90813**
**Bus: (562) 591-0262 • Cell: (562) 841-1616 /(562) 256-4328**

## ហាងខ្មែរស្តាការ៉ាអូខេនិងលក់វត្ថុអំណោយ

-គឺជាហាងលក់នូវសំភារៈសិក្សា សម្លៀកបំពាក់ ប្រដាប់ប្រដាប្រើប្រាស់ផ្ទះបាយបន្ទប់គេង ក្នុងលំនៅដ្ឋានជាលក្ខណៈដុំប្អូរាយ មានតម្លៃសមរម្យ ។

-អ្វីដែលសំខាន់ទៀតនោះ ហាងខ្មែរស្តា ក៏មានដាក់លក់នូវចម្រៀងការ៉ាអូខេខ្មែរ, បរទេស, ភាពយន្តបូរាណឬសម័យ និងបទចម្រៀងពិរោះរណ្តំចិត្តបែបសម័យទំនើបចម្រុះ មិនថាក្នុងសម័យអធិរាជសម្លេងមាសគ្មានប្រៀប ស៊ិន-ស៊ីសាមុត, អ្នកនាងរស់-សេរីសុទ្ធា ឬក្រុមតារា-អ្នកចម្រៀងថ្មីៗជំនាន់ក្រោយឡើយ ។




-ហាងខ្មែរស្តាដែលម្ចាស់ជាចាងហ្វាងផលិតកម្មការ៉ាអូខេ **SM** ម៉ៃ-សាម៉េត ផងនោះ សូមស្វាគមន៍ចំពោះបងប្អូនខ្មែរដោយក្តីរាក់ទាក់ពីក្រុមហ៊ុនយើងដែលបានសិរិតសំរាំងនូវបទចម្រៀងពិរោះៗ និងនិពន្ធបទថ្មីៗដែលឆ្លុះបញ្ចាំងពីសង្គមវប្បធម៌ខ្មែរបំណងបំពេរចក្ខុអារម្មណ៍ឬសោតអារម្មណ៍ឲ្យបងប្អូនមានក្តីសប្បាយរីករាយពីភាពនឿយហត់ក្នុងការងារ និងបំបាត់ការអផ្សុក ។







# KHMER STAR GIFT SHOP 2

**1432 Atlantic Ave • Long Beach, CA 90813**
**Bus: (562) 591-0262 • Cell: (562) 841-1616**

ចាប់បើកថ្មីបន្ថែមមួយទៀតហើយស្ថិតនៅក្បែរភោជនីយដ្ឋាន ព្រះចន្ទពេញវង់ (LA LUNE) ពីថ្ងៃទី១៣ ខែតុលាតទៅ ក្នុងឱកាសនោះយើងខ្ញុំ នឹងមានលក់ជូននូវ DVD & CD របស់ក្រុមហ៊ុន ម៉ៃ-សាម៉េត (SM) ក្នុងតម្លៃពិសេស ទិញ4 ថែម1CD ។ ហើយជាមួយនេះផងដែរ បើលោក-អ្នកចំណាយប្រាក់ទិញ សំភារៈក្នុងហាងយើងខ្ញុំត្រឹមតែ$20 លោកអ្នកនឹងទទួលបាននូវCDមួយ ។



**សូមអញ្ជើញដោយរួសរាន់ !**

# បើមិនអាចចិញ្ចឹម១០០នាក់ បានទេ ដូច្នេះ ចិញ្ចឹម ១ នាក់ បានហើយ

---

នេះជាពាក្យស្លោករបស់"ម្តាយ តេរេស្សា "ដែលមិនចង់ឃើញកុមារឥតមានអាហារ ។ សហគមន៍មូលនិធិកុមារខ្មែរបានប្រើពាក្យស្លោកនេះ ដើម្បីធ្វើឱ្យមានការ-ចាប់អារម្មណ៍ដល់កុមារខ្មែរច្រើនរយពាន់ដែលខិតខំកាយសំរាមក្រែងប្រទះម្ហូបអាហារបរិភោគ ។

មូលនិធិកុមារខ្មែរ និងរៀបចំរាត្រីស្រមោលសរប្រមូលប្រាក់ជូនជាជំនួយដល់ក្មេងកំព្រាទាំងនោះ នៅថ្ងៃ សៅ ទី ០៨ ខែ ធ្នូ ឆ្នាំ ២០០៧ ។ វេលាម៉ោង ៦ ល្ងាច នៅភោជនីយដ្ឋាន Maxin Saigon ៦១២ ៦៣២ Washinton Avec Philadelphia ។

## សំបុត្រចូល ៥០ ដុល្លារ




## RELIVសុខភាពល្អ

NEWS reliv. UPDATE




ផលិតផលសុខភាពធ្វើពីធម្មជាតិសុទ្ធសាធ នៅសហរដ្ឋអាមេរិកឈ្មោះ RELIV នេះ អាចជួយដល់ភាពជរាទ្រុឌទ្រោមរបស់មនុស្សចាស់ខ្ញុំជា ពិសេសជួយដល់មនុស្សធ្វើការច្រើន នាំឱ្យចាស់មុនអាយុជួយបន្ថយការឈឺចុកចាប់នៅសន្លាក់ដៃជើង ឬរោគស្ត្រី និងបុរសមួយចំនួនគេហៅថា RELIV នេះថាជា "អាហារសុខភាពល្អ" ស្រួលពិសារដែលលោកអ្នកគួរប្រើដូចគ្នានឹងពិសារទឹកក្រូច នារាល់ព្រឹកមុននឹងចេញទៅក្រៅធ្វើការម្តងៗ ដើម្បីលើកកម្លាំងបំពេញការងារដោយងាយស្រួលអ្នកប្រើប្រាស់ RELIV នៅជុំវិញ ស.រ.អា នេះ គ្រប់សាសន៍ សញ្ជាតិ បានថ្លែងអំណរគុណដល់ RELIV អាហារ VITAMIN ដែលបានជួយសំរាលការឈឺចុកចាប់ជួយបន្ថយការប្រើថ្នាំនានាច្រើនមុខ ដោយសារតែការផ្សំផលិតផលនេះ ដើម្បីទៅបំពេញដល់ការខ្វះខាតជីវជាតិក្នុងចំណីអាហារដែលលោកអ្នកពិសាររាល់ថ្ងៃ ។ មានជីវជាតិចិញ្ចឹមសរីរាង្គឡើងវិញ ។ សរីរាង្គយើងក៏ដើរពេញកម្លាំងឡើងវិញ ។ ការឈឺថ្កាត់ក៏ចុះថយទៅបាត់ស្មារតី នឹងកម្លាំងអន់ថយ ក៏កើនឡើងយ៉ាងឆាប់រហ័ស ។

RELIV ជាផលិតផលអាមេរិក តម្លៃថោកមានប្រសិទ្ធិភាពដែលលោកអ្នករកជាវនៅទូរស័ព្ទលេខ..... ហើយ ប្រាប់លេខ Sponsor ។

**ហើយបើលោកអ្នកចង់លក់ RELIV នេះ សូមទូរស័ព្ទសួររកធីម (ធី) លេខ (២១៥) ៧៧៦ ៤១៧៤**



# ការិយាល័យនិពន្ធ

ដោយសារបញ្ហាបច្ចេកទេសកាសែតខ្មែរប៉ុស្តិ៍ សូមធ្វើការកែតម្រូវនៅក្នុងអត្ថបទមួយក្រោមចំណងជើងថា "**របប លន់ នល់ បរាជ័យ ព្រោះតែទាហានពុករលួយ**" ក្នុងលេខចេញផ្សាយឆ្នាំទី០១ លេខទី ០៤ ( ថ្ងៃទី ១៦-៣០ វិច្ឆិកា ២០០៧ ) ក្នុងទំព័រទី ២១ ជួរទី ០៤ ដើមបន្ទាត់ទី ២០ គឺកំហុសឆ្គងលេខនៃចំនួនកងទ័ពរបស់របបសាធារណៈរដ្ឋមិនមែន ២៥.០០០នាក់ទេ គឺ ៣៥.០០០នាក់ ពីផ្តើមដំបូងរហូតដល់ ១៤០.០០០ នាក់ និងទីបំផុត ២៥០.០០០នាក់ ក្នុងស្ថានការនយោបាយតឹងតែងក្នុងសមរភូមិប្រយុទ្ធជាមួយពួកខ្មែរក្រហម និងពួកយួនយៀកកុង ។ ដែលជាទាហានស្ម័គ្រចិត្តទាហានលំអរក្រុងបន្ថែមលើចំនួនទាហានជំនាញសាលានោះ ។

សូមអរគុណ




# ជាមួយថ្លៃ* សេវាកម្មផ្ញើប្រាក់ទាប $11.99 ដុល្លារ

សម្រាប់ការផ្ញើប្រាក់ទៅកាន់ខេត្តក្រុង** ដែលបានជ្រើសរើសក្នុងចំនួនតិចជាង 500 ដុល្លារ

## ជាទូទៅប្រាក់អាចទទួលបានតែប៉ុន្មាននាទី*** ប៉ុណ្ណោះ

✓ ថ្លៃ* សេវាកម្មផ្ញើប្រាក់មិនមានការប្រែប្រួលទៅតាមទីកន្លែងរបស់ភ្នាក់ងារទទួលប្រាក់ឡើយ
✓ មានភ្នាក់ងារផ្ទេរប្រាក់ជាង 100 កន្លែងនៅ 24 ខេត្តក្រុងទូទាំងប្រទេសកម្ពុជា
✓ មិនចាំបាច់មានគណនីនៅធនាគារទាំងអ្នកផ្ញើ និងអ្នកទទួល
✓ មិនមានការគិតថ្លៃសេវាកម្មផ្ទេរប្រាក់ពីអ្នកទទួលឡើយ




សេវាកម្មផ្ទេរប្រាក់ទូទាំងពិភពលោក រហ័សទាន់ចិត្ត និងគួរឲ្យទុកចិត្ត

**សូមទាក់ទងទូរស័ព្ទ 1-800-325-6000**

ភ្នាក់ងារផ្ទេរប្រាក់នៅកម្ពុជាដែលទទួលបានការអនុញ្ញាតពី Western Union:








SBC Bank

| | | | | |
|---|---|---|---|---|
| NHA THUOC THIEN NHIEN<br>1299 E. ANAHEIM ST<br>LONG BEACH, CA 90813<br>TEL: 562-218-2328 | MONEY MART #0772<br>1001 E. PACIFIC COAST HWY<br>LONG BEACH, CA 90806<br>TEL: 562-599-0991 | MONEY MART #0767<br>2375 LONG BEACH BLVD<br>LONG BEACH, CA 90806<br>TEL: 562-427-0253 | CONTINENTAL CURRENCY #704<br>3106 SAN GABRIEL BLVD<br>ROSEMEAD, CA 91770<br>TEL: 626-280-0380 | TOPANGA CHECK CASHING<br>7239 TOPANGA CANYON BLVD<br>CANOGA PARK, CA 91303<br>TEL: 818-594-0057 |
| CONTINENTAL CURRENCY #408<br>1301 LONG BEACH BLVD<br>LONG BEACH, CA 90813<br>TEL: 562-599-1550 | ANTOJITOS LATINOS LIQUOR<br>25381 ALICIA PKWY STE N<br>LAGUNA HILLS, CA 92653<br>TEL: 949-215-9708 | NADERS MARKET<br>25227 REDLANDS BLVD # I<br>LOMA LINDA, CA 92354<br>TEL: 909-796-1660 | CONTINENTAL CURRENCY #413<br>237 LONG BEACH BLVD<br>LONG BEACH, CA 90802<br>TEL: 562-432-5883 | SIAM MARKET<br>2505 E. ANAHEIM ST<br>LONG BEACH, CA 90802<br>TEL: 562-607-8970 |

*សម្រាប់ការផ្ទេរប្រាក់ដុល្លារអាមេរិកប៉ុណ្ណោះ។
**ថ្លៃសេវាកម្មផ្ញើប្រាក់នេះមានសុពលភាពចាប់ពីថ្ងៃទី 22 ខែ តុលា ឆ្នាំ 2007 នេះនៅតាមបណ្ដាភ្នាក់ងារនានាដែលបានចូលរួមក្នុងកម្មវិធីរបស់ខ្លួននៅតំបន់ប្រជុំជន Los Angeles និង Philadelphia ។ Western Union សូមរក្សាសិទ្ធិក្នុងការកែប្រែដោយមិនចាំបាច់ជូនដំណឹងជាមុន។ ថ្លៃសេវាកម្មផ្ញើប្រាក់អាចត្រូវបានគិតច្រើនជាងនេះសម្រាប់ការផ្ញើប្រាក់តាមរយៈទូរស័ព្ទ និង តាមរយៈគេហទំព័រ www.westernunion.com ។
***រយៈពេលនៃការទទួលប្រាក់អាស្រ័យទៅលើកត្តាមួយចំនួននៃសេវាកម្មរួមទាំងម៉ោងធ្វើការ និងទីតាំងរបស់ទីភ្នាក់ងារផ្ទេរប្រាក់ព្រមទាំងភាពខុសគ្នារវាងម៉ោងនៅក្នុងតំបន់នីមួយៗផងដែរ។ ពិនិត្យមើលកត្តាកំណត់ និងលក្ខខណ្ឌនានានៅក្នុងបែបបទ "ផ្ញើប្រាក់"។




# CATHAY PACIFIC




## សូមស្វាគមន៍...

## CATHAY PACIFIC



NEW ECONOMY CLASS

World's first fixed back seat design in our new Economy Class allows passengers to recline without intruding on those seated behind. The uniquely contoured back and the relocation of the literature pocket have also increased leg room for your added comfort.



NEW BUSINESS CLASS

Business travel is redefined in the new Business Class cabin, offering passengers comfort and privacy whether they're working or relaxing in flight. Individual space is enhanced by partitions, and our new seating configuration allows direct aisle access from each seat.

Lie-Flat Bed - the new luxury seat transforms into a 6' 6" long flat bed for a more restful sleep.



Ample storage space throughout and under ottoman for carry-on items.



Enhanced 15" Personal TV featuring "Audio Video On Demand" and noise-canceling headsets.

110V AC power outlet and reading light with adjustable brightness.



Fixed seat back design-creates a fixed living space that no longer interrupts the space behind when a passenger reclines



LEAP Live Back Seat - features Office Chair technology to Provide active postural support.



9" Personal TV featuring "Audio Video On Demand"




Literture pocket relocated below the seat cushion to creat more room .

ក្រុមហ៊ុន CATHAY PACIFIC AIRWAYS បានផ្ដើមការហោះហើរបំរើអតិថិជន ចាប់ពីខែ ធ្នូ ឆ្នាំ ២០០៣ នេះទៅហើយ នូវប្រភេទយន្តហោះ BOEING ថ្មី ដ៏ធំបំផុតដែល រចនាក្បាច់តែងឡើងយ៉ាងល្អប្រណីតក្នុងបច្ចេកទេសខ្ពស់ និងជាសុខភាពល្អ កៅអីធំទូលាយ ងាយស្រួលអង្គុយ និងចេញចូល ទូរទស្សន៍ ផ្ទាល់ខ្លួន មានទំហំធំរហូតដល់ ៩ អ៊ិង សំរាប់ថ្នាក់ជិះផ្នែក ECONOMY ។

ក្រុមហ៊ុន CATHAY PACIFIC ហោះហើរ ៣ ជើង ក្នុងមួយថ្ងៃ ពី Los Angeles ទៅ Hong Kong ទៅ Phnom Penh (រយៈពេលហោះហើរច្រើនតែម៉ោង ២: ៣០ នាទី តែប៉ុណ្ណោះ) ។

ក្រុមហ៊ុន CATHAY PACIFIC ជាវិច្ចការដែលតែងនាំមកនូវភាពងាយស្រួល និង ទំនើបទាន់សម័យសំរាប់បំរើអតិថិជន ។

ប្រព័ន្ធផ្សព្វផ្សាយព័ត៌មាននៅលើយន្តហោះមាននិយាយជាភាសាខ្មែរផងដែរ ។



NEW FIRST CLASS

The luxurious First Class "Suites" promise passengers an increased level of privacy, ambiance and convenience. Our new seats will provide maximum comfort in all positions, with special paneling that create spacious individual cocoons.



The "Biggest Bed In The Sky" — seat easily converts to a 6'9" long x 3' wide bed.

Fully adjustable seat with massage function, all at the touch of a button.

Enhanced 17" Personal TV featuring "Audio Video On Demand" and noise-canceling headset.

Personal wardrobe with amenity kit, sleep suit, shoe bag, mattress, pillow and duvet.

# CAA និងអំពើហិង្សាសុភមង្គលក្នុងគ្រួសារ!

***ដោយ : ស្រីនាថ***

យ៉ាងហោចណាស់មានគ្រួសារបងប្អូនខ្មែរនៃសហគមន៍ខ្មែរ Long Beach រាប់រយគ្រួសារកំពុងតែជ្រួលជ្រាប និងការស្តាប់រៀនសូត្រនូវអ្វីដែលជាអំពើហិង្សានិងសុភមង្គលក្នុងគ្រួសារពីសមាគមខ្មែរនៅទ្វីបអាមេរិកពីកម្មវិធី "លំនាំសុភមង្គលនៃស្វាមីភរិយា និងគ្រួសារ" ក្នុងរយៈពេលមួយឆ្នាំមកនេះ ។ បើទោះបីសង្គមអាមេរិកដ៏មានសេរីភាពនិងការគោរពសិទ្ធិមនុស្សជាមួយការកាន់លទ្ធិប្រជាធិបតេយ្យដើរតាមគន្លងច្បាប់ជាធំក្តីហើយក៏ដោយ ។

អ្នកសម្របសម្រួលនៃកម្មវិធីនេះ លោក Vong Brown ពីសមាគមខ្មែរ នៅទ្វីបអាមេរិក(C-A-A) អះអាងថា ក្នុងវគ្គអប់រំអំពីការទ្រទ្រង់គូស្រករ និងគ្រួសារ រហូតដល់ខែវិច្ឆិកានេះ មានបងប្អូនខ្មែរនៃសហគមន៍ Long Beach រាប់រយគ្រួសារបានជ្រួលជ្រាប និងយល់ដឹងនូវអ្វីដែលជាសុភមង្គល និងអ្វីដែលជាអំពើហិង្សា និងការបែកបាក់គ្នា និងការបន្សល់ទុកនូវភាពជូរចត់ និងវិប្បដិសារីដល់កូនចៅនៅពេលដែលឪពុកម្តាយមានការលែងលះគ្នា ថាតើអនាគតពួកគេវានឹងក្លាយទៅជាយ៉ាងណា ?

លោក Vong Brown បន្តថា ក្នុងមួយវគ្គៗមានចំនួន៩សប្តាហ៍ សំរាប់បងប្អូនខ្មែរយើងចូលរៀនសូត្រ និងស្តាប់ការណែនាំពីតម្លៃជីវិតដ៏ប្រសើរសំរាប់យើងជាខ្មែរ ។ ព្រោះសុភមង្គលគ្រួសារពីដំបូងនៃបឋមវ័យឆ្ពោះទៅរកមិត្ត១០០ឆ្នាំ វាមិនមែនជាការងាយស្រួលក្នុងការចាប់ដៃគ្នាដើរបង់បោចសើចលែងសប្បាយដោយពុំគិតពីឧបសគ្គនៅចំពោះមុខបានឡើយ ។ ជាពិសេសយុវវ័យដែលមានគ្រួសារចន្លោះអាយុពី២០ ទៅ៣០ឆ្នាំ ដែលពួកគេនៅពុំទាន់យល់ច្បាស់ថា អ្វីជាទំនួលគ្រួសារសំរាប់ការកសាងជីវិតពួកគេ ។

លោក Vong Brown ដែលជាវាគ្មិនអប់រំក្នុងកម្មវិធីនេះ បានបញ្ជាក់ថា មានគ្រួសារខ្មែរយើងជាច្រើនបានបែកបាក់លែងលះដោយអំពើហិង្សា ឬការមិនយល់ចិត្តថ្លើមគ្នាព្រោះតែការដណ្តើមអំណាចគ្នាក្នុងរង្វង់គ្រួសារ និងបញ្ហាលុយកាក់ ។ ប៉ុន្តែស្ថិតក្រោមការអប់រំឃើញថា បងប្អូនខ្មែរយល់ដឹងច្រើនពីអត្រាធ្លាក់ចុះនៃជម្លោះ ។

ពួកអ្នកស្រាវជ្រាវបានធ្វើប៉ាន់ប្រមាណថា ការលែងលះគ្នានៅសហរដ្ឋអាមេរិកឡើងខ្ពស់នៅឆ្នាំ១៩៨០ ហើយក៏ចុះថយមកវិញក្នុងរយៈពេល២៥ឆ្នាំ ប៉ុន្តែការថយចុះមិនមានការគួរឱ្យចាប់អារម្មណ៍ណាស់ណាទេ ស្ថិតិនៅតែជាចំណោទពី៤០% ទៅ៥០% នៃអាពាហ៍ពិពាហ៍លើដំបូងត្រូវបញ្ចប់ដោយការលែងលះគ្នា ។

ក្រុមអ្នកស្រាវជ្រាវបានលើកហេតុផលពីសង្គមអាស៊ី ដែលមានលក្ខណៈខុសប្លែកពីសង្គមអាមេរិកពីការរស់នៅរបស់ពួកគេ ដែលនាំឱ្យមានការប៉ះទង្គិចគ្នារវាងប្រពៃណី និងវប្បធម៌ផ្សេងៗគ្នា ដែលមាននៅក្នុងរង្វង់គ្រួសារប្តីប្រពន្ធ គឺទំនាក់ទំនងដ៏ស្និទ្ធស្នាលរវាងគូស្នេហ៍ គឺជាប្រភពនៃកង្វល់ទុក្ខព្រួយ និងក្រៀមក្រំក្នុងផ្លូវចិត្តនៃស្ត្រីអាស៊ីយើងដែលតួនាទីស្ត្រីគឺចិញ្ចឹមថែទាំកូនចៅ អប់រំ និងការធ្វើជាមេផ្ទះល្អជាមួយការប្រកាន់នូវឥរិយាបថតាមរបៀបស្វាមីចង់បាន ។

ជំនឿ និងទំនៀមទំលាប់ដែលបានបន្ទាបតម្លៃស្ត្រីជាពិសេសសហគមន៍អាស៊ី និងស្តែនិសបានត្រូវកកើតជាអណ្តាតភ្លើងហិង្សាឆេះឆួលក្នុងរង្វង់គ្រួសារ ។

ឧបសគ្គមានច្រើន ដូចជាបញ្ហាភាសាលុយកាក់ ចំណីអាហារ សម្លៀកបំពាក់ ជំនឿសាសនា ការថែទាំសុខភាព និងការអប់រំជាដំណោះស្រាយនៃគូស្វាមីភរិយាថា តើត្រូវធ្វើយ៉ាងណាដើម្បីសុភមង្គលក្នុងន័យ "2Heart, 2Hand, 1Purpose, Building a Strong, Healthy Marriage" នោះ ។

ប៉ុន្តែ ទោះបីជាយ៉ាងណាក៏ដោយក្នុងសង្គមជាក់ស្តែងនៃក្រុងខ្មែរ Long Beach បញ្ហាគ្រួសារមានការបែកបាក់លែងលះគ្នា និងអំពើហិង្សាក្នុងគ្រួសារ កើតមានជារឿយៗសំបូរដោយពោះម៉ាយ ឬមេម៉ាយ តែគ្មានស្ថិតិពីការលែងលះ និងអំពើហិង្សាបង្ហាញចំនួនប៉ុន្មានភាគរយនោះទេ ។ ហើយបើប្រៀបធៀបនៅឯ-ប្រទេសកម្ពុជាបងប្អូនខ្មែរនៅសហរដ្ឋអាមេរិកមានកិរិតកំពស់យល់ដឹងជាមួយការគោរពសិទ្ធិ និងសីលធម៌ក្នុងការរស់នៅគួរឱ្យកត់សំគាល់ ពិសេសបុរសៗខុសប្លែកពីប្រុសៗនៅស្រុកខ្មែរដែលភាគច្រើនបង្កើតអំពើហិង្សាដល់ គ្រួសារ ប្រពន្ធ កូន រហូតដល់២៥%នៃចំនួនស្ត្រីដែលរងគ្រោះដោយរួមគិតទាំង ផ្លូវភេទ ផ្លូវកាយ ផ្លូវចិត្ត និង ផ្លូវសេដ្ឋកិច្ចផងនោះ ។

បងប្រុស ងួន ប៊ុនថា អាយុ៤០ឆ្នាំប្លាយ មានមុខរបរជាជាងជួសជុលឡានដែលបានក្លាយខ្លួនទៅជាសិក្ខាកាមក្នុងវគ្គរៀនសូត្រអ្វីទៅជាសុភមង្គល និងអំពើហិង្សានិយាយថា ជីវិតគូស្រកររស់នៅជាមួយគ្នាជាមិត្ត១០០ឆ្នាំនោះ វាមិនខុសពីចានក្នុងភារទេ តែងតែប៉ះទង្គិចគ្នាមានប្រេះ ឬស្រាំហើយ ។ ប៉ុន្តែការប៉ះទង្គិចថា តើយើងត្រូវដោះស្រាយតាមវិធីណានោះ ? ប៊ុនថាឆ្លើយថា ការអត់ធ្មត់ដល់គ្នា គឺការទប់កំហឹងកើតឡើងដោយវិធីដើរចេញពីជម្លោះ ឬទៅច្រៀងកំសាន្តជួបមិត្តភ័ក្តិឱ្យផុតគ្រាដែលនឹងអាចនាំឱ្យមានហិង្សា ដែលនេះជាបទពិសោធន៍របស់គាត់ដែលរស់នៅជាមួយគ្នាជាង១០ឆ្នាំ តាំងពីការចាប់ដៃគ្នា ពីរែកបាក់អង្រែបែកដែលខ្មែរយើងតែងប្រកាន់ប្រពន្ធដែលប្រើប្រាស់សំភារៈមិនប្រុងប្រយ័ត្នថា ជាស្រីកញ្ជើរធ្លុះនោះ ហើយចង់ ឬមិនចង់អាចកើតមានអំពើហិង្សាក្នុងការឈ្លោះប្រកែក ឬវាយដំ ព្រោះតែរឿងកំប៉ិកកំប៉ុក ។ ចំណែកប្រពន្ធឈ្មោះ ណន សារ៉េត និយាយថា ភាពអត់ធ្មត់ និងក្តីញញឹមរបស់ប្តីគាត់ គឺជាការបញ្ជៀសជម្លោះគ្រួសារការយល់ចិត្តគ្នាមិនគិតឃើញលុយកាក់ជាធំ ឬដណ្តើមអំណាចគ្នាត្រួតត្រាក្នុងគ្រួសារ គឺជាសុភមង្គលគូស្រករពួកគាត់ ។

**បើលោកអ្នកចង់ជ្រួលជ្រាប និងយល់ដឹងនូវអ្វីដែលជាតម្លៃនៃសុភង្គលគ្រួសារ និងអំពើហិង្សាក្នុងគ្រួសារ ដើម្បីនាំសេចក្តីសុខសាន្តដល់ក្រុមគ្រួសាររបស់លោកអ្នកសូមតាមដានអានកាសែតខ្មែរប៉ុស្តិ៍នូវរាល់លេខចេញផ្សាយក្នុងទំព័រទី៩ ជាប្រចាំ ។/**

# ស្តាប់អ្នកសេដ្ឋកិច្ចនិយាយពីការរកស៊ី

**ដោយ : សុវណ្ណារិទ្ធិ**

វាគ្មិនជំនាញឯកទេសសេដ្ឋកិច្ច , វិនិយោគ ធនាគារ និងការបណ្តាក់ទុន បាននិយាយបង្ហាញពីផែនការគម្រោងរកស៊ីជាភាគហ៊ុន និងការខ្ចីប្រាក់ធ្វើជំនួញជា លក្ខណៈសេដ្ឋកិច្ចតំបន់ ឬអន្តរ-ជាតិឱ្យដល់អ្នកជំនួញខ្មែរស្តាប់នៅកណ្តាលទីក្រុងខ្មែរ Long Beach ។

វាគ្មិនឈ្មោះ Ricardo Tejada បានពន្យល់ណែនាំអ្នកដែលចូលរួមស្តាប់កាលពីពេលថ្មី១កន្លងទៅនេះក្នុងភោជនីយដ្ឋាន Golden Villa ដោយមានពួកពាណិជ្ជករ ខ្មែរ, យួន, ស្ពែនិស មានអ្នកឯកទេសធនាគារ,ក្រុមរកស៊ីលក់ទិញផ្ទះ ក្នុងគោលបំណងស្វែងយល់ពីការរកស៊ីជាដៃគូ និងការបណ្តាក់ទុន,ខ្ចីលុយដើម្បីធ្វើជំនួញ ជាពិសេសការរក្សាតម្លៃ Credit ល្អ ដែលងាយទាក់ទាញការខ្ចីបុលដោយពុំបាច់លក្ខខ័ណ្ឌតម្រូវ គឺអ្នកដែលមានការសន្សំ Credit ល្អ បានកិរត៦៣០ ។

វាគ្មិន Ricardo បានពន្យល់បន្តថា ការបណ្តាក់ទុនរកស៊ីក្រៅប្រទេសអ្នកជំនួញត្រូវមានដើមទុនខ្លួនឯងផ្ទាល់២៥% ជាបុគ្គលដើម្បី ធ្វើភាគហ៊ុនជាមួយគូកនទៅឯក្រៅប្រទេស ។

ការដាក់ទុនលុយទាញយកលុយវាជាភាពជោគជ័យ ពួកជំនួញទៅតាមគោលការណ៍ច្បាប់រដ្ឋ ឬល័ក្ខខ័ណ្ឌ រកស៊ីដែលប្រកបដោយតម្លាភាព ដូចជាការលេង Stock មិនថាក្នុងក្រុមហ៊ុន ឬធនគារជាដើម ។

ពួកអ្នកចូលរួមស្តាប់វាគ្មិននោះ បានអះអាងថា ពេលវេលាអង្គុយស្តាប់អ្នកសេដ្ឋកិច្ចជំនួញក្នុង១ម៉ោងខ្លីក៏ពិតមែន ប៉ុន្តែយើងអាចយល់បានពីគោលសំខាន់ៗដែលជាមេគូតសំរាប់ស្រាវជ្រាវជាមួយការបង្កើតគំនិត ឬទំនាក់ទំនងដល់ការរកស៊ីបន្ថែមដែលយើងកំពុងតែប្រកបអាជីពសព្វថ្ងៃ ។ ដោយពួកគេចង់ឱ្យមានកម្មវិធីណែនាំ ឬពន្យល់ពីរបៀបរបបរកស៊ីនេះជាបន្តបន្ទាប់នៅពេលខាងមុខទៀត ។

ក្នុងការស្រាវជ្រាវដើម្បីធ្វើឱ្យប្រសើរនៃតំបន់សេដ្ឋកិច្ចតាមផ្លូវ Anaheim បន្ទាប់ពីតំបន់ខ្មែរមួយនេះក៏កើត ឈ្មោះថា ជាក្រុងខ្មែរបានបង្ហាញថា អ្នកមានទ្រព្យសម្បត្តិជាម្ចាស់កម្មសិទ្ធិ និងម្ចាស់ជំនួញចន្លោះ ផ្លូវពី Junipero ទៅ Atlantic Ave ក្នុង៣៨៧នាក់ មានម្ចាស់កម្មសិទ្ធិទ្រព្យសម្បត្តិ៩២% និង១១%ជាម្ចាស់ជំនួញ និង៤៧% ជាម្ចាស់ទ្រព្យសម្បត្តិផង និងអ្នកជំនួញផង ដែលពួកគេចង់ឱ្យមានការពិភាក្សាពីគម្រោងអភិវឌ្ឍន៍សេដ្ឋកិច្ចតំបន់ ដើម្បីឱ្យមានភាពប្រសើរឡើងនៃសេដ្ឋកិច្ច និងភ្ញៀវទេសចរណ៍នេះ បើតាមការអះអាងរបស់នាយកអភិវឌ្ឍន៍សហគមន៍ លោក Partrick West បានបង្ហាញរបាយការណ៍ឱ្យដឹង ។/

# អំណាចលុយនាំភាពវឹកវរនៅវត្ត...

ចំណូលជាង៧ម៉ឺនដុល្លារ សរុបចំណូលជាង១៥ម៉ឺនដុល្លារ ក្នុង១ឆ្នាំ ។ លុះដល់ចំណាយទៅវិញជាង១៣ម៉ឺនដុល្លារ ថាតើគេចំណាយទៅលើអ្វីខ្លះ ? បើអាចារ្យគណៈកម្មការខ្លះអះអាងថា ផ្ទះ អគារ លុយវត្តទិញ បង់អស់ ( Pay Off ) ដាច់ហើយនៅសល់តែផ្ទះមួយទេ ដែលស្ទើរបង់ជិតដាច់ទៀត ដូច្នេះយើងចង់ឱ្យមានការជំនួបមួយរវាងសមាជិកគាំទ្រពុទ្ធបរិស័ទ និងគណៈកម្មការ ដើម្បីបំភ្លឺដោះស្រាយឱ្យបានត្រឹមត្រូវ ។

នៅក្នុងឯកសារ Return Income Tax របស់រដ្ឋ California ដែលខ្មែរប៉ុស្តិ៍ទទួលបានពីក្រុង Sacremento ត្រូវបានអ្នកជំនាញគាត់ ធ្វើការអះអាងថា បញ្ហាការចាយវាយលុយកាក់ចំណាយចំណូលដោយលួចគេញបន្លំគាត់ និងលុយដែលរដ្ឋមិនយកពន្ធដារក្នុងភាពជាអង្គការ (Non Profit) ផងនោះ ។ គេមើលទៅឃើញភាពមិនប្រក្រតី ប្រសិនបើរឿងរ៉ាវប្តឹងផ្តល់តុលាការ ឬ IRS នោះ រហូតដល់មានទោសទណ្ឌទៀតផង ។

ក្រុមពុទ្ធបរិស័ទដែលតវ៉ាសុំឱ្យមានការជួបគ្នានៅថ្ងៃទី៩ ខែធ្នូ ឆ្នាំ២០០៧ចុងសប្តាហ៍នេះ ក្នុងការរកដំណោះស្រាយកុំឱ្យរឿងរ៉ាវវែងឆ្ងាយឈានទៅដល់ការប្តឹងផ្តល់ ព្រោះខ្មាសជាតិសាសន៍គេ ដែលឮតែឈ្លោះគ្នាពីវត្តខ្មែរមិនចេះចប់ ព្រោះតែអំពើលោភលន់ក្នុងចិត្តជាអ្នកតាំងខ្លួនធ្វើបុណ្យទាននោះ ។

លោកអាចារ្យ កែម ឆែម អតីតប្រធានគណៈកម្មការវត្ត នៃពុទ្ធិកសមាគមវត្តវិប្បសនារាមនិយាយប្រាប់ខ្មែរប៉ុស្តិ៍ថា លុយកាក់មិនបាត់បង់ទៅឯណាទេ យើងជិតកសាងព្រះវិហារហើយ ដែលច្បាប់សាលាក្រុងអនុញ្ញាតឱ្យរួចហើយ កាលពីថ្ងៃទី១៥ វិច្ឆិកាកន្លងទៅនេះ ។ ពួកគាត់ចេះធ្វើការហើយ បែរជាពួកអ្នកប្រឆាំងមកធ្វើការបំបែកផ្ទៃក្នុងទៅវិញ ដូច្នេះធ្វើម្តេចមានកម្លាំងធ្វើការតទៅទៀត? ។

លោកតា កែម ឆែម បន្តថា យើងមិនអាចលាតត្រដាងលុយកាក់ជាសាធារណៈបានទេ ព្រោះធ្លាប់មានចោរប្លន់ម្តងជាពីរដងហើយ ។ ហើយណាមួយយើងមានគណៈកម្មការពួកគេចេះធ្វើការហើយ ។

ព្រះចៅអធិការវត្ត ព្រះនាម ភូ ម៉ៅ ព្រះជន្ម ៩២ឆ្នាំ បានមានសង្ឃដីកាប្រាប់ខ្មែរប៉ុស្តិ៍ឱ្យដឹងថា ព្រះអង្គពុំដែលត្រូវបានគេរាយការណ៍ឱ្យដឹងពីថវិកាវត្តចំណូលចំណាយអ្វីម្តងណាទេ ។ បើទោះបីព្រះអង្គមិនកាន់លុយក៏ដោយ ក៏គេគួរធ្វើសេចក្តីរាយការណ៍ជាក្រដាសស្នាមឱ្យព្រះអង្គដឹងដែរ ព្រោះព្រះអង្គជាមេវត្ត


អាចារ្យ នៃ និង សុខ្ឌ ម៉ាលីន សួរនាំគ្នាពីរឿងលុយកាក់

ពុទ្ធបរិស័ទមកធ្វើបុណ្យ គឺគេធ្វើបុណ្យជាមួយព្រះសង្ឃនៅវត្ត ។ ដូច្នេះអ្វីៗគួរតែពិគ្រោះគ្នាដើម្បី ចៀសវាងជម្លោះ ព្រោះតែអំពើលោភលន់គេញបន្លំក្នុងនាមយើងជាអ្នកបុណ្យអ្នកទាន ពួកគេមិនត្រូវធ្វើដូច្នោះទេ ដែលទីបំផុតគឺមានបញ្ហាវឹកវរយ៉ាងដូច្នេះ ។ ដែលនេះមិនមែនជារឿងព្រះសង្ឃបង្កបាតុភាពទេ គឺក្រុមបរិស័ទមួយក្រុមដែលបង្កបញ្ហា ដែលពួកគេត្រូវតែរកដំណោះស្រាយកុំឱ្យមានរឿងអាស្រូវ រហូតដល់ប្តឹងផ្តល់ ។

ព្រះចៅអធិការវត្តបន្តសង្ឃដីកាថា សូម្បីព្រះអង្គជាចៅអធិការវត្ត ដែលជាស្ថាបនិកផង ត្រូវគេគំរាមកំហែងធ្វើបាបចិត្តកាយ រហូតដេញព្រះអង្គមិនឱ្យសឹងកុដិព្រះអង្គទៀតផង ឱ្យព្រះអង្គទៅសឹងនៅបន្ទប់ជាប់ចង្ក្រានបាយកាលពី២ឆ្នាំមុន ។ ប៉ុន្តែដើម្បីចិត្តជាព្រះឈ្នះជាមាព្រះអង្គធ្វើគ ធ្វើថ្លង់ក្នុងនាមជាអ្នកបួសប្រកាន់មេត្តាធម៌ ។

យាយ១ស្នាក់កាន់សីលនៅវត្ត សុំមិនប្រាប់ឈ្មោះ បានលួចប្រាប់ខ្មែរប៉ុស្តិ៍ឱ្យដឹងថា ក្រុមអាចារ្យ កែម ឆែម និង វ៉ែន ពៅ បានសង្កត់ សង្កិនព្រះសង្ឃដោយរំលោភសិទ្ធិព្រះសង្ឃរករឿងសព្វគ្រប់ពីព្រះសង្ឃ, ដេញ, ជេរ, ប្រើពាក្យសម្តីអសុរសទៅលើព្រះសង្ឃ និងពុទ្ធបរិស័ទ បង្កត់ចង្អាន់ព្រះសង្ឃ តួយ៉ាងព្រះអង្គ ធឿន ព្រះអង្គខ្វាត ទៅគង់នៅ Nursing Home ហើយសុគតទៅដោយអណោចអធ័ម និងបន្តដេញព្រះសង្ឃអស់៣អង្គទៅហើយ ដោយបន្តចង់ដេញព្រះសង្ឃ១អង្គទៀត ប៉ុន្តែមិនទាន់សម្រេចដូចបំណង ព្រោះពុទ្ធបរិស័ទប្រឆាំងតវ៉ា ។

ពាក្យមិនផ្លូវការនិយាយថា លុយវត្តត្រូវបានគេចរាចរលេង Stock ដើម្បីទាញយកប្រាក់ចំណេញពីល្បែងនេះ ប៉ុន្តែត្រូវខាតបង់អស់ លុយដើមជាង១០ម៉ឺនដុល្លារនោះទៅបាត់? អ្នកខ្លះគន់និយាយថា ជាការពិតជាខាតបង់ការលេង Stock ឬពួកអាចារ្យនេះមានល្បិចលួចលុយវត្តចែកលាភសក្ការៈគ្នា ។

ដំណោះស្រាយចុងក្រោយនៃភាពវឹកវរនេះថាតើវានឹងអាចបែកអូរហូរជាស្ទឹងក្នុងជម្លោះលុយកាក់ក្នុងទីវត្តអារាមបន្តទៀត ឬ ក៏ អាចរកច្រកចេញដោយសន្តិវិធីក្នុងនាមជាអ្នកប្រកាន់លទ្ធិព្រះពុទ្ធសាសនា ដោយការចរចានោះ គឺលទ្ធផលចុងក្រោយក្នុងការជួបជុំគ្នាមួយ នាថ្ងៃទី៩ធ្នូ ចុងសប្តាហ៍នេះ ។

ក្រុមព្រឹក្សាភិបាលពុទ្ធិកសមាគមខ្មែរវត្តវិប្បសនារាម ដែលជាស្ថាបនិកអង្គការ Non Profit មានគ្នា៩នាក់ ដែលកកើតដំបូងតាំងពីថ្ងៃ ទី ១៥ ខែសីហា ឆ្នាំ១៩៨៥ អគ្គលេខាធិការ សរ ស៊ីផុល និងអគ្គហិរញ្ញិក លោក ប៊ូរ ខេង បានសម្តែងការហួសចិត្ត ដែលគណៈកម្មការវត្តដែលមានអាចារ្យ វ៉ែន ពៅ និងកូន វ៉ែន សាវ៉ន និងអាចារ្យ ឆែម ធ្វើយ៉ាង ដូច្នេះ ដែលខុសពីលក្ខន្តិកៈច្បាប់វត្ត ។ ដូច្នេះពួកគេគួរមានបំភ្លឺ និងធ្វើសេចក្តីរាយការណ៍ពីបញ្ហាលុយកាក់ដើម្បីតម្លាភាពកុំឱ្យមានជម្លោះ រហូតដល់មានការប្តឹងផ្តល់វាមិនល្អមើលទេ ក្នុងមានជាអ្នកបុណ្យអ្នកទាន ដោយយើងត្រូវរកដំណោះស្រាយជាបន្ទាន់មួយ ។/

# បក្សប្រឆាំង សម រង្ស៊ី រៀបចំប្តឹងអាជ្ញាធរមូលដ្ឋាន ពីបទចុះឈ្មោះយួនឱ្យបោះឆ្នោត

ដោយៈ មាជ សុវណ្ណារ៉ា



●●●គណបក្សប្រឆាំង សម រង្ស៊ី កំពុងរៀបចំដាក់ពាក្យបណ្តឹងនៅក្នុងខែនេះប្រឆាំងនឹងក្រុមអាជ្ញាធរមួយចំនួន ដែលបានឃុបឃិតគ្នាបន្តចេញអត្តសញ្ញាណប័ណ្ណសញ្ជាតិខ្មែរឱ្យជនអន្តោប្រវេសន៍យួន ដែលផ្ទុយពីច្បាប់សញ្ជាតិរបស់ព្រះរាជាណាចក្រកម្ពុជា ។

ប្រធានគណបក្សប្រឆាំងលោក សម រង្ស៊ី មានប្រសាសន៍ប្រាប់ឱ្យដឹងពីចុងខែមុននេះថា គណបក្សរបស់លោកកំពុងតែរៀបចំសំណុំឯកសារស្រាវជ្រាវ និងរកមេធាវីមួយចំនួន ដើម្បីធ្វើការប្តឹងផ្តល់ទៅលើក្រុមអាជ្ញាធរមូលដ្ឋានមួយចំនួន ដែលបានឃុបឃិតគ្នាប្រព្រឹត្តអំពើពុករលួយចេញអត្តសញ្ញាណប័ណ្ណសញ្ជាតិខ្មែរយ៉ាងច្រើនសន្ធឹកសន្ធាប់ឱ្យទៅជនអន្តោប្រវេសន៍ យួន និងជនបរទេសដទៃទៀតខុសពីច្បាប់ សញ្ជាតិដែលកំពុងស្ថិតនៅជាធរមាន ។



និគមយួននៅភ្នំពេញ

លោក សម រង្ស៊ី បន្ថែមទៀតថា ការបណ្តែតបណ្តោយឱ្យក្រុមអាជ្ញាធរធ្វើអត្តសញ្ញាណប័ណ្ណសញ្ជាតិខ្មែរឱ្យជនអន្តោប្រវេសន៍យួនខុសច្បាប់តាមតែទំនើងចិត្តបានបង្កផលប៉ះពាល់យ៉ាងធ្ងន់ធ្ងរដល់ផលប្រយោជន៍ប្រទេសជាតិនៅពេលដែលជនជាតិយួនកាន់អត្តសញ្ញាណប័ណ្ណខុសច្បាប់ទាំងនោះមានសិទ្ធិចូលរួមបោះឆ្នោតជ្រើសរើសមេដឹកនាំប្រទេសកម្ពុជាយ៉ាងស្របច្បាប់ ។

ទាក់ទងនឹងការផ្តល់អត្តសញ្ញាណប័ណ្ណសញ្ជាតិខ្មែរដល់ជនអន្តោប្រវេសន៍យួននេះ គេមិនអាចសុំការបំភ្លឺពីលោក ខៀវ សុភ័គ អ្នកនាំពាក្យក្រសួងមហាផ្ទៃកម្ពុជាបានទេ ដោយសារលោកជាប់រវល់ ។

លោក គល់ បញ្ញា នាយកប្រតិបត្តិគណៈកម្មាធិការដើម្បីការបោះឆ្នោតដោយសេរី និងយុត្តិធម៌នៅកម្ពុជា ហៅកាត់ "ខុមហ្វ្រែល "មានប្រសាសន៍គាំទ្រនូវវិធានការប្តឹងតបរបស់គណបក្សសមរង្ស៊ី។ លោក បញ្ញា បញ្ជាក់ថា បច្ចុប្បន្នមានជនអន្តោប្រវេសន៍ជាច្រើនកំពុងតែរស់នៅយ៉ាងអនាធិបតេយ្យនៅកម្ពុជា ដោយការរស់នៅទាំងនោះ គឺមិនស្របទៅតាមច្បាប់សញ្ជាតិរបស់ខ្មែរឡើយ បើទោះបីជាពួកគេមានអត្តសញ្ញាណប័ណ្ណបញ្ជាក់ថា ខ្លួនមានសញ្ជាតិខ្មែរក៏ដោយ ។

តាមការអះអាងពីអង្គការនៅប្រទេសបារាំងមួយថា ជនអន្តោប្រវេសន៍យួននៅកម្ពុជាមានរាប់លាននាក់ ឯណោះ ៤លាននាក់) តែខាងអាជ្ញាធរក្រសួងមហាផ្ទៃថាចំនួននេះមិនច្រើនជាងកាលពីសម័យសម្តេចសីហនុ ។ សម័យសង្គមរាស្ត្រនិយមតាមឯកសារអះអាងមួយចំនួនថា អន្តោប្រវេសន៍យួននៅស្រុកខ្មែរមានមិនច្រើនជាង ៤សែននាក់ឡើយ ។ ខាងក្រសួងមហាផ្ទៃកម្ពុជាអះអាងដែរថា គេមិនទាន់អាចសរុបបានទេ ដោយសារការចុះស្រង់នៅតាមមូលដ្ឋានមិនទាន់បញ្ចប់ ។

គ.ជ.បនាពេលកន្លងមកបានលុបឈ្មោះជនជាតិយួនចំនួន៥៦នាក់ ចេញពីបញ្ជីឈ្មោះបោះឆ្នោត នៅឃុំរកាកោងមួយ ស្រុកមុខកំពូល ស្រុកមុខកំពូល ខេត្តកណ្តាល ទៅតាមពាក្យបណ្តឹងរបស់គណបក្សសមរង្ស៊ី ប៉ុន្តែទន្ទឹមនឹងនោះ គ.ជ.ប ក៏បានបដិសេធមិនព្រមលុបឈ្មោះជនជាតិយួនប្រមាណជាង ៥.០០០នាក់ទៀត នៅស្រុកកោះធំ ខេត្តកណ្តាល ទៅតាមពាក្យបណ្តឹងរបស់គណបក្សប្រឆាំងឡើយ ។

សូមបញ្ជាក់ថា នៅក្នុងការបោះឆ្នោតជាបន្តបន្ទាប់នាពេលកន្លងមកមានសេចក្តីរាយការណ៍ជាច្រើនបង្ហាញថា នៅសង្កាត់ព្រែកប្រា សង្កាត់ច្បារ អំពៅ ក្នុងខណ្ឌមានជ័យ សង្កាត់ឫស្សីកែវ សង្កាត់ស្វាយប៉ាក ខណ្ឌឫស្សីកែវ វត្តចំប៉ា ស្រុកកៀនស្វាយ ឃុំព្រែកជ្រៃ ឃុំសំពៅពូន ឃុំប៉ាក់ណាម ក្នុងស្រុកកោះធំ ខេត្តកណ្តាល និងនៅតាមសង្កាត់ ឃុំក្នុងបណ្តាខេត្តក្រុងជាច្រើនផ្សេងទៀត មានជនជាតិយួនជាច្រើនពាន់នាក់ដែលខ្លះមិនទាំងចេះភាសាខ្មែរច្បាស់ផងនោះបានចូលរួមបោះឆ្នោតជ្រើសរើសមេដឹកនាំខ្មែរ តាមរយៈការប្រើប្រាស់អត្តសញ្ញាណប័ណ្ណ និងលិខិតស្នាមផ្សេងៗ ដែលគណបក្សប្រឆាំងអះអាងថា ត្រូវបានក្រុមអាជ្ញាធរចេញឱ្យដោយខុសច្បាប់ ។

បើទោះបីជាកើតមានការប្តឹងតវ៉ាប្រឆាំងនឹងជនជាតិយួនដែលបានចូលរួមបោះឆ្នោតជ្រើសរើសមេដឹកនាំខ្មែរជាបន្តបន្ទាប់យ៉ាងណាក៏ដោយ ក៏រហូតមកដល់ពេលនេះ គេមិនទាន់ឃើញក្រសួងមហាផ្ទៃចាត់វិធានការឬក៏ចេញសេចក្តីបំភ្លឺណាមួយដើម្បីជំរះការចោទប្រកាន់នេះនៅឡើយ ។/

# គ.ជ.ប ជួបតំណាងគណបក្សនានា ប្រកាសពីបញ្ជីឈ្មោះអ្នកបោះឆ្នោតដំបូង

●●●ខណៈដែលការបោះឆ្នោតជ្រើសរើសតំណាងរាស្ត្រឆ្នាំ ២០០៨ កាន់តែខិតជិតពេល កាលពីថ្ងៃទី ៣០ វិច្ឆិកា គណៈកម្មាធិការជាតិរៀប ចំការបោះឆ្នោត ហៅកាត់ គ.ជ.ប បានអញ្ជើញតំណាងគណបកសនានាឱ្យចូលរួម ពីការប្រកាសបញ្ជីឈ្មោះអ្នកបោះឆ្នោត ។

មន្ត្រីគ.ជ.បបានបង្ហាញឱ្យដឹងជាសាធារណៈថា គ.ជ.បបានរកឃើញឈ្មោះ១,៥លាននាក់ នៅក្នុងការសំអាតបញ្ជីឬធ្វើបច្ចុប្បន្នភាពបញ្ជីឈ្មោះអ្នកបោះឆ្នោតសំរាប់ឆ្នាំ២០០៨ ។ ហើយថា ឈ្មោះទាំងនេះត្រូវលុប និងកែតម្រូវនៅក្នុងបញ្ជីឈ្មោះអ្នកបោះឆ្នោត ។

លោក ទេព នីថា អគ្គលេខាធិការ គ.ជ.ប បានថ្លែងក្នុងសន្និសីទសារព័ត៌មាននៅឯទីស្តីការគ.ជ.បនៅក្នុងក្រសួងមហាផ្ទៃថា មន្ត្រីរៀបចំការបោះឆ្នោតនៅទូទាំងប្រទេសបានរកឃើញឈ្មោះនៅក្នុងបញ្ជីអ្នកបោះឆ្នោតប្រមាណ១.៥លាននាក់ ដែលលុបចេញ និងធ្វើការកែតំរូវ ។ លោកថា ក្រុមមន្ត្រីគ.ជ.បមិនបានរកឃើញមានកំហុសឆ្គងធន់ធរក្នុងការលុបឈ្មោះនេះទេ ។

គ.ជ.ប ឱ្យដឹងទៀតថា នៅក្នុងការសំអាតបញ្ជីនេះមានបណ្តឹងតវ៉ារបស់គណបក្សសមរង្ស៊ីទាក់ទិននឹងទម្រង់ ១០២៥ ចំនួន៤៧ បណ្តឹង ។ បណ្តឹងទាំងនេះត្រូវ គ.ជ.ប លើកយកមកដោះស្រាយ ដែលមានបណ្តឹងចំនួន២១ បានធ្វើលិខិតឆ្លើយតបទៅដើមបណ្តឹងវិញ និងបណ្តឹង២៦ទៀត ឯកភាពព្រមព្រៀងគ្នាតាមកិច្ចប្រជុំនៅក្រុមប្រឹក្សាឃុំ-សង្កាត់ ។

ចំពោះបណ្តឹងចំនួន២១ ដែល គ.ជ.ប បានឆ្លើយតបទៅគណបក្សសមរង្ស៊ីនោះ គឺតំណាងគណបក្ស សម រង្ស៊ី ប្តឹងតវ៉ា ទៅនឹងការប្រជុំសំរេចរបស់ក្រុម ព្រឹក្សាឃុំ-សង្កាត់ ចំពោះការរក្សាទុកឈ្មោះចំនួន ៥៥.៤៧៨នាក់ នៅក្នុងទម្រង់១០២៥ មិនត្រឹមត្រូវនីតិវិធី និងការណែនាំរបស់ គ.ជ.ប ។ បណ្តឹងនេះមាននៅក្នុងខេត្តកណ្តាល ចំនួន១ឃុំ និងក្រុងភ្នំពេញចំនួន២០សង្កាត់ ។

លោក ទេព នីថា អគ្គលេខារបស់ គ.ជ.ប បានបន្តទៀតថា សំរាប់ការបោះឆ្នោះ ២០០៨ គ្រោងចំណាយថវិកាមានចំនួន១៧លានដុល្លារអាមេរិក ។ ការកើនប្រាក់ចំណាយនេះ ដោយសារមានការបន្ថែមរយៈពេលនៃការចុះឈ្មោះបោះឆ្នោតមានការផ្លាស់ប្តូរសំភារៈមួយចំនួន និងបង្កើនទៅលើមធ្យោបាយឃោសនាផ្សព្វផ្សាយទៅដល់ប្រជាពលរដ្ឋអប់រំអំពីការបោះឆ្នោត និងបន្ថែមបុគ្គលិកមួយចំនួននៅការិយាល័យបោះឆ្នោតនិងបន្ថែមថៃ ។ លោកឱ្យដឹងដែរថា ការិយាល័យបោះឆ្នោតបានកើនឡើងរហូតដល់១៥.០០០ការិយាល័យនៅទូទាំងប្រទេស ។

លោកអគ្គលេខាធិការគ.ជ.ប ទេព នីថា បន្តថា ការចំណាយថវិកាសំរាប់ការបោះឆ្នោត២០០៨ កើនឡើងនោះ ដោយសារមានការបង្កើនចំនួនបុគ្គលិកនៅតាមការិយាល័យចំនួន៦នាក់ក្នុងមួយការិយាល័យ ដូច្នេះ ឃើញថា សំរាប់ការបោះឆ្នោតឃុំ-សង្កាត់ ២០០៧ យើងចំណាយតិចជាងនេះ ។ លោកបន្តថា ប្រជាពលរដ្ឋដែលមានឈ្មោះនៅក្នុងបញ្ជីបោះឆ្នោត ២០០៨ មានប្រមាណ៨លាននាក់ ដែលគ.ជ.ប គ្រោងចំណាយ ២ ដុល្លារសំរាប់មនុស្សម្នាក់ ។

មន្ត្រី គ.ជ.ប អះអាងឱ្យដឹងទៀតថា រដ្ឋាភិបាលបានបញ្ជាក់ពីការចំណាយរបស់ខ្លួនថាចេញប្រមាណ១០លានដុល្លារ ចំណែកទឹកប្រាក់នៅសល់ប្រមាណជិត៧លានដុល្លារទៀត គឺត្រូវធ្វើការអំពាវនាវសុំពីម្ចាស់ជំនួយ និងពីសប្បុរសជននានា " ។

តំណាងគណបក្ស ហ៊្វុនស៊ិនប៉ិច បានលើកឡើងថា បើការលប់ឈ្មោះឬចុះឈ្មោះអ្នកបោះឆ្នោតខុស តើមន្ត្រី គ.ជ.ប ឃុំ-សង្កាត់ មានទោសកំរិតណា ។ គ.ជ.ប បានឆ្លើយថា មិនជាការធ្វើខុសឆ្គងធន់ធររហូតឈានទៅដល់ការដាក់ទណ្ឌកម្មទេ ដោយសារថា ពួកគាត់ខិតខំធ្វើការងារជាប្រយោជន៍ជាតិ ។

ទាក់ទិននិងការនេះដែរ គណបក្ស សម រង្ស៊ី បានលើកអំពីការចុះឈ្មោះឱ្យជនជាតិវៀតណាមខុសច្បាប់ នោះតើត្រូវដោះស្រាយយ៉ាងណា ? តែខាងមន្ត្រី គ.ជ.ប អះអាងថា គ.ជ.ប មិនបានឱ្យសញ្ជាតិដល់ពួកគេទេ ហើយអ្នកដែលមានឯកសារស្របច្បាប់ទើប គ.ជ.ប ចុះឈ្មោះឱ្យបាន ។/

# បណ្ណាល័យ Mark twain ស្វែងរកថវិកាគាំទ្រគម្រោងសៀវភៅខ្មែរ

ដោយ : ស្រីនាថ

មន្ត្រីបណ្ណាល័យ Mark Twain នៅកណ្តាលក្រុងខ្មែរ Long Beach បានអំពាវនាវរកការគាំទ្រថវិកាសំរាប់ដំណើរបេសកកម្មទៅកាន់ប្រទេសកម្ពុជាក្នុងគម្រោងសៀវភៅខ្មែរ "CAMBODIAN BOOK PROJECT" បំណងទៅទិញសៀវភៅចម្រុះមុខវិជ្ជាជាភាសាខ្មែរសំរាប់ដាក់ក្នុងបណ្ណាល័យរបស់ខ្លួនជូនដល់សហគមន៍ខ្មែរ ។

អ្នកសម្របសម្រួលបណ្ណាល័យ Mark Twain អ្នកស្រី Susan C Taylor និយាយថា គណប្រតិភូនៃបណ្ណាល័យសាធារណៈក្រុង Long Beach នឹងចុះទៅកាន់ប្រទេសកម្ពុជានៅខែមករាឆ្នាំ២០០៨ ដើម្បីរុករកទិញសៀវភៅនៅក្រុងភ្នំពេញ និងខេត្តសៀមរាប ដូចជាសៀវភៅប្រលោមលោករឿងខ្លីៗ សំរាប់កុមារសៀវភៅប្រវត្តិសាស្ត្រខ្មែរអក្សរសាស្ត្រ, វប្បធម៌, អរិយធម៌ ទំនៀមទំលាប់, កំណាព្យ, សង្គមសេដ្ឋកិច្ច, ទស្សនវិជ្ជា, វិជ្ជាមេផ្ទះ ឬធ្វើម្ហូប ... ដើម ។ ដូច្នេះយើងសូមអំពាវនាវរកការជួយគាំទ្រថវិកាដើម្បីដំណើរបេសកកម្មទៅកាន់ប្រទេសកម្ពុជា ពិសេសបងប្អូនខ្មែរក្នុងសហគមន៍ខ្មែរ Long Beach ដែលសំបូរទៅដោយកូនចៅជាខ្មែរ-អាមេរិកាំង ក្នុងការឱ្យពួកគេអាចយល់ដឹងជ្រួលជ្រាប តាមរយៈបណ្ណាល័យនេះពីអ្វីដែលជាវប្បធម៌អរិយធម៌

( តទៅទំព័រទី០៨ )

# អាថ៌កំបាំងនៃសម្រស់ពីធម្មជាតិ




**១.គេងដើម្បីសម្រស់**

បណ្ដាតារាបង្ហាញម៉ូដ ឬស្រីស្រស់ស្អាតនានា ប្រាកដជាស្គាល់ពាក្យថា គេងដើម្បីសម្រស់ ឬគេងឱ្យស្រស់ស្អាត (Beauty Sleep) នេះហើយ ព្រោះការគេងលក់នេះ នឹងជួយឱ្យស្បែកមុខ និងស្បែកសព្វរាងកាយរបស់ស្ត្រីមើលទៅភ្លឺរលោងជានិច្ច ។

ការអត់ងងុយ ឬមិនបានគេងសូម្បីតែមួយយប់ក៏ដោយ ក៏បង្ហាញផលឱ្យឃើញយ៉ាងច្បាស់ថា ស្បែកមុខមានស្នាមជ្រីវជ្រួញស្លេកស្លាំង ។ ហើយប្រសិនបើអត់ងងុយលើសពីមួយយប់ ឬគេងមិនបានគ្រប់គ្រាន់ នឹងផ្ដល់ផលឱ្យកែវភ្នែកមិនស្រស់ថ្លា ហើយស្បែកសព្វរាងកាយមើលទៅក្រៀមក្រោះមិនស្រស់ថ្លាគ្មានពន្លឺឡើយ ។ ផ្ទុយទៅវិញស្បែករបស់អ្នកនឹងតឹងណែនរលើបរលោងផូរផង់គ្មានស្នាមជ្រួញ បានប្រសិនបើអ្នកបានគេងយ៉ាងលក់ស្កប់ស្កល់គ្មានកង្វល់ផ្សេងៗមករំខានប្រមាណ៧-៨ម៉ោងពេញ ។

ត្រូវចាំថា ប្រសិនបើអ្នកគេងបាន៩ម៉ោងចាត់ទុក ថាល្អតែពុំមែនជារូបមន្តរបស់ Beauty Sleep ទេ ប៉ុន្តែ បើគេងបានតិចជាង៦ម៉ោង ចាត់ទុកថាជាការបំផ្លាញសុខភាពស្បែកដោយប្រយោល និងប្រសិនបើអ្នកគេងច្រើនជាង៨ម៉ោងក៏មិនល្អដែរ ព្រោះអុកស៊ីហ្សែនក្នុងស្បែកនឹងអស់មិនជួយឱ្យស្បែកស្រស់ស្អាតទេ ។ ដូច្នេះ ការគេងដែលសមស្របសំរាប់ឱ្យស្បែកស្រស់ស្អាត គឺទុកចន្លោះពី៧-៨ម៉ោងក្នុងមួយថ្ងៃ ។

**២.ក្បាលជង្គង់ និងកែងដៃ.សស្អាត**

មនុស្សភាគច្រើនតែងតែមានបញ្ហាស្នាមជាំខ្មៅរឹងត្រង់បរិវេណក្បាលជង្គង់ និងកែងដៃ ប៉ុន្តែអ្នកអាចបន្ថែមភាព.សផូរផង់ដល់ក្បាលជង្គង់

(តទៅទំព័រទី២៦)

មិនត្រឹមតែកម្លោះក្រមុំយុវវ័យប៉ុណ្ណោះទេ ចាស់ៗដែលទទួលទានអាហារ មិនតាមគោលការណ៍ រួមទាំងអ្នកដែលរស់នៅក្នុងក្រុមគ្រួសារដែលមានប្រវត្តិ កើតមុនរ៉ាំរ៉ៃដូចគ្នា នៅពេលដែលអ័រម៉ូនអេស្ត្រូចេន (Estrogen) បង្កើតបរិមាណកាន់តែច្រើនឡើងរហូតដល់ទៅញ៉ាំកកស្ទះលំហូរវត្ថុផ្សេងៗតាមរយៈការប្រើសារធាតុអង់ទីប៊ីយ៉ូទិក ។ ក្រៅពីថ្នាំព្យាបាលមុនដែលគ្រូពេទ្យបានឱ្យទទួលទាន ឬលាបហើយនោះ ការថែទាំខ្លួនឯង និងការទទួលទានអាហារត្រឹមត្រូវក៏ជារឿងចាំបាច់ដែលអ្នកត្រូវធ្វើជាមួយគ្នាផងដែរដើម្បីឱ្យការព្យាបាលមុនមានប្រសិទ្ធភាព ។ ដូច្នេះប្រការគួរប្រតិបត្តិសម្រាប់អ្នកកើតមុនមានដូចខាងក្រោម ។

# កើតមុនគួរកាត់បន្ថយអាហារបែបណាខ្លះ?



-កាត់បន្ថយការទទួលទានសាច់ជ្រូកសាច់គោ ដោយងាកមកទទួលទានត្រីឱ្យបានច្រើនជាង ។

-កាត់បន្ថយអាហារខ្លាញ់ ឬអាហារចៀន ដើម្បីកុំឱ្យថ្លើមធ្វើការខ្លាំងពេក ។

-កាត់បន្ថយការពិសាទឹកក្រូច ដែលមានហ្គាសងាកមកពិសាទឹកបរិសុទ្ធ ឬទឹកផ្លែឈើច្របាច់ស្រស់ៗដូចជាទឹកក្រូចច្របាច់ និងទឹកការ៉ុតជំនួសវិញ (ទឹកផ្លែឈើស្រស់ពេលច្របាច់ហើយត្រូវទទួលទានភ្លាមទើបល្អ ) ។

-មិនថាអ្នកកើតមុនបន្តិចបន្តួច ឬធ្ងន់ធ្ងរក៏ដោយ ក្រៅពីអាហារ និងថ្នាំអង់ទីប៊ីយ៉ូទិក ដែលប្រើសម្រាប់លេប និងលាបហើយនោះ ក៏មានការណែនាំពីអ្នកឯកទេសព្យាបាលមុនតាមវិធីធម្មជាតិថា គួរទទួលទានវីតាមីន និងផលិតផលអាហាររូបត្ថម្ភប្រភេទប្រេងខ្ទឹម ដើម្បីឱ្យឈាមស្អាត និងវីតាមីន ដើម្បីថែស្បែកជាមួយគ្នាផងដែរ ។

-ទទួលទានបន្លែស្រស់រាល់ថ្ងៃ ឱ្យបានច្រើនតាមដែលអាចធ្វើបាន ។

ហាត់កីឡាឱ្យបានច្រើន សម្រាកឱ្យបានគ្រប់គ្រាន់ និងទទួលទានវីតាមីន B ចម្រុះ ដើម្បីជួយបង្កើនថាមពល និងជួយឱ្យថ្លើមលាងជាតិពុលនៅក្នុងខ្លួនបានល្អ ។

មុនអាចព្យាបាលឱ្យសះស្បើយ បាន ប៉ុន្តែវាត្រូវអូសបន្លាយពេលវេលាបន្តិច ។ ជាពិសេសអ្នកត្រូវធ្វើចិត្តអារម្មណ៍ឱ្យស្រស់ស្រាយរីករាយ ព្រោះថា ប្រសិនបើអារម្មណ៍កាន់តែតានតឹងនោះ ការព្យាបាលមុនកាន់តែពិបាកនឹងជាសះស្បើយ ៕




# វិធីបំបាត់អាការឈឺក្បាល



**●ឈឺក្បាលព្រោះតឹងតែងអារម្មណ៍ :** យកក្រណាត់ជ្រលក់ជាមួយទឹកក្តៅមកដាក់ស្អំលើខ្នងនិងក រួចម៉ាស្សាបរិវេណ.កស្មា និងចន្លោះចង្អូរឆ្អឹងស្លាបប្រចៀវ ។ ប្រើក្រណាត់ជ្រលក់ទឹកក្តៅឧណ្ហៗ ហើយលញ់នៅត្រង់សៀតផ្កាថ្កមៗ និងប្រើក្រណាត់ជ្រលក់ទឹកត្រជាក់ជូតមុខមួយសារទៀត ។

**●ឈឺក្បាលបណ្តាលមកពីជម្ងឺលើសឈាម**

**▬វិធីទី១ :** យកឃិនឆាយស្រស់ទាំងដើមមួយក្តាប់ដៃបុកយកទឹកបរិភោគ (ត្រូវទទួលទានត្រឹមតែមួយលើកហាមធ្វើទទួលទានដដែលៗជាប់គ្នាច្រើនលើក ព្រោះវាបង្កឱ្យសម្ពាធឈាមធ្លាក់ចុះខ្លាំង) ។

**▬វិធីទី២ :** យកស្លឹកកន្ទួតចាស់ទាំងធាង និងស្លឹកមួយក្តាប់ស្ងោរជាមួយស្ករផែន(ស្ករត្នោត) ទទួលទានជំនួសទឹក ។

**▬វិធីទី៣ :** ប្រើបញ្ចើកែ្អកដើមស្វាយទាំងដើមស្ងោរទទួលទានជំនួសទឹក ។

**●ឈឺក្បាលរ៉ាំរ៉ៃ :** អ្នកដែលឈឺក្បាលញឹកញាប់អាចបណ្តាលមកពីមានជម្ងឺរ៉ាំរ៉ៃប្រចាំខ្លួន ឬខ្វះសារជាតិអាហារ ។ ការបានទទួលទានអាហារឱ្យបានត្រឹមត្រូវគ្រប់មុខនិងដេកឱ្យបានគ្រប់គ្រាន់នឹងជួយឱ្យអាការប្រសើរឡើងវិញ ។

**●ឈឺក្បាលបណ្តាលមកពីផ្តាសាយ :** យកខ្ទឹមក្រហមទទួលទានជាមួយបាយឆ្អិន ដោយចិញ្ច្រាំឱ្យល្អិតៗដាក់ក្នុងទឹកជ្រលក់ ឬធ្វើទទួលទានជាមួយទឹកក្តៅមួយកែវ (២៥០សេសេ) ថែមអំបិលបន្តិច ហើយទទួលទានជំនួសទឹក ។

**●ឈឺក្បាលមួយចំហៀងក្បាល :**

**▬វិធីទី១ :** ទទួលទានកាហ្វេ ឬតែចាស់ខ្លាំងមួយកែវ រួចត្រូវដេកសម្រាកក្នុងទីងងឹត និងកន្លែងស្ងប់ស្ងាត់ដើម្បីជួយសម្រួលដល់សាច់ដុំគ្រប់ផ្នែក និងព្យាយាមធ្វើចិត្តឱ្យស្ងប់កុំគិតដល់បញ្ហាផ្សេងៗ ។

**▬វិធីទី២ :** យកស្លឹកស្វាយស្លឹកបាសអង្ករមួយមុខមួយក្តាប់កិនឱ្យម៉ដ្ឋលាយជាមួយទឹកល្មមសើម ប្រហែលកន្លះម៉ោងអាការឈឺក្បាលនឹងធូរស្បើយ ។

**▬វិធីទី៣ :** យកឫសននោងមូល ឬនរនោងជ្រុងស្រស់មួយខាំ (១០០ក្រាម) ស្ងោរជាមួយទឹកដាក់អំបិលបន្តិចបន្តួចទុកទទួល...

# ជួយខ្ញុំផង...បេះដូងបាន...

ដែលមន្ទីរពេទ្យកុមារក្រុងសៀមរាបអង្គរ និងមន្ទីរពេទ្យរដ្ឋកាល់ម៉ែត្រ ពុំអាចទទួលរូបនាង ដើម្បីធ្វើការវះកាត់បានទេ ព្រោះបញ្ហាបច្ចេកទេសកង្វះសំភារៈ ដោយការវះកាត់ត្រូវធ្វើលក្ខណៈប្រតិបត្តិការធំធេងក្នុងការសង្គ្រោះជីវិតនាង ។ នេះបើតាមការអះអាងពីលោក Peter Chhun ប្រធានអង្គការបេះដូងគ្មានព្រំដែនបានប្រាប់ខ្មែរប៉ុស្តិ៍ ។

ដារិក និងបងប្អូនម្នាក់ទៀត ដែលមានម្តាយជាស្ត្រីមេម៉ាយប្តីរត់ចោល ធ្វើការជាកម្មករសំណង់ ដែលទទួលប្រាក់កំរៃប្រចាំថ្ងៃត្រឹមតែ១ដុល្លារនោះ ត្រូវបានវេជ្ជបណ្ឌិតអាមេរិកាំងម្នាក់ដែលមានប្រពន្ធជាអ្នកកាសែតធ្វើការនៅទូរទស្សន៍ NBC តាមរយៈការស្នើសុំពីអង្គការបេះដូងគ្មានព្រំដែនបានសម្រេចទទួលយករូបនាងមកវះកាត់និងព្យាបាលនៅក្នុងមន្ទីរពេទ្យកុមារនៃក្រុង Los Angeles ។

ប៉ុន្តែអ្វីជាឧបសគ្គចំពោះនាងនៅមុនការចាកចេញដំណើរមកកាន់សហរដ្ឋអាមេរិកនោះ គឺនាងត្រូវការការជួយគាំទ្រថវិកា ដើម្បីថែទាំសុខភាពឱ្យមានកម្លាំងមាំមួនសាច់ឈាមស្រស់បស់គ្រប់គ្រាន់មិនខ្សត់ខ្សោយសុខភាព ។ ដូច្នេះមានតែមានសប្បុរជនទេ ដែលអាចជួយនាងឱ្យមានអាយុជីវិតបន្តទៅទៀត ។

លោកប្រធានអង្គការបេះដូងគ្មានព្រំដែន ... យើងត្រូវការថវិកាជិត៤០០០ដុល្លារជាជំហានដំបូង ដើម្បីទិញថ្នាំព្យាបាលនិងបំប៉នកម្លាំងនាងឱ្យមានសុខភាពល្អថ្លៃសំបុត្រយន្តហោះមកកាន់សហរដ្ឋ ដើម្បីវះកាត់ជាដើម ។

កាលពីដើមខែតុលាកន្លងទៅនេះ អង្គការបេះដូងគ្មានព្រំដែនបាននាំក្រុមគ្រូពេទ្យជំនាញបេះដូងអាមេរិកចំនួន២០នាក់ ទៅកាន់ប្រទេសកម្ពុជា ដើម្បីបើកយុទ្ធនាការព្យាបាល និងវះកាត់បេះដូងកុមារខ្មែរបានចំនួន២១នាក់ឱ្យរួចផុតជីវិតពីការស្លាប់ ។ ចុងបញ្ចប់សំដី កុមារី វិក ថ្លែងថា នាងសូមបន់ព្រះសំពះទេវតា សូមឱ្យនាងឆ្លងផុតពីអព្ភូតហេតុដែលកំពុងតែញាំញីដល់រូបនាងស្ទើរដាច់ជីវិតនោះ ។ ខ្ញុំចង់ពន្លឺថ្ងៃអនាគតជាមួយការចង់បានសុខភាពល្អ ដើម្បីទៅកាន់សាលារៀន និងធំដឹងក្តីដើម្បីជួយធ្វើការសម្រាលកិច្ចការម្តាយជាស្ត្រីមេម៉ាយ ។

កុមារី វិក បន្ទរថា "ខ្ញុំមិនជឿថា ពូ មីង តាយាយអ្នកមានចិត្តបុណ្យទានប្រងើយកន្តើយទុកជីវិតឱ្យក្មេងម្នាក់ដែលពុំទាន់ដឹងក្តីស្លាប់នោះទេ" សូមមេត្តាជួយជីវិតខ្ញុំផង...ខ្ញុំមិនព្រមទទួលយកសេចក្តីស្លាប់នៅឡើយទេ ។/

**លោកអ្នកអាចផ្តល់វិភាគទាន ប្រសិនបើមានទឹកចិត្តមេត្តាករុណាចំពោះ កុមារីរូបនេះ គឺតាមរយៈអាស័យដ្ឋាននា...**

/44 Redondo Ave,Long Beach,CA 90804

Tel : (818) 640-6191

# មួរ សុខហួរ : បក្ស សម រង្ស៊ី នៅតែបើកផ្លូវសំរាប់អ្នកប្រជាធិបតេយ្យ !

**ដោយ : មាជ សុវណ្ណារ៉ា**

មេដឹកនាំរបស់គណបក្ស សម រង្ស៊ី បានបញ្ជាក់ជំហរឱ្យដឹងថា គណបក្ស សម រង្ស៊ី នៅតែបើកផ្លូវ និងអំពាវនាវចំពោះអ្នកប្រជាធិបតេយ្យក្នុងរួបរួមគ្នាដោយមិនមានការចរចា ឬលក្ខខ័ណ្ឌចងជាសម្ព័ន្ធទេ ដើម្បីឈានទៅរកជ័យជំនះក្នុងការបោះឆ្នោតសកលឆ្នាំ ២០០៨ ។

អ្នកស្រី មួរ សុខហួរ អគ្គលេខាធិការរងទី១នៃគណបក្សភ្លើងទានបានថ្លែងយ៉ាងដូច្នេះ នៅក្នុងពិធីជួបសំណេះសំណាលជាមួយសកម្មជនរបស់ខ្លួន ដែលមានគ្នាជាង៦០នាក់ចូលរួមកាលពីសប្តាហ៍មុនកណ្តាលទីក្រុងខ្មែរ Long Beach ។



អ្នកស្រីអគ្គលេខាធិការរងបក្សប្រឆាំងមួយនេះបានថ្លែងថា ការនាំទៅបើកគណបក្សនយោបាយថ្មីៗ ហើយអះអាងថា ខ្លួនជាអ្នកលទ្ធិប្រជាធិបតេយ្យ គឺជាការខាតពេលវេលា និងបានត្រឹមតែបំបែកសម្លេងអ្នកស្នេហាជាតិតែប៉ុណ្ណោះទេ ។ ហើយអ្នកចំណេញ ឬអ្នក [illegible] នៃការបែកបាក់នោះ គឺគណ-បក្សកាន់អំណាចសព្វថ្ងៃដែលកំពុង [illegible] តែផ្តោតទិសដៅអូសទាញក្នុងយុទ្ធសាស្ត្រសំខាន់១៣ គឺដំណោះស្រាយរកការងារឱ្យយុវជនធ្វើបញ្ហាបញ្ចុះប្រេងសាំង និងការព្យាបាលអ្នកជម្ងឺដោយមិនគិតលុយ ។

គណបក្សសិទ្ធិមនុស្សកម្ពុជា លោក កឹម សុខា ដែលជាប្រមុខបក្សពន្លឺព្រះច័ន្ទតែងតែអះអាងថា គណបក្សរបស់លោកមិនដែលប្រកែកមិនព្រមរួបរួមគ្នានោះទេ

គណបក្ស Funcinpec សម្តេចក្រុមព្រះបានធ្វើការអំពាវនាវនៅក្នុងសេចក្តីថ្លែងការ២ដាច់ដោយឡែកកាលពីពាក់កណ្តាលខែ វិច្ឆិកា កន្លងទៅនេះ ទៅកាន់គណបក្ស សម រង្ស៊ី និងគណបក្សសិទ្ធិមនុស្សដោយមានបន្ទូលជាសំណួរថា បើអ្នករាជា-និយម និងអ្នកប្រជាធិបតេយ្យសេរីនិយមត្រូវរួមគ្នាបង្កើតជម្រើសពិតប្រាកសំរាប់អ្នកបោះឆ្នោត តើអ្នករាជានិយម និងអ្នកប្រជាធិបតេយ្យសេរីនិយមនោះ នឹងត្រូវខាតបង់អ្វី ?

ដែលនេះជាបន្ទូលអំពាវនាវរកការបង្រួបបង្រួមគ្នាមួយរវាងគណបក្សព្រះអង្គ គឺគណបក្សនរោត្តមរណឫទ្ធិជាមួយនិងគណបក្សនយោបាយនានានៅមុខការត្រៀមបោះឆ្នោតសកលខែកក្កដា ឆ្នាំ២០០៨ ។

គណបក្ស សម រង្ស៊ី បានប្រតិកម្មតបវិញភ្លាមៗ

ជាក្រុមនិយម Pro ឱ្យគណបក្សប្រជាជនកម្ពុជា វាលើកលែងតែវិទ្យុអាស៊ីសេរី VOA កាសែតបរទេសក្នុងស្រុកមួយចំនួន ។ និងទី៥ គឺស្ពួលបក្សក្នុងមូលដ្ឋានមនុស្សម្នាក់កាន់១០នាក់សំរាប់ដណ្តើមយកជ័យជំនះក្នុងការបោះឆ្នោតដែរនោះ ។ ដែលនេះ ពួកអ្នកប្រជាធិបតេយ្យ ឬគណបក្សនយោបាយសេរីគួរមើលពីបញ្ហានេះ ។

មន្ត្រីគណបក្សប្រជាជនកម្ពុជាអះអាងថា បើគណបក្សនានាសុទ្ធតែគិតថា ខ្លួនជាអ្នកសេរីចុះគណបក្សប្រជាជនកម្ពុជាជាអ្វី ? ជាកុម្មុយនីស្តឬ ? ហើយច្បាប់រដ្ឋធម្មនុញ្ញចែងថា ប្រទេសកម្ពុជា គឺជាប្រទេសកាន់របបសេរីនិយមពហុបក្ស ។ ដូច្នេះវាស៊ីសងទៅលើសម្លេងឆ្នោតគាំទ្រពីប្រជារាស្ត្របោះឱ្យទេ ដោយពួកគេមានសុទិដ្ឋិនិយមថា គណបក្សប្រជាជនកម្ពុជានៅតែឈ្នះឆ្នោតឆ្នាំ ២០០៨ ។

គេនៅចាំបានថា កាលពីឆ្នាំបោះឆ្នោត២០០៣ អង្គការវិទ្យាស្ថានអន្តរជាតិរបស់សហរដ្ឋអាមេរិក IRI បានស្រាវជ្រាវ និងវាយតម្លៃស្ថិតិឱ្យដឹងថា អត្រាភាគរយ នៃគណបក្សអ្នកប្រជាធិបតេយ្យមានគណបក្ស សម រង្ស៊ី និងគណបក្ស Funcinpec និងគណបក្សមួយចំនួនទៀត បើកបូកបញ្ចូលគ្នាឃើញថា ឈ្នះគណ-បក្សប្រជាជនកម្ពុជា CPP រហូតដល់៥២% ។ ខណៈដែលគណបក្សប្រជាជនកម្ពុជាបានត្រឹមតែជាង៤៧% នោះ ។

រូបមន្តនៃការបោះឆ្នោតកាន់អំណាចក្តោបប្រទេសអាណត្តិទី៤ឆ្នាំ២០០៨ បើគណបក្សនយោ-បាយណាឈ្នះឆ្នោត [illegible] កាន់អំណាចរៀបចំដឹកនាំប្រទេសដោយឯកឯងតែម្នាក់( បក្សមួយ) ។ ប៉ុន្តែសំដីនាយករដ្ឋមន្ត្រី ហ៊ុន សែន តែងតែថ្លែងជាញឹកញាប់ថា ទោះបីគណបក្សប្រជាជនកម្ពុជា (CPP) ឈ្នះឆ្នោតសម្លេងភាគ





រលួយជិះជាន់រំលោភបំពានដីធ្លីប្រជាជន ។

អ្នកស្រី មួរ សុខហួរ បន្តថា យើងលែងចង់ឃើញសម្ព័ន្ធប្រជាធិបតេយ្យ ដូចឆ្នាំ១៩៩៨ នៃបាតុកម្មបង្ហូរឈាម និងការរាំងស្ទះជាប់គាំងផ្នែកនយោបាយឆ្នាំ ២០០៣ មួយលើកជាពីរលើកទៅហើយដែលគណបក្ស Funcinpec បានក្បត់ដៃគូស្លាប់រស់ទៅបង្កើតរដ្ឋាភិ-បាលកញ្ចប់ជាមួយលោក ហ៊ុន សែន ដែលធ្វើឱ្យប្រ-ជាជនអស់ទឹកចិត្តក្នុងការផ្តល់សន្លឹកឆ្នោតជូន ។

ឥឡូវដល់ពេលវេលាដែលយើងមើលឃើញថា បើជាអ្នកប្រជាធិបតេយ្យពិត សូមអញ្ជើញចូលរួមជាមួយគណបក្ស សម រង្ស៊ី យើងគ្មានការចរចា ឬចងជាសម្ព័ន្ធ និងជាលក្ខខ័ណ្ឌអ្វីឡើយ ។ ព្រោះស្ទួលមូលដ្ឋានបក្សប្រឆាំងតែ១គត់របស់យើងជាមួយរដ្ឋាភិបាល ហ៊ុន សែន កំពុងតែរឹងមាំឆ្ពោះទៅរកជ័យជំនះ ក្នុងឆ្នាំ២០០៨ តាមការឆ្លុះបញ្ចាំងសន្លឹកឆ្នោត ឃុំ សង្កាត់ ឆ្នាំ២០០៧ នេះ ដែលកំណើតប្រជាជនមានការកើនឡើងជាពីរ ។ ពិសេសស្រទាប់យុវជនដែលគណបក្ស សម រង្ស៊ី កំពុង

ប៉ុន្តែ សូមឱ្យការរួបរួមគ្នានោះ ត្រូវឈរលើគោលការណ៍លទ្ធិប្រជាធិបតេយ្យមិនគោរពតែបុគ្គលម្នាក់ និងត្រូវមានអណត្តិដឹកនាំបក្ស ហើយបក្សមិនត្រូវដាក់ឈ្មោះខ្លួនឯងហាក់ដូចជាកម្មសិទ្ធិរបស់ខ្លួនទេ ។

លោក កឹម សុខា បានបន្តថា គណបក្សសិទ្ធិមនុស្សបាននឹងកំពុងតែបង្រួបបង្រួម ហើយស្រេចហើយ ពីព្រោះគណបក្សដែលដឹកនាំប្រទេសកន្លងមក ឬគណបក្សដែលមានស្រាប់ហ្នឹងបានធ្វើឱ្យប្រជាពលរដ្ឋអស់សង្ឃឹមរាប់លាននាក់ បានជាយើងបង្កើតគណបក្សសិទ្ធិមនុស្សដើរប្រមូលអ្នកដែលបែកបាក់ហ្នឹង អ្នកដែលអស់សង្ឃឹមក្តីដើម្បីរួមគ្នាជាកម្លាំងធំមួយនៅក្នុងគណ-បក្សសិទ្ធិមនុស្សក្នុងការទាក់ទាញយកជ័យជំនះក្នុងការបោះឆ្នោតឆ្នាំ២០០៨ ឆ្នាំក្រោយនេះ ដូច្នេះគណបក្សសិទ្ធិមនុស្ស គឺមានគោលការណ៍ គឺការបង្រួបបង្រួមឈរលើមូលដ្ឋានប្រជាធិបតេយ្យពិតប្រាកដមិនមែនបង្រួបបង្រួមដើម្បីបម្រើបុគ្គលនោះទេ ។

អតីតនាយករដ្ឋមន្ត្រីទី១ និងជាអតីតព្រះប្រធាន

ថា គេមិនអាចចងសម្ព័ន្ធភាពជាមួយគណបក្សនរោត្តមរណឫទ្ធិ បាននោះទេ ។

ក្រុមអ្នកវិភាគនយោបាយកម្ពុជាមើលឃើញថា គណបក្សចំនួន៤ ដែលចេញពីប្រភពដើមតែមួយ គឺគួរតែប្តូរគោលនយោបាយ ដែលរាស្ត្រធុញទ្រាន់នៃការបែកបាក់គ្នាឬប្តូរទម្លាប់ពីការចងសម្ព័ន្ធក្រោយពីការចាញ់ឆ្នោតមកចងសម្ព័ន្ធគ្នា ដោយលក្ខខ័ណ្ឌឈរលើគោលការណ៍ប្រាកដប្រជានិយមមុនការបោះឆ្នោត ទើបមានផ្លូវអាចទៅរកភាពជោគជ័យ ។

ក្រុមអ្នកវិភាគទាំងនោះបានមើលឃើញថា ចំណងគណបក្សប្រជាជនកម្ពុជា CPP របស់លោក ហ៊ុន សែន មានកត្តា៥ ដែលយើងត្រូវដឹង និងរកដំណោះស្រាយក្នុងការស្រាយចំណងគឺបញ្ហាអំណាច( កងកម្លាំងប្រដាប់អាវុធ ជារបស់គេទាំងស្រុង,លុយកាក់មានហូរហៀរដើម្បីជាស្ពានទាក់ទាញទឹកចិត្ត និងសន្លឹកឆ្នោត,ធនធានមនុស្សគេមានអ្នកចេះដឹងច្រើន . វិស័យសារព័ត៌មានប្រព័ន្ធផ្សព្វផ្សាយ វិទ្យុ ទូរទស្សន៍ កាសែតភាគច្រើន

ច្រើនបំផុត ក៏បក្សរបស់លោកមិនចោលដៃគូដែរ គឺគណបក្ស Funcinpec របស់លោក ញឹក ប៊ុនឆៃ គឺត្រូវតែមានសម្ព័ន្ធជាមួយគ្នាជារៀងរហូត ។

សំដីរបស់លោក ហ៊ុន សែន ត្រូវបានអ្នកវិភាគឯករាជ្យបច្ចឹមប្រទេសមិនបង្ហាញឈ្មោះនិយាយថា វាជានយោបាយបោកប្រាសពាក្យសំដីដើម្បីទប់ស្កាត់កុំឱ្យ Funcinpec រត់ទៅចងសម្ព័ន្ធជាមួយបក្ស សម រង្ស៊ី ដើម្បីប្រឆាំងគណបក្សខ្លួន ដែលជាសម្លេងឈ្នះ និងចាញ់ប្រផិតប្រផើយក្នុងរូបមន្ត ៥០% +១ នោះទេ ។ ហើយកុំគិតថា គណបក្ស CPP មិនភ័យព្រួយពីក្រុមអ្នកប្រជាធិបតេយ្យត្រូវរ៉ូវគ្នាឱ្យសោះ ។ អ្នកវិភាគនោះបន្តថា Funcinpec របស់ ញឹក ប៊ុនឆៃ និង កែវ ពុធរស្មី កុំស្រមើស្រមៃថា អណត្តិក្រោយ បើគណបក្ស CPP ឈ្នះឆ្នោតជ្រើសរើសថា ដៃគូទៀតឱ្យសោះ ។ ដូច្នេះពីឥឡូវនេះទៅចង់ ឬមិនចង់ Funcinpec ត្រូវរកវិធីរៀនរស់ដោយខ្លួនឯងឱ្យហើយទៅកុំឱ្យបាត់ស្រមោលដូចគណបក្សលោកតា សឺន សាន ។/

# ហាងខ្មែរផលិតនំក្រួហ្សង់

-ធានាគុណភាពទុកបាន៣០ថ្ងៃ
-ដឹកជញ្ជូនដោយមិនគិតថ្លៃពីថ្ងៃចន្ទ-សុក្រ
-ហាងយើងខ្ញុំមានលក់ដុំតែប៉ុណ្ណោះ
-អ្នកទិញត្រូវឲ្យដឹងមុន១ថ្ងៃ

# C & B CROISSANTS

WHOLESALE ONLY

ORDER BY PHONE:
(562) 495-5713
(800) 974-3888
Cell: (562) 607-3258
Fax: (562) 495-7544

FREE DELIVERY

We guarantee our products up to 30 days. Order must be made 1 day in advance.

WHOLE SALE ONLY





| Item | Net Wt Each | Packaging | Price/Package |
|---|---|---|---|
| Butter Croissant | 4.50 oz | 50 | $17.00 |
| Triangle Croissant | 5.00 oz | 50 | $17.00 |
| Square Croissant | 5.00 oz | 50 | $17.00 |
| Cream Cheese Croissant | 6.00 oz | 50 | $22.00 |
| Blueberry Cream Cheese Croissant | 6.00 oz | 50 | $22.00 |
| Strawberry Cream Cheese Croissant | 6.00 oz | 50 | $22.00 |
| Raisin Cinnamon Croissant | 6.00 oz | 50 | $22.00 |
| Raisin Custard Croissant | 6.00 oz | 50 | $22.00 |
| Apple Croissant | 6.00 oz | 50 | $22.00 |
| Chocolate Croissant | 6.00 oz | 50 | $22.00 |
| Chocotate Cream Cheese Croissant | 6.00 oz | 50 | $22.00 |
| Pineapple Cream Cheese Croissant | 6.00 oz | 50 | $22.00 |

1339 W. Gaylord Street• Long Beach, CA 90813

# អាថ៌កំបាំងនៃសម្រស់ពី....



កែងដៃរួមទាំងកែងជើងបានដោយការបំពោកថ្នាំដុសធ្មេញត្រឹមតែ២-៣ស្លាបព្រាកាហ្វេ ឱ្យសព្វបរិវេណស្បែកដែលមានស្នាមជ្រីវជ្រួញជាំខ្មៅរឹងនោះ រួចទុកចោល៥នាទី ។ ធ្វើជាប្រចាំរាល់១០ថ្ងៃម្តងក្បាលជង្គង់ កែងដៃ ឬកែងជើងរបស់អ្នកនឹងសស្អាតមិនគ្រោះគ្រើន ឬមានស្នាមជ្រីវជ្រួញឡើយ ។

**៣-បំរុងអញ្ចាញឱ្យមានពណ៌ស៊ីជម្ពូ**

នៅពេលដុសធ្មេញ ហើយយកសំបកក្រូចឆ្មារដែលអ្នកបានច្របាច់ទឹកប្រើប្រាស់រួចហើយមកដុសឱ្យសព្វអញ្ចាញធ្មេញ ហើយត្រូវដុសធ្មេញ២ទៅ៣ដង ។ ធ្វើបែបនេះជាប្រចាំ១ថ្ងៃ ខាន១ថ្ងៃ (ពិសេសពេលដុសធ្មេញពេលយប់មុនពេលចូលគេង) ធ្មេញរបស់អ្នកនឹងសស្អាតអញ្ចាញនឹងមានពណ៌ស៊ីជម្ពូមើលទៅមានសុខភាពល្អគ្មានអាការហើមរលាក ឬដំបៅក្នុងមាត់ឡើយ ៕






# ចំណេះ និងប្រាក់

| | | | |
|---|---|---|---|
| ចំណេះតែងតែចំណាយ | ឯប្រាក់កាក់ចាយ | ក៏សំបូរចោល | ខ្លះមានប្រយោជន៍ |
| ខ្លះឥតប្រយោជន៍ | បានតែស្រមោល | ប្រាក់កាក់ចាយចោល | ស្រមោលតាមប្រាណ ។ |
| ស្រមើលស្រមៃ | ស្រមោលឃើញរាល់ថ្ងៃ | នឹកគិតស្រណោះ | តាមចិត្តម្តងៗ |
| គិតចង់តែបោះ | តែនឹកស្រណោះ | អាឡោះដល់ដៃ | **ដូច្នេះប្រយ័ត្ន!** |
| ឱកុលបុត្រខ្មែរ | រឿងជាតិអតីត | ធ្លាប់មានឆ្លងកាត់ | គ្រប់ជាន់តំណ |
| មានគ្រោះមហន្តរាយ | និងការវឹកវរ | ប្រជាពលរដ្ឋ | ក្មេងចាស់ប្រុសស្រី |
| រងទុក្ខវេទនា | ខ្លោចផ្សាឈឺចាប់ ។ | **ដូច្នេះប្រយ័ត្ន!** | កុំភ្លេចឱ្យសោះ |
| រឿងគ្រោះមហន្តរាយ | ដល់ប្រទេសជាតិ | ព្រោះអាងចំណេះ | និងប្រាក់កាក់ចាយ |
| មិនបានគិតអ្វី | ក្រៅពីខ្លួនឯង | បក្ខពួកគ្រួសារ | មុខមាត់បុណ្យស័ក្តិ |
| បួសក្បៀកអួតអាង | គ្មានយុត្តិធម៌ | ឬក្រែងអាណិត | បំពារបំពាន |
| លើអ្នកស្លូតត្រង់ ។ | ដូច្នេះចំណេះ | ដែលមានកន្លង | គ្រប់ប្អូនគ្រប់បង |
| និងជនរួមជាតិ | សូមពិចារណា- | តើមកពីអ្វី ? ។ | **ដូច្នេះប្រយ័ត្ន!** |
| ពេលមានអំណាច | ឡើងបុណ្យឡើងស័ក្តិ | កាន់កាប់ត្រួតត្រា | សូមអ្នកកុំភ្លេច |
| សំអិតសំអាង | ខំកសាងខ្លួន | ឱ្យបានត្រឹមត្រូវ | សីលធម៌វិន័យ |
| សច្ចៈស្មោះត្រង់ | ក្នុងសិទ្ធិសេរី | កុំឱ្យពឹងពាក់ | ទៅលើអបិយ |
| ឬការហេងស៊ុយ | ឬតាមចាក់លោក | រណេបរណើប | អែបអបស៊កសៀត |
| ហុចនាយហុចអាយ | ចូរមើលឱ្យឆ្ងាយ | នោះទើបបានសម | ជាអ្នកដឹកនាំ |
| អ្នកផងគោរព | កោតហើយសរសើរ | កេរ្តិ៍ឈ្មោះមិនស្លាប់ | ក្រអូបសុះសាយ ។ |
| **ដូច្នេះប្រយ័ត្ន!** | មានពាក្យដំណាល | ពីអ្នកក្រៅផ្សេង | ដែលមានចិត្តចង់ |
| ចូលរួមកសាង | គេនិយាយថា : | "អ្នកណា ឬអាណា | ក៏ដូចអាណាដែរ |
| ឬអាក្រួចក៏ដូចអាពោត | ឬអាម្រិចក៏ដូចអាខ្ទឹម | ឬពេលខ្លួននៅក្រ | ខំត្រដររមិត្តភ័ក្តិ |
| ពេលខ្លួនកើតជាយក្ស | កន្ទ្រាក់សាច់ស៊ីតែឯង" ។ | ពាក្យនេះចំបែង | គិតគួរចងចាំ |
| សូមកុំទោម្តេញ | អ្នកត្រូវថ្លឹងថ្លែង | បើឃើញពិនិត្យ | ឮស្តាប់កត់ត្រា |
| កុំឱ្យឃើញភ្លាម | ស្ទុះទៅចង់បាន | ពាក្យពិតបុរាណ | ថានៅមានខ្វះ ។ |
| **ដូច្នេះប្រយ័ត្ន!** | គ្រប់ៗរូបផង | ចៀសមិនផុតឡើយ | ខ្លះបានទទួល |
| ត្រឹមតែចំណេះ | នោះសោតអាត្មា | ពិតនៅមានខ្វះ | ដូចពាក្យចាស់ថា |
| ដើរឱ្យមានបី | ស្តីឱ្យមានបួន | ពាក្យនោះត្រឹមត្រូវ | ប្រែមកដូច្នេះ : |

**សូមរង់ចាំទំព័រក្រោយ**

# អត្រាចម្លងមេរោគអេដស៍នៅកម្ពុជាធ្លាក់ចុះមកនៅត្រឹម០,៩%

•••មន្ត្រីអាជ្ញាធរប្រយុទ្ធនិងជំងឺអេដស៍របស់ប្រទេសកម្ពុជាបានឱ្យដឹងក្នុងថ្ងៃប្រារព្ធទិវាពិភពលោ ក ប្រយុទ្ធ និងជំងឺអេដស៍ ថ្ងៃទី១ ធ្នូ ថា អត្រាផ្ទុកមេរោគអេដស៍និងអត្រាចម្លងរោគថ្មី ក៏បានធ្លាក់ចុះពីចំណុចកំពូលដែលធ្លាប់មានកាលពីក្នុងឆ្នាំ ១៩៩៨ មកយ៉ាងច្រើន ក៏ប៉ុន្តែកត្តានាំឱ្យមានគ្រោះថ្នាក់ ដោយសារមេរោគអេដស៍នេះនៅតែបន្តតាមរយៈសេវាបំរើការសប្បាយជាមួយនារីរកស៊ីភេទ និងការរួមរ័ក និងសង្ស័យការប្រើថ្នាំញៀនការរួមរក្សភេទដូចគ្នា ។

លោក តែង គន្ធី អគ្គលេខាធិការអាជ្ញាធរជាតិប្រយុទ្ធ និងជំងឺអេដស៍ថ្លែងនៅក្នុងទិវាអេដស៍ពិភពលោកនៅក្រុងភ្នំពេញថា តួលេខដែលស្រាវជ្រាវប្រមូលបានក្នុងឆ្នាំ ២០០៦ បង្ហាញថា អត្រាអ្នកផ្ទុកមេរោគអេដស៍បានធ្លាក់ចុះពី២ភាគរយ ជាចំណុចកំពូលនៅឆ្នាំ១៩៩៨ មកនៅត្រឹមតែ ០.៩ ភាគរយនៅឆ្នាំ២០០៦ ។ រីឯអត្រាចម្លងមេរោគអេដស៍ថ្មីក៏បានធ្លាក់ចុះផងដែរក្នុងឆ្នាំ ២០០៧ គឺគេបានរកឃើញមានតែ ១.៣៥០ នាក់ទេ ដែលថយចុះជាងពីឆ្នាំ ២០០៦ ដែលមានរហូតដល់ទៅ១២.៧០០នាក់ ។

លោកអគ្គលេខាធិការអាជ្ញាធរឱ្យដឹងដែរថា ការគ្រោះថ្នាក់នៃការចម្លងមេរោគអេដស៍នេះគឺឈានដល់មកដំណាក់ទី២ ដែលវានៅតែបន្តតាមរយៈសេវានារីបំរើការសប្បាយការមានសង្ស័យរួមរក្សគ្នាឥតប្រើស្រោមអនាម័យការរួមរក្សមនុស្សភេទដូចគ្នាការប្រើម្ជុលចាក់គ្រឿងញៀន។ លោក តែង គន្ធី ឱ្យដឹងដែរថា ក្រុមដែលងាយឆ្លងមេរោគអេដស៍ជាងគេគឺស្ត្រីជាដៃគូនៃបុរសដែលដើររកស៊ីចល័ត និងយុវវ័យដែលខ្វះការអប់រំ ។

តាមតួលេខដែលរកឃើញក្នុងឆ្នាំ ២០០៥ ពីកម្មវិធីអេដស៍របស់អង្គការសហប្រជាជាតិកម្ពុជាមានចំនួនអ្នកមានមេរោគអេដស៍១៧០.០០០នាក់ ។ ហើយនៅឆ្នាំ ២០០៣ ចំនួនអ្នកស្លាប់ដោយសារជំងឺអេដស៍មានចំនួន១៥.០០០នាក់ ។

ក្នុងទិវានោះដែរ កុមារា ម៉ែន វិបុល និងកុមារី អ៊ឹងស្រីលីស ជាក្មេងកំព្រាដោយឪពុកម្តាយកើតជំងឺអេដស៍ស្លាប់ចោលបានចាប់អារម្មណ៍ថា ពួកគេពិតជាមិនចង់រស់នៅកំព្រាបែបនេះទេ ហើយក៏ចង់បានការ-ថ្នាក់ថមដូចជាកុមារមានឪពុកម្តាយ និងចង់រៀនសូត្រដូចកុមារដទៃដែរ ។ ប្អូនបានលើកឡើងថា ដំបូងឡើងក្រោយដែលឪពុកម្តាយស្លាប់ចោលសាច់ញាតិបានជួយចិញ្ចឹមពួកគេតែដល់ដឹងថា ពួកគេកំពុងរស់នៅជាមួយមេរោគអដស៍ក៏មានការរើសអើងហើយក៏បញ្ជូនមកឱ្យរស់នៅក្នុងអង្គការជួយថែទាំវិញ តែក៏ជាសំណាងដែរដែលត្រូវបានទទួលការថែទាំឱ្យបានរស់នៅហូបចុកគ្រប់គ្រាន់សមរម្យផងដែរ ហើយពួកគេក៏បានស្នើសុំលោកជំទាវ ប៊ុន រ៉ានី ហ៊ុន សែន ប្រធានកាកបាទក្រហមកម្ពុជាធ្វើជាម្តាយធម៌ ។

លោកជំទាវ ប៊ុន រ៉ានី ហ៊ុន សែន បានថ្លែងកោតសរសើរដល់បណ្តាអង្គការជាតិនិងអន្តរជាតិ ដែលប្រឹងប្រែងឱ្យមានការថយចុះនូវការឆ្លង និងការកើតរោគជំងឺអេដស៍នៅកម្ពុជា ហើយថា កម្ពុជាក៏មានមោទនភាពណាស់ដែរ ដែលត្រូវបានជាប់ឈ្មោះក្នុងប្រទេស៥ លើពិភពលោក ដែលអាចកាត់បន្ថយការរាលដាលនៃមេរោគអេដស៍បានយ៉ាងមានប្រសិទ្ធភាព។ តែលោកជំទាវក៏បានក្រើនរំលឹកថា "យើងអាចភ្លេចអេដស៍ តែអេដស៍អត់ដែលភ្លេចយើងឡើយ" ហេតុនេះនៅមានកិច្ចការច្រើនទៀត ដែលទាំងអស់គ្នាត្រូវរួមគ្នាប្រយុទ្ធជាមួយនឹងមេរោគអេដស៍នេះ។

ម្ចាស់ក្សត្រី នរោត្តម មរិនេណារិទ្ធិ ទេសរដ្ឋមន្ត្រីទទួលបន្ទុកអាជ្ញាធរប្រយុទ្ធប្រឆាំងជំងឺអេដស៍ថ្លែងក្នុងឱកាសប្រារព្ធ ទិវាប្រឆាំងជំងឺអេដស៍ពិភពលោកថ្ងៃទី១ ធ្នូ ឱ្យដឹងថា ក្នុងឆ្នាំ ២០០៧ នេះតាមការប៉ាន់ប្រមាណពីអង្គការអន្តរជាតិថា មានមនុស្ស៣៣លាន ២សែននាក់ ជាមនុស្សពេញវ័យស្ត្រី និងកុមារកំពុងរស់នៅជាមួយរោគអេដស៍ ហើយក្នុងនេះមាន២លានមួយសែននាក់ បានបាត់បង់ជីវិតដោយសារតែជំងឺដែលពុំទាន់មានថ្នាំព្យាបាលនេះ ។ ស្ថិតិស្រាវជ្រាវថ្មីបានឱ្យដឹងដែរថា មនុស្សពេញវ័យស្ត្រី និងកុមារអាយុក្រោម១៥ឆ្នាំ ប្រមាណ២៥សែននាក់ បានជួបករណីឆ្លងរោគអេដស៍ថ្មីផងដែរ ។

ការប្រារព្ធទិវាអេដស៍នេះធ្វើឡើងដោយសារតែពិភពលោកទាំងមូលមើលឃើញអំពីមហន្តរាយធ្ងន់ធ្ងរដែលបណ្តាលពីមេរោគអេដស៍ហេតុនេះ ទើបមានការកំណត់យកថ្ងៃទី១ ធ្នូ រៀងរាល់ឆ្នាំដើម្បីប្រារព្ធទិវាពិភពលោកប្រយុទ្ធនិងជំងឺអេដស៍។ ដោយឡែកម្ចាស់ក្សត្រី មារី បានឱ្យដឹងថា នៅកម្ពុជាបានប្រារព្ធទិវានេះចាប់តាំងពីឆ្នាំ ១៩៩៣ មកម្ល៉េះ។ ប្រធានបទសំខាន់ដែលដាក់ចេញក្នុងទិវាពិភពលោកប្រយុទ្ធ និងជំងឺអេដស៍ឆ្នាំនេះ "ខ្ញុំសន្យារួមគ្នាទប់ស្កាត់មេរោគអេដស៍និងជំងឺអេដស៍ " ដែលមានន័យជាអាទិ៍ថា យើងទាំងអស់គ្នាប្តេជ្ញាចិត្តយ៉ាងមុតមាំចូលរួមទប់ស្កាត់ និងកាត់បន្ថយការឆ្លងរីករាលដាល នៃមេរោគអេដស៍ និងជំងឺអេដស៍ ។/

## ប្លែកៗ... ប្លែកៗ... ប្លែកៗ... ប្លែកៗ...


សម្លាញ់ប្រាប់គ្នាមកនរណាហ្នួតខាំឯង ?


បើធ្វើអ្នកផឹក គឺផឹកឱ្យខុសគេ


ថើតមាត់ពីរគូ


ទប់យូរប៉ុណ្ណា... ក៏បងមិនជាចុកដៃដែរអូន


បងស្រាលដូចសំលី ទុកឱ្យអូនស្រីប្តូរតួនាទី


ទេចសំពាយផ្សងកេអ្នកយល់ចិត្ត


ហ្អែលោកនាយ បើជួយឡានហើយ កុំភ្លេចជួយម្ចាស់ផងណា...!


សម្រាក បន្តិចគ្នាក់ ឡើង យាមផ្ទះ


ពេលយប់ ប្រលំយ ពេលថ្ងៃ លើក


បើជួបស្នេហ៍ អញ្ជើង សូម អត់ល្អជាង !

# បច្ចុប្បន្នភាពនៃរឿងមិនគួរកើតនៅកម្ពុជា

## ឪម៉ាល់យក្សមួយសំបុកផ្តាច់ជីវិត ម្តាយ និងកូនពីរនាក់

ម្តាយ និងកូន២នាក់ត្រូវឪម៉ាល់ទិចស្លាប់ទាំង៣នាក់ ហេតុការណ៍គួរឱ្យអាណោចអាធ័មបានកើតឡើងនៅខេត្តសៀមរាប ខណៈដែលម្តាយបាននាំកូនជិះទូកម៉ាស៊ីនទៅកាប់អុស ហើយត្រូវសត្វឪម៉ាល់មួយ សំបុករោមទិចដល់ស្លាប់ កាលពីរសៀល ថ្ងៃទី២៦ ខែ វិច្ឆិកា ឆ្នាំ ២០០៧ ។ រឿងគួរសោកស្តាយនេះកើតឡើង នៅក្នុងភូមិលេខ២ ឃុំចុងឃ្នៀស ស្រុក-ខេត្ត សៀមរាប ។

អ្នករងគ្រោះបាត់បង់ជីវិតមានម្តាយឈ្មោះ ឡុយ សុភា អាយុ២៤ឆ្នាំ និងកូនស្រីឈ្មោះ កុល ញាញ់ អាយុ ៦ឆ្នាំ និងកូនប្រុសឈ្មោះ កុល ទី អាយុ ៣ឆ្នាំ ។ គ្រួសារជនរងគ្រោះជាគ្រួសារក្រីក្រ ដែលមានប្តីជាអ្នកស៊ីឈ្នួលរត់ការណូតដឹកភ្ញៀវទេសចរនៅតំបន់ចុងឃ្នៀស ។

ហេតុការណ៍នេះលោកមេឃុំបានប្រាប់ឱ្យដឹងថា នៅវេលាម៉ោងប្រមាណ២រសៀល ស្ត្រីជាម្តាយ និងកូនស្រី-ប្រុសតូចៗទាំង២នាក់ បានជិះទូក ម៉ាស៊ីន ទៅរកកាប់អុសនៅចំងាយប្រហែលពី៣០០-៤០០ ម៉ែត្រពីផ្ទះ ។ លុះទៅដល់ព្រៃលិចទឹកក៏បានកាប់ចំសំបុកឪម៉ាល់ដ៏ធំមួយ ធ្វើឱ្យឪម៉ាល់ផ្អើលឃុលចេញមកទិចជនរងគ្រោះស្ទើរតែសុសសាច់បណ្តាលឱ្យធ្លាក់ទៅក្នុងទឹកទន្លេ ។ ស្ត្រីជនរងគ្រោះបានព្យាយាមបញ្ឆេះម៉ាស៊ីនទូករត់មកដល់ផ្ទះ ដើម្បីឱ្យគេជួយដែរ តែស្ត្រីនោះបានក្ខតឈាម ឯកូនស្រីឈ្មោះ កុល ញាញ់ បានផុតដង្ហើមទៅហើយ គឺនៅសល់ម្តាយ និងកូនប្រុសអ្នកស្រុកបញ្ជូនទៅពេទ្យបង្អែកខេត្តដែរ តែមិនអាចសង្គ្រោះបានហើយក៏ស្លាប់ទាំងអស់គ្នា ។/

## ស្ត្រីម្នាក់ផឹកស្រាដល់ស្រវឹងមកផ្ទះ វិញចងកស្លាប់ចោលប្តី និងកូន

នៅខេត្តពោធិសាត់ កាលពីថ្ងៃទី ៤ ធ្នូ ២០០៧ នេះ ស្ត្រីឈ្មោះ សាន សុខា អាយុ៣៧ឆ្នាំ រស់នៅភូមិ កំពែង ឃុំស្នាមព្រះ ស្រុកបាកាន បានធ្វើអត្តឃាតចងកសម្លាប់ខ្លួនឯងដោយគ្មានអ្នកណាដឹងពីមូលហេតុ ។ តាមអកស្រុកជិតខាងនិយាយថា គ្រួសារនេះមិនដែលមានជម្លោះអីធំដុំទេ ប្តីរកស៊ីឡើងត្នោតឱ្យគេមានកូនម្នាក់អាយុ៦ឆ្នាំ និងជាគ្រួសារក្រីក្រមួយ ដែលទើបមករស់នៅទីនេះបាន២ឆ្នាំទេ ។ ថ្ងៃកើតហេតុគេឃើញស្រីនោះ ផឹកស្រាពេញមួយ ថ្ងៃស្រវឹងជោគខុសធម្មតា ឯប្តីមិននៅផ្ទះទេ ។ ស្រាប់តែប្រមាណម៉ោង១០យប់ ប្តីមកពីស៊ីឈ្នួលលីបារ ស្រូវឱ្យគេគោះទ្វារចូលទៅក៏ឃើញប្រពន្ធចងកស្លាប់បាត់ទៅហើយ ។ តាមប៉ូលិធ្វើកោសល្យវិច័យថា សពនេះពិតជាធ្វើអត្តឃាតពិតមែន ហើយក៏ទំនងបណ្តាលពីការស្រវឹងប្រចណ្ឌប្តីពេកគិតខ្លីក៏សំរេចចិត្តបែបនេះទៅ ។/

## ប្រើចំបុះមុខដេញតាមចោរសុំ ទូរស័ព្ទវិញ ត្រូវចោរបាញ់របួសជើង

វាជារឿងចំឡែក និងទំនងស្មានថា ពួកចោរក៏មានចិត្តល្អចេះអាណិតអាសូរជនរងគ្រោះក៏មិនដឹងបាន ជាបុរសសញ្ជាតិយួនម្នាក់បានខំប្រឹងដើម្បីដេញ តាមក្រុមចោរដែលបានឆក់យកទូរស័ព្ទដៃរបស់ខ្លួន និងមិត្តស្រី៤គ្រឿង ពេលដែលនាំគ្នាធ្វើដំណើរតាមផ្លូវ ១៨៤ ជិតសាលាអាំយ៉ិចក្នុងសង្កាត់បឹងរាំង ខណ្ឌដូនពេញ កាលពីថ្ងៃ ២៥ វិច្ឆិកា ២០០៧ នៅព្រឹកប្រលឹមស្រាង១ ហើយពេលលោកចោរឃើញ ពួកវាការទាញកាំភ្លើងខ្លីបាញ់ត្រូវម្រងបណ្តាលឱ្យរបួសជើង ។

## សមត្ថកិច្ចស្រវឹងផឹកឆ្នោតជុះប្រើ អាវុធ គំរាមតែជាន់គ្នាពេញរោងបុណ្យ

ក្នុងពិធីបុណ្យដាលោក ឬ ហៅថា បុណ្យកន្ទយ ករ នៅឯភូមិយក្សធំ ឃុំ ក្អែង ស្រុកសណ្តាន់ ខេត្ត កំពង់ធំ អ្នកដែលចូលរួមបានផ្អើលរត់ជាន់គ្នា ដោយសារតែសមត្ថកិច្ចប៉េអឹមមកពីស្រុកសណ្តាន់ម្នាក់ និងប៉េអឹមមកពីស្រុកសំបូរម្នាក់ ប្រើអាវុធមកបង្កួតកាំភ្លើងដាក់គ្នាច្រងេងច្រងាង ធ្វើឱ្យអ្នកដែលទៅចូលរួមរាំកំសាន្តសប្បាយក្នុងពិធីបុណ្យផ្អើលឈ្មុលរត់ជាន់គ្នាពេញរោង ។ សូមបញ្ជាក់ថា ពេលដែលអ្នកភូមិកំពុងតែកំសាន្តសប្បាយអស់លោកជាភាគីជម្លោះបាននាំគ្នាអង្គុយផឹកទឹកត្នោតជូររួមគ្នា តែពេលដែលអាកាសាហាវចូលពេញពោះក៏តាំងតឹងមាត់ដាក់គ្នាហើយ ក៏ទាញអាវុធរៀងៗខ្លួនមកភ្ជង់គ្នា ធ្វើបរិយាកាសបុណ្យក្លាយជាល្អក់កករ ។/

## បុរសម្នាក់ផឹកស្រវឹងដេញកាប់ ឪក្មេក និងប្រពន្ធពេញភូមិ

បុរសប្រមឹកម្នាក់បានប្រើហិង្សាធ្វើឱ្យរងរបួសដល់សមាជិកក្រុមគ្រួសារថែមទៀតផង កាលពីចុងខែវិច្ឆិកា ។ រឿងរ៉ាវនេះតាមប៉ូលិសស្រុកស្អាងរៀបរាប់ថា ពីរសៀលថ្ងៃចុងខែ វិច្ឆិកា បុរសឈ្មោះ ហ៊ុយ ហឿ អាយុ៣០ឆ្នាំ រស់នៅភូមិលេខ៣ ឃុំស្វាយ ប្រទាល ស្រុកស្អាង ខេត្តកណ្តាល បានទៅផឹកស៊ីស្រវឹងជាខ្លាំង ពេលមកផ្ទះវិញ ក៏សំឡុតប្រពន្ធឱ្យរកប្រាក់១០ម៉ឺនរៀលឱ្យខ្លួន តែពេលប្រពន្ធថាគ្មានមិនដឹងទៅរកពីណាជននេះ ក៏ទាញពូថៅពុះអុសប្រវែងមួយម៉ែត្រដេញកាប់ឱ្យរត់ពេញភូមិ ខណៈដែលឪពុកម្តាយក្មេកឃើញក៏ទៅឃាត់តែក៏ត្រូវជននេះជេរប្រមាថ និងដេញកាប់ឱ្យរត់ឡើងផ្ទះ ហើយត្រូវជននេះយកដុំថ្ម គប់ស្រោចផ្ទះផង ។ ហើយដោយខឹងដេញកាប់មិនបានជននេះក៏មកកាប់បំផ្លាញរបស់ទ្រព្យក្នុងផ្ទះខ្ទេចខ្ទីអស់ និងបានជេរប្រមាថមេប៉ុស្តិ៍នគរបាល រហូតដល់ត្រូវសមត្ថកិច្ចប៉ុស្តិ៍ចាប់ដាក់ខ្នោះ និងបញ្ជូនមកស្នងការប៉ូលិសខេត្ត ដើម្បីចាត់ការតាមផ្លូវច្បាប់ ។/ (តនៅទំព័រទី៣១)

# អនិច្ចាកូនខ្មែរក្នុងសង្គមសិក្សា...

ដែលស្ថិតិនេះជាការគួរឱ្យបារម្ភ និងជាការគ្រោះថ្នាក់សំរាប់ការអភិវឌ្ឍន៍សហគមន៍ខ្មែរ នាថ្ងៃអនាគត ។

នាយកប្រតិបត្តិសមាគមខ្មែរនៅទ្វីបអាមេរិក (CAA) គុជ គឹមថៃ បានអះអាងថា ប្រសិនបើស្ថិតិដែលអះអាងដោយ KORE ជាការត្រឹមត្រូវយើងពិតជាព្រួយបារម្ភបំផុតសំរាប់យុវជនខ្មែរ ដែលកំពុងតែឃ្លាតចេញពីការសិក្សារបស់ពួកគេ និងការរាំងស្ទះដល់ការអភិវឌ្ឍន៍ធនធានមនុស្សវប្បធម៌ជាតិខ្មែរក្នុងសហគមន៍របស់ខ្លួន ។

លោក គុជ គឹមថៃ បានបន្តថា ចំណោទបញ្ហាមានកត្តារួមផ្សំច្រើន ដែលធ្វើឱ្យកូនខ្មែរមានការរៀនសូត្របានស្ទួចស្តើងជាង៥០% ដែលមិនបានរៀនចប់វិទ្យាល័យ (High School) គឺវាចេញពីការខ្វះខាតក្នុងការជំរុញពីឪពុកម្តាយអាណាព្យាបាលនៅឯផ្ទះ ដូចជាការតាមដានកូនចៅកិច្ចការជួយលំហាត់កូននៅផ្ទះ (Home Work) ដែលឪពុកម្តាយរវល់ក្នុងជីវភាពប្រកបការងារព្រលឹមចេញព្រលប់ចូលជាមួយឪពុកម្តាយភាគច្រើនមិនចេះអក្សរ ឬចំណេះដឹងសំរាប់ជួយបង្ហាត់បង្រៀនកូន ពិសេសបញ្ហាភាសាជាដើម ។ បញ្ហាជម្លោះគ្រួសារលែងលះគ្នា ដែលជាវិបត្តិដល់កូនចៅក្នុងការរៀនសូត្រ និងការរស់នៅក្នុងសង្គមបរិស្ថានដោយការទាក់ទាញពីផ្លូវថ្នល់នៃអបាយមុខពីមិត្តភ័ក្តិខិលខូច រួមនឹងការរៀនសូត្រខ្ជិលច្រអូសមិនយកចិត្តទុកដាក់នៅឯសាលារៀនទៀតផងនោះ បានធ្វើឱ្យពួកគេឈប់រៀនកណ្តាលទី គេចវេសមិនចូលសាលា ឬឈប់រៀនតែម្តង ។

អតីតសាស្ត្រាចារ្យសង្គមវិទ្យា និងចិត្តសាស្ត្រ Jhon Brown ពីសាកលវិទ្យាល័យ New York អះអាងប្រាប់ខ្មែរប៉ុស្តិ៍ថា យោងតាមការសិក្សាស្រាវជ្រាវរបស់លោកពីស្ថានភាពគ្រួសារខ្មែរជាមួយបញ្ហានយោបាយដែលបន្តមកក្រោយពីរបបខ្មែរក្រហម "Killing Field" អតីតជនភៀសខ្លួនខ្មែរដែលរស់នៅក្នុងសហរដ្ឋអាមេរិក ជួបការលំបាក គឺបញ្ហាភាសាជារនាំង និងចំណេះដឹងទូទៅមិនមានក្នុងខ្លួននៃជនជាតិខ្មែរភាគច្រើន ដែលជាអ្នកជនបទស្រុកស្រែចំការមិនបានរៀនសូត្រ ។ ដូច្នេះវាជាឧបសគ្គសំរាប់កូនចៅរបស់ពួកគេផ្ទុយពីឪពុកម្តាយអាមេរិកាំង ដែលពួកគេមានចំណេះដឹងខ្ពស់ និងជីវភាពធូរធារសំរាប់ជាជំនួយស្មារតីជំរុញដល់កូនចៅខ្លួននៅឯផ្ទះជាមួយពេលវេលាគ្រប់គ្រាន់ក្នុងមជ្ឈដ្ឋានសង្គមសាធារណៈ ដែលធ្វើឱ្យកូនចៅពួកគេភាគច្រើនមានការរៀនសូត្របានថ្នាក់ខ្ពស់ៗ និងមានការងារល្អៗ ។ សាស្ត្រាចារ្យ John Brown បន្តថា ខ្មែរមានកូនចៅច្រើនខុសពីអាគាំងកូនចៅត្រឹមមួយ ឬពីរនាក់ ហើយជនជាតិខ្មែរ គឺជាជនចំណាកស្រុកធ្វើឱ្យពួកគេត្រូវតែខិតខំក្នុងតម្រូវការក្រពះទាំងយប់ទាំងថ្ងៃ ដែលនេះជាគន្លាតឃ្លាតឆ្ងាយពីកូនចៅដែលមិនបានអប់រំ ឬមើលថែទាំឱ្យបានដិតដល់ ។ និងបញ្ហាជីវភាពក្រីក្រ និងភាពអវិជ្ជា ដែលនាំបង្កឱ្យមានជម្លោះបែកបាក់គ្នាទៀតផង វារឹតតែធ្វើឱ្យកូនចៅកាន់តែបាក់ស្មារតីលែងចង់រៀនសូត្រទៅទៀត ។

សាស្ត្រាចារ្យ John និយាយថា បញ្ហាសង្គមគ្រួសារសាលារៀនមជ្ឈដ្ឋានសាធារណៈត្រូវតែផ្សារភ្ជាប់គ្នាដែលគ្មានចន្លោះផ្នែកណាមួយបានទេ សំរាប់ការអប់រំទូន្មាន និងការសិក្សាឆ្ពោះទៅរកភាពជោគជ័យ ។

សែម ដែលរៀនសូត្រមិនចប់វិទ្យាល័យបានអះអាងថា រូបគេមិនអាចរៀនបន្តទៀតទេ ដោយឪពុកម្តាយមានការបែកបាក់ ហើយមានបងប្អូនច្រើនត្រូវបង្ខំចិត្តឈប់រៀន ដើម្បីរកការងារធ្វើជួយម្តាយមេម៉ាយ ដែលគាត់មានជម្ងឺសរសៃប្រសាទទទួលលុយរដ្ឋ ដែលមិនអាចទ្រទ្រង់ជីវភាពគ្រួសារខ្លួនបាន ។

ចំណែក Kevin អាយុ១៨ឆ្នាំ ដែលឈប់រៀននៅថ្នាក់ទី១០ កាលពី២ឆ្នាំមុននិយាយថា ពួកក្មេង៣ល (បងជំបងតូច) ជនជាតិអាគាំងខ្មៅ និងស្ពេនីសបានអូសទាញរូបគេដោយនិយាយលួងលោមជាមួយការគំរាមកំហែងជីវិតមិនឱ្យគេរៀនសូត្រថា ជាការអត់ប្រយោជន៍ ដើរជីកស៊ី លួច និងជក់គ្រឿងញៀនរាំសប្បាយជាង ។ រី អ៊ុំ ស្រី សុំមិនប្រាប់ឈ្មោះនិយាយថា ព្រោះតែភាពល្ងង់ខ្លៅរបស់គាត់មិនចេះអក្សរ និងមិនមានពេលមើលថែរក្សាកូន ឬជួយធ្វើលំហាត់កូននៅផ្ទះនោះ បានធ្វើឱ្យកូនគាត់ធ្លាក់ខ្លួនទៅជាឧក្រិដ្ឋជនសម្លាប់មនុស្ស ដែលឥឡូវត្រូវរដ្ឋាភិបាលអាមេរិកាំងបញ្ជូនកូនគាត់ពីរនាក់ទៅកាន់ប្រទេសកម្ពុជាហើយ កាលពី៤ឆ្នាំមុន ។ និងកូនស្រីគាត់ទៀតកំពុងតែលេងខ្លួននឹងបញ្ហាគ្រឿងញៀនដែលត្រូវពេទ្យកំពុងជួយសង្គ្រោះនៅឯមន្ទីរពេទ្យមួយតាមផ្លូវ Long Beach ។

នៅត្រង់ចំណុចបញ្ហាខាងលើនេះ ដែលនៅសហរដ្ឋអាមេរិក គេប្រគល់ការទទួលខុសត្រូវលើការគាំទ្ររបស់ក្រុមគ្រួសារ ដើម្បីជួនដំណើរឱ្យកូនចៅបានរៀនសូត្រទៅឆ្ងាយលើសពីការវិទ្យាល័យយ៉ាងតិច ដើម្បីឱ្យអាចទទួលផលពីប្រទេសដ៏មានអំណោយផលនេះបាន ។ ក៏ប៉ុន្តែ ចន្លោះនៃជំលោះស្រាយ "ក្រពះ" ទៅតែខ្ពស់ជាចំជាងចន្ទ "ខួរក្បាល" នៅឡើយ ដោយសារតែការបោះបង់សាលារៀនទៅអាយុ១៦ឆ្នាំ មានច្រើន ឬដោយឪពុកម្តាយចង់ឃើញកូនធ្វើការឱ្យបានឆាប់នឹងរវលជួយចេញថ្លៃឈ្នួលផ្ទះ ឬដោយសារការទាក់ទាញដោយ "ផ្លូវថ្នល់នៃអបាយមុខ" ។

ប៉ុន្តែទោះបីជាយ៉ាងនេះក៏ដោយការសង្កេតបានមើលឃើញថា មានកូនខ្មែរមិនតិចទេដែរ ដែលឪពុកម្តាយបានលើកទឹកចិត្ត និងជំរុញឱ្យពីក្រោយការរៀនសូត្ររហូតដល់ថ្នាក់បរិញ្ញាប័ត្រ , អនុបណ្ឌិត, វេជ្ជ បណ្ឌិត, មេធាវីបណ្ឌិត PHD ជាដើម ក្នុងការជួយលើកស្ទួយជាតិខ្មែរ និងជនជាតិអាស៊ីដ៏ដែលជាជនចំណាកស្រុក ពិសេសសហគមន៍ខ្មែររបស់ខ្លួន មិនថាក្រុងខ្មែរ Long Beach ឬតំបន់ខ្មែរឯទៀតក្នុងសហរដ្ឋអាមេរិក ។

មតិពីមជ្ឈដ្ឋានមួយចំនួននិយាយថា អង្គការសមាគម ឬ សហគមន៍ និងមហាជន ប្រជាពលរដ្ឋខ្មែរ គួរតែខិតជិតគ្នាដើម្បីរិះរកវិធីសាស្ត្រណាមួយជួយជំរុញដល់កូនខ្មែរជាយុវជនជំនាន់ ក្រោយឱ្យខិតខំរៀនសូត្រមិនថា ចំណេះដឹងទូទៅ ឬវប្បធម៌អរិយធម៌ខ្មែរយើង ដើម្បីឱ្យពួកគេបានរស់ក្នុងជីវភាពថ្កើងថ្កានថ្ងៃអនាគត ។ ព្រោះការចោទប្រកាន់បានសំដែងចេញថា សមាគម ឬសហគមន៍ហាក់កំពុងតែឃ្លាតឆ្ងាយពីការបំរើផលប្រយោជន៍សង្គមខ្មែរ ឬប្រជាជនខ្លួនហើយ ។ និងប្រជាជនខ្មែរក៏កំពុងតែអស់ជំនឿជឿជាក់ទៅលើការពឹងពាក់វាក់អាសន្នអ្វីជាមួយសមាគម ឬសហគមន៍ដែរ ដោយមានពាក្យថា មិនបានជួយប្រយោជន៍អ្វីដល់ពួកខ្លួនជាបងប្អូនខ្មែរ ។ ប៉ុន្តែពួកសមាគម ឬសហគមន៍ ក៏ធ្លាប់អះអាងថា គម្រោងកម្មវិធីធ្វើទៅតាមគោលការណ៍ម្ចាស់លុយដែលយើងមិនអាចចាយវាយតាមការនឹកឃើញបានទេ ដែលបងប្អូនខ្មែរខ្លះស្នើសុំជួយខុសគម្រោង និងផែនការរបស់អង្គការ ៕

## ដំណឹងមរណភាព



**លោក អ៊ុំ-ភួយ ១៩៣០-២០០៧**

អ្នកស្រី អ៊ុំ សាមិត ត្រូវជាភរិយា លោក អ៊ុំ សុវឿន និងលោកស្រី អ៊ុំ សីចយា ត្រូវកូន,កូនប្រសារ មានទុក្ខក្រៀមក្រំជាទម្ងន់ ដោយលោក អ៊ុំ ភួយ ត្រូវជាស្វាមី-ជាឪពុកនិងឪពុកក្មេក បានទទួលមរណភាព កាលពី ថ្ងៃព្រហស្បតិ៍ ទី២៩ ខែវិច្ឆិកា-ឆ្នាំ២០០៧ វេលាម៉ោង ១២:២០នាទី រំលងអធ្រាត នៅក្នុងមន្ទីរពេទ្យ SAINT MARY ទីក្រុង-ឡុងប៊ិច, រដ្ឋកាលីហ្វ័រនា ក្នុងជន្មាយុ ៧៧ឆ្នាំ ដោយរោគជរាពាធ។

សពលោក អ៊ុំ ភួយ តម្កល់នៅ អាគារ: ALL SOULS MORTUARY

អាសយដ្ឋាន: 4400 CHERRY AVE, LONG BEACH CA 90807.

**កម្មវិធីបុណ្យ**

ថ្ងៃសុក្រ ទី៧ ខែធ្នូ ឆ្នាំ២០០៧ ការបើកឲ្យមើលសព ពីម៉ោង៤:០០ ដល់ ម៉ោង ៨:០០ យប់

**ថ្ងៃសៅរ៍ ទី៨ ខែធ្នូ នៅកន្លែងតម្កល់សព** ចាប់ពី ម៉ោង**១០:០០** ព្រឹក ដល់ ម៉ោង**១២:៣០**នាទី

ពិធីប្រារព្ធកិច្ចតាមរបៀបព្រះពុទ្ធសាសនា និង រៀបក្បួនដង្ហែរសពទៅ បញ្ចុះនៅ **ទីសុសាន** FEREST LAWN CEMENTARY. អាសយដ្ឋាន: 4471 LINCOLN AVE, CYPRESS, CA 90630

**ដំណឹងនេះសូមចាត់ទុកជាសេចក្តីអញ្ជើញដល់ញាតិមិត្តជិតឆ្ងាយនៃសព.**

ព័ត៌មានពិស្តារសូមអញ្ជើញទាក់ទង-តាមទូរស័ព្ទលេខ (562) 599-5265 / (562) 644-2630

# ហោរាសាស្ត្រប្រចាំខែធ្នូ ថ្ងៃទី១០_២៥

### ឆ្នាំជូត : (ពពួកទេវតាប្រុស ធាតុទឹក)

រាសីលោកអ្នកល្អជាមធ្យម ។ រាល់កិច្ចការងាររកស៊ីជួញដូរមានការរីកចម្រើនលូតលាស់ទៅមុខដោយសន្សឹមៗ ។ ក្នុងរយៈពេលនេះ អ្វីដែលលោកអ្នកត្រូវយកចិត្តទុកដាក់នោះគឺមុននឹងហាមាត់និយាយស្តីអ្វីត្រូវចេះប្រយ័ត្នប្រយែងក្រែងមានពាក្យសម្តីភ្លាំងភ្លាត់ប៉ះសិទ្ធិអ្នកដទៃអាចបង្កជារឿងទំនាស់ឥតប្រយោជន៍ ។ ចំពោះស្រ្តីភេទក្នុងរយៈពេលនេះមិនត្រូវដើរផ្លូវឆ្ងាយដាច់សង្វែងតែម្នាក់ឯងឡើយ ៕

### ឆ្នាំមមី : (ពពួកទេវតាស្រី ធាតុភ្លើង)

រាសីលោកអ្នកល្អជាមធ្យម ។ រាល់កិច្ចការងាររកស៊ីជួញដូរបានកាក់កបល្អគ្រាន់បើ ។ ក្នុងរយៈពេលនេះអ្វីៗច្រើនមានការប្រែប្រួលពុំទៀងទាត់ ឡើយ ដូច្នេះបើលោកអ្នកមានលក់ដី ធ្លី ផ្ទះសម្បែង ឬវត្ថុមានតម្លៃផ្សេងៗចូរធ្វើលិខិតស្នាមជាលាយល័ក្ខអក្សរដោយមានចុះហត្ថលេខា ឬផ្តិតស្នាមមេដៃឱ្យបានត្រឹមត្រូវទើបទៅថ្ងៃមុខពុំមានបញ្ហាចោទឡើង ។ ចំពោះគូស្នេហ៍ក្នុងរយៈពេលនេះមានភាពស្និទ្ធស្នាលដូចប្រក្រតី ៕

### ឆ្នាំឆ្លូវ : ( ពពួកមនុស្សប្រុស ធាតុដី )

រាសីលោកអ្នកល្អធម្យម ។ រាល់កិច្ចការងាររកស៊ីជួញដូរមានការរីកចម្រើនលូតលាស់ទៅមុខដោយសន្សឹមៗ ។ ក្នុងរយៈពេលនេះ បើមានបងប្អូនញាតិមិត្តស្គាត់មកបបួលរកស៊ីចូលហ៊ុនជាមួយគោងចេះត្រិះរិះពិចារណាឱ្យបានល្អិតល្អន់ ទើបមិនចាញ់បោកគេ ។ ចំពោះគូស្នេហ៍ក្នុងរយៈពេលនេះ ប្រសិនបើបានស្គាល់ចិត្តថ្លើមគ្នា ហើយ គឺអាចគិតគូររឿងអាពាហ៍ពិពាហ៍បាន ៕

### ឆ្នាំមមែ : (ពពួកទេវតាស្រី ធាតុមាស)

រាសីលោកអ្នកស្រុតចុះខ្លាំង ។ រាល់កិច្ចការងាររកស៊ីជួញដូរជួបរឿងរកាំរកូសច្រើន ។ ក្នុងរយៈពេលនេះ បើមានរឿងជម្លោះកើតឡើង ចូរចេះ អត់ធ្មត់ និងរំងាប់ចិត្តឱ្យបានត្រជាក់ដាច់ខាតមិនត្រូវតបតទាំងកំហឹងទល់និងកំហល់ឡើយ ទើបរឿងតូចមិនអាចក្លាយជារឿងធំបាន ។ ចំពោះគូស្វាមីភរិយាក្នុងរយៈពេលនេះមានគេអុជអាលឱ្យបែកបាក់ ដូច្នេះតោងប្រយ័ត្នទើបបានសុខ ៕

### ឆ្នាំខាល : ( ពពួកយក្សស្រី ធាតុឈើ )

រាសីលោកអ្នកស្រុតចុះខ្លាំង ។ រាល់កិច្ចការងាររកស៊ីជួញដូរជួបបញ្ហាលំបាកៗច្រើន ។ ក្នុងរយៈពេលនេះ ទោះជាលោកអ្នកប្រកបកិច្ចការងារអ្វីក៏ដោយ ចូរមានការប្រុងប្រយ័ត្នជាប់ជានិច្ច ជាពិសេសចំពោះអ្នកជំនួញជួញដូរមុខនឹងប្រកល់ ប្រូវទទួលនូវមុខទំនិញលួសារពើគ្រឿងចេះពិនិត្យមើលគុណភាព និងរាប់ចំនួនឱ្យបានត្រឹមត្រូវ ទើបមិនចាញ់បោកគេ ។ ចំពោះគូស្នេហ៍ក្នុងរយៈពេលនេះច្រើនពាក់មុខយក្សដាក់គ្នា ៕

### ឆ្នាំមមែ : (ពពួកទេវតាស្រី ធាតុមាស)

រាសីលោកអ្នកស្រុតចុះខ្លាំង ។ រាល់កិច្ចការងាររកស៊ីជួញដូរជួបរឿងរកាំរកូសច្រើន ។ ក្នុងរយៈពេលនេះ បើមានរឿងជម្លោះកើតឡើង ចូរចេះអត់ធ្មត់ និងរំងាប់ចិត្តឱ្យបានត្រជាក់ដាច់ខាតមិនត្រូវតបតទាំងកំហឹងទល់និងកំហល់ឡើយ ទើបរឿងតូចមិនអាចក្លាយជារឿងធំបាន ។ ចំពោះគូស្វាមីភរិយាក្នុងរយៈពេលនេះមានគេអុជអាលឱ្យបែកបាក់ ដូច្នេះតោងប្រយ័ត្នទើបបានសុខ ៕

### ឆ្នាំថោះ : ( ពពួកមនុស្សស្រី ធាតុឈើ )

រាសីលោកអ្នកស្រុតចុះខ្លាំង ។ រាល់កិច្ចការងាររកស៊ីជួញដូរជួបនឹងឧបសគ្គច្រើន ។ ក្នុងរយៈពេលនេះ ដោយសារតែបើអ៊ីកុំកំពុងតែជាក់ស្រាប់នោះ ដូច្នេះលោកអ្នកមិនត្រូវហ៊ានប្រថុយប្រថានក្នុងការបណ្តាក់ទុនរកស៊ីដោយទ្រង់ទ្រាយធំ ឬក៏ប្រព្រឹត្តល្បែងស៊ីសងឡើយ ប្រយ័ត្នភ្ញាក់ស្មៀត អាចវិនាសអន្តរាយទ្រព្យអស់រលីងពីខ្លួន ។ ចំពោះគូស្វាមីភរិយាក្នុងរយៈពេលនេះមានរឿងរកាំរកូសច្រើន ៕

### ឆ្នាំរកា : (ពពួកយក្សប្រុស ធាតុដែក)

រាសីលោកអ្នកឡើងខ្ពស់ត្រដែត ។ រាល់កិច្ចការងាររកស៊ីជួញដូរមានការរីកចម្រើនលូតលាស់ទៅមុខជាលំដាប់ ។ ក្នុងរយៈពេលនេះ ទោះជាលោកអ្នកបានប្រកបកិច្ចការងារអ្វីក៏ដោយ គឺរមែងតែងតែបានទទួលផលសម្រេចសមតាមបំណងប្រាថ្នាទាំងអស់ ។ ក្នុងរយៈពេលនេះបុរសត្រូវប្រយ័ត្នចំពោះមនុស្សស្រីដែលមានសម្តីផ្អែមត្រជាក់អាចរលាយទ្រព្យឆាប់ ។ ចំពោះគូស្នេហ៍ប្រកបតែសេចក្តីសុខក្សេមក្សាន្ត ៕

### ឆ្នាំរោង : (ពពួកទេវតាប្រុស ធាតុមាស)

រាសីលោកអ្នកឡើងខ្ពស់ត្រដែត ។ រាល់កិច្ចការងាររកស៊ីជួញដូរបាន កាក់កបល្អណាស់ ។ ក្នុងរយៈពេលនេះ លោកអ្នកមានអារម្មណ៍ភ្លឺថ្លាគំនិត ប្រាជ្ញាឈ្លាសវៃ ទោះបានប្រកបកិច្ចការងារអ្វីៗក៏អាចដំណើរការបានស្រួលដែរ ជាពិសេស បើបានជួបពិគ្រោះពិភាក្សាការងារផ្សេងៗ គឺឆាប់និយាយត្រូវរ៉ូវនិងឆាប់ចុះសម្រុងនឹងគ្នា ។ ចំពោះគូស្នេហ៍មានការយល់ចិត្តគ្នាល្អណាស់ ៕

### ឆ្នាំច : ( ពពួកយក្សស្រី ធាតុដី )

រាសីលោកអ្នកឡើងខ្ពស់ត្រដែត ។ រាល់កិច្ចការងាររកស៊ីជួញដូរបានកាក់កបល្អណាស់ ។ ក្នុងរយៈពេលនេះ ទោះជាលោកអ្នកបានប្រកបកិច្ចការងារអ្វីក៏ដោយ ក៏ត្រូវបានបងប្អូនញាតិមិត្តជួយជ្រោមជ្រែងយ៉ាងពេញទំហឹងដែរ ដូច្នេះ ចូរញាប់ដៃញាប់ជើងបន្តិច ព្រោះការងារជាមាសប្រាក់ធ្វើច្រើនបានច្រើន ។ ចំពោះគូស្នេហ៍ក្នុងរយៈពេលនេះស្គាល់តែភាពផ្អែមល្ហែមដូចទឹកឃ្មុំ ៕

### ឆ្នាំម្សាញ់ : (ពពួកមនុស្សប្រុស ធាតុភ្លើង)

រាសីលោកអ្នកស្រុតចុះខ្លាំង ។ រាល់កិច្ចការងាររកស៊ីជួញដូរជួបនឹងបញ្ហាស្មុគស្មាញច្រើន ។ ក្នុងរយៈពេលនេះរាល់ចង្រៃឧបទ្រពបានលុកលុយ ចូលក្នុងកិច្ចការងាររកស៊ី ដូច្នេះទោះជាបានប្រកបការងារអ្វីក៏ដោយតែងប្រយ័ត្នប្រយែងក្រែងមានការភ្លាំងភ្លាត់អាចបង់ខាតទ្រព្យច្រើន ។ ចំពោះគូស្នេហ៍ក្នុងរយៈពេលនេះមានភាពស្និទ្ធដូចធម្មតា ៕

### ឆ្នាំកុរ : (ពពួកមនុស្សស្រី ធាតុទឹក)

រាសីលោកអ្នកឡើងខ្ពស់ត្រដែត ។ រាល់កិច្ចការងាររកស៊ីជួញដូរមានការរីកចម្រើនលូតលាស់ទៅមុខជាលំដាប់ ។ ក្នុងរយៈពេលនេះរាល់ឧបទ្រពចង្រៃ និងរាល់ឧបសគ្គបានសាបរលាបបាត់ស្រមោលអស់រលីង ដូច្នេះលោកអ្នកអាចប្រកបកិច្ចការងារបានពេញដៃពេញជើង តែនៅពេលជាប់មមាញឹកខ្លាំង ចូរប្រយ័ត្នប្រយែងក្រែងមានការភ្លាំងភ្លាត់នាំឱ្យខាតបង់លាភសក្ការៈ ។ ចំពោះគូស្នេហ៍ពេលនេះប្រកបតែសេចក្តីសុខក្សេមក្សាន្ត ៕

# ថ្ងៃ ៧ មករា ជាថ្ងៃរំដោះ ឬ...

សម្រាប់កាន់ការនៅប្រទេសកម្ពុជាថ្ងៃណាមួយ ។ អតីតមេខ្មែរក្រហម ប៉ុល ពត ថ្លែងយ៉ាងដូច្នេះថា : "វា(យួន) មានផែនការរួចហើយ វាចាត់តាំងរណសិរ្ស ដែលមិនមែន ហ៊ុន សែន, ជា ស៊ីម ធ្វើជាមេទេ អ្នកផ្សេងទៀតទេ ឈ្មោះ សោ ភឹម បក្សប្រជាជនពីមុនហៅថា បក្សប្រជាជនបដិវត្តន៍កម្ពុជា" ។

ទោះជាយ៉ាងណាក៏ដោយទំនាស់ព្រំដែនរវាងប្រទេសទាំងពីរអ្នកដឹកនាំទាំងសងខាងខំទប់មិនឱ្យឈានដល់ការប្រកាសសង្គ្រាមពេញមុខនោះទេ ។ មេដឹកនាំទាំងសងខាងនៅតែបន្តរាក់ទាក់រាប់រកគ្នាហាក់ដូចជាយុទ្ធមិត្តបដិវត្តន៍ដដែល ។

តាមកិច្ចសន្ទនាជាមួយឯកអគ្គរដ្ឋទូតសូវៀតមេបក្សវៀតណាម ឡេ ស្វ៊ាន់ បង្ហើបឱ្យដឹងនូវទស្សនវិស័យជាផលប្រយោជន៍យុទ្ធសាស្ត្រនៃមេដឹកនាំកុម្មុយនីស្តយៀកណាមនៅភូមិភាគនេះ ដូចជាការព្យាយាមភ្ជាប់ទំនាក់ទំនងនឹងបក្សថៃជាដើម ។

ឡេ ស្វ៊ាន់ ថ្លែងដូច្នេះថា "មិនយូរមិនឆាប់កម្ពុជានឹងស្ថិតនៅជាមួយវៀតណាមមិនខានខ្មែរឥតមានច្រកណាមួយចេញរួចទេ ។ យើងចេះធ្វើការជាមួយខ្មែរ ហើយដឹងថាកន្លែងណានឹងបង្ហាញភាពម៉ឺងម៉ាត់កន្លែងណានឹងបង្ហាញភាពបត់បែន" ។

តាមឯកសារយុទ្ធវិធីបញ្ចូលមនុស្សដែលហាណូយអប់រំហ្វឹកហ្វឺន ដូចជាយៀកមិញទៅដឹកនាំចលនាកុម្មុយនីស្តកម្ពុជាមិនបានសម្រេចទេ ដោយ ប៉ុល ពត ចាប់ក្រុមខ្មែរយៀកមិញ ដែលចូលមកជាមួយទ័ពព្រៃយៀកកុងយៀកណាមខាងជើង នាដើមទសវត្សរ៍ ១៩៧០ ។

មេដឹកនាំ និងអ្នកនយោបាយខ្មែរ ដែលឥតជំពាក់ទាក់ទងផ្ទាល់ក្នុងវិវាទជាមួយបក្សខ្មែរក្រហម និងបក្សយៀកណាមក្រហម មានការកើតទុក្ខមិនសុខចិត្តទេ ចំពោះការប្រើកម្លាំងកម្លាំងទ័ពរំលោភលើប្រទេសមួយជាសមាជិករបស់អង្គការសហប្រជាជាតិ ។

ពាក្យ "តស៊ូ" បានលេចជាថ្មីម្តងទៀត នៅពេលចលនារំដោះសេរីការរួមកម្លាំងនឹងខ្មែរក្រហមធ្វើចម្បាំងអស់រយៈពេល១០ឆ្នាំមកទៀត ក្រោយថ្ងៃ៧ មករា ១៩៧៩ នោះ ។

សម្តេចព្រះនរោត្តម សីហនុ កាលទ្រង់គង់ជាប្រមុខរដ្ឋាភិបាលចម្រុះត្រីភាគីកម្ពុជាប្រជាធិបតេយ្យធ្លាប់មានបន្ទូលអំពីការត្រួតត្រារបស់កងទ័ពយៀកណាមនៅកម្ពុជាថា មិនមែនមកជួយសង្គ្រោះជីវិតខ្មែរតាមផ្លូវមនុស្សធម៌ឥតគិតផលប្រយោជន៍យុទ្ធសាស្ត្ររបស់គេនោះឡើយ ។

សម្តេច សីហនុ មានបន្ទូលយ៉ាងដូច្នេះ : "បញ្ហាកម្ពុជាហ្នឹង គឺមានបរទេសបញ្ជូនទ័ពមក ហើយនាំទាំងពួកគួឡុង ដែលយើងមានតែ៦-៧លាននាក់ យ៉ាងច្រើនខ្មែរនៅក្នុងប្រទេសយើងស្រាប់តែមានយួន១លាននាក់ អ៊ីចឹងទៅតាមតែឱ្យដឹងតាមព័ត៌មានខ្ញុំ យួន នៅកោះទន្សាយកោះសេះអីអស់ទាំងហ្នឹង... នៅជិតហាទៀង ប៉ុន្តែ កោះរបស់ខ្មែរ សូម្បីតែទន្លេសាបក៏មានយួនសន្ធឹកទៀតនៅពេញតែទន្លេសាបកូនចៅខ្មែរអ៊ីស្លាមពីដើមជាអ្នកនេសាទនៅពេញទន្លេសាប ស្រាប់តែឥឡូវមានយួនជិត២លាននាក់ ដែលមកយកទឹកដីខ្មែរខុសច្បាប់មានចំនួនជាង៤០ពាន់នាក់ នៅក្នុងប្រទេសខ្មែរយួនបានមកកែប្រែព្រំដែន ។ ខ្ញុំមិនមែនសុំឱ្យរាជរដ្ឋាភិបាលស៊ីទេ ប៉ុន្តែចំណែកខ្ញុំមួយឈ្មោះ នរោត្តម សីហនុ មានពូជខ្ញុំគស្ស៊ីតស៊ី...ហូតដល់ស្លាប់" ។

យោងតាមឯកសារនានាជាច្រើនដែលអ្នកនិពន្ធបរទេសបានចងក្រងបញ្ជាក់ថារវាងខ្មែរ និងជនជាតិយៀកណាមចេះតែមានមក មិនចប់រហូតមកដល់បច្ចុប្បន្ននេះ បណ្តាលមកពីការបន្សល់ទុកកេរដំណែលចាប់ពីថ្ងៃ ៧ មករា ១៩៧៩ នោះមក ។

អតីតសមាជិកគណៈកម្មាធិការមជ្ឈិមបក្សកុម្មុយនីស្តយៀកណាម លោក ឡេ ដឹក បានថ្លែងនៅក្រុងហាណូយ នាពេលមួយក្នុងឆ្នាំ១៩៨០ថា កម្ពុជាត្រូវតែរាបបញ្ចូលជនជាតិយៀកណាមម្នាក់សម្រាប់ខ្មែរ៥នាក់នៅតាមជនបទ និងជនជាតិយៀកណាមម្នាក់សម្រាប់ខ្មែរម្នាក់នៅតាមទីក្រុង ។

ក្រៅពីរដ្ឋធម្មនុញ្ញសាធារណរដ្ឋប្រជាមានិតកម្ពុជា យុទ្ធសាមគ្គី និងសម្ព័ន្ធភាពកម្ពុជាយៀកណាមបានបង្កលក្ខណៈងាយស្រួលដល់ការធ្វើសន្និសញ្ញាកំណត់ព្រំដែនការចេញសារាចរពីក្រុមប្រឹក្សារដ្ឋមន្ត្រីសម្រួលជីវភាពជនជាតិយៀកណាមដូចជនជាតិខែរស់នៅលើទឹកដីកម្ពុជា ។

ពេលរដ្ឋខ្មែរសម្បើមតែទៅលើអ្នកនយោបាយប៉ុណ្ណោះថា នឹងរកសេចក្តីសុខក្សេមក្សាន្តដល់មនុស្សគ្រប់រូប ។/

# បច្ចុប្បន្នភាពនៃរឿងមិនគួរកើត....

## ខឹងប្រពន្ធមិនដណ្តឹងស្រីថ្មីឱ្យច្រាលះក្បាលខ្លួនឯងមួយដបលេង

គេថា សេចក្តីស្នេហាវាធំជាងអ្វីទាំងអស់ ហើយជ្រៅជាងមហាសមុទ្រទៅទៀតហើយ ទំនងដោយយល់យ៉ាងនេះក៏មិនដឹងបានជាបុរសម្នាក់ដែលលង់នឹងឥទ្ធិពលស្នេហ៍ងប់ងុល បានសំរេចចិត្តវាយក្បាលខ្លួនឯងមួយដបហូរឈាមក្នុងខណៈ ដែលខឹងប្រពន្ធមិនព្រមចូលស្តីដណ្តឹងស្រីស្នេហ៍នោះឱ្យខ្លួន ។ រឿងនេះ កើតឡើង ដោយបុរសឈ្មោះ ជា សុខនួន មានអាយុ ៣៤ឆ្នាំ នៅភូមិបត់ត្រង់ ឃុំកោះថ្កូវ ស្រុក ជលគីរី ខេត្តកំពង់ឆ្នាំង ចង់បានប្រពន្ធចុង ហើយប្រពន្ធដើមទៅស្តីដណ្តឹងឱ្យ ។

ស្ត្រី ច.ន ជាប្រពន្ធមានទឹកមុខស្រពាប់ស្រពោន និងមានទឹកភ្នែកពេញប្រឡង់ភ្នែកប្រាប់ញាតិខាងប្តីថា ប៉ុន្មានថ្ងៃនេះប្តីគាត់ចេះតែមកសុំឱ្យគាត់ចូលស្តីដណ្តឹងស្រីម្នាក់នៅឃុំមេព្រីង កន្លែងគាត់ទៅធ្វើមេការសំណង់ ហើយនៅក្នុងថ្ងៃកើតហេតុពេលត្រឡប់មកពីមើលអុំទូកនៅភ្នំពេញ គាត់ក៏អង្វរឱ្យទៅដណ្តឹងស្រីនោះទៀត តែគាត់នៅស្ងៀមពុំឆ្លើយអ្វីឡើយ ពេលនោះប្តីគាត់ ក៏ប្រើកូនឱ្យទៅទិញស្រាស១លីត្រ ពេលបានចាក់ផឹកពីរកែវ ក៏ទាញដបស្រានោះវាយប្រហារក្បាលគាត់ពេញមួយទំហឹងតែម្តងទៅ ។ បុរសរូបនេះមានប្រពន្ធច្រើនឆ្នាំមកហើយសព្វថ្ងៃមានកូន៤នាក់ថែមទៀតផង ។

## ខឹងគេញៀបួនស្រី ទាញបានកាំបិតកាប់ច្រាច

យុវជនជាប់ចោទទាំងពីរនាក់ ម្នាក់មានឈ្មោះ ព្រឿង ហ៊ាន អាយុ ២២ឆ្នាំ និងម្នាក់ទៀតឈ្មោះ ចេង សុខា អាយុ ២២ ឆ្នាំ បានប្រើកាំបិតប៉័ងតោ កាប់ ឈ្មោះ សាន្ត សារ៉ា អាយុ ២៦ឆ្នាំ រស់នៅភូមិជាមួយគ្នាបណ្តាលឱ្យរបួសធ្ងន់ ។ លោក ពេជ ថាល់ អធិការរងប៉ូលីសស្រុកបារាយណ៍ឱ្យដឹងថា យប់មានពិធីរាំធុងបាសក្នុងវត្តនោះ ជនជាប់ចោទទាំងពីរនាក់ និងប្អូនស្រីរបស់គេ ព្រមទាំងមិត្តភ័ក្តិបក្ខពួកមួយចំនួនបានទៅរាំលេង ។ លុះដល់យប់ជ្រៅ ក៏ត្រលប់មកផ្ទះវិញ នៅពាក់កណ្តាលផ្លូវបានជួបនឹងឈ្មោះ សារ៉ា មកនិយាយលែបខាយសុំស្នេហ៍ធ្វើឱ្យក្រុមស្រីៗខឹងនាំគ្នាជេរយុវជនសារ៉ា នេះ ឯសារ៉ា ខឹងក៏យកកាំបិតប៉័ងតោមកគំរាមរហូតមុតត្រូវចិញ្ចើមប្អូនស្រីជនជាប់ចោទបន្តិច ។ ឃើញដូច្នេះជនជាប់ចោទទាំងពីរ ដែលស្រវឹងស្រាផង ក៏បានដណ្តើមកាំបិតពីឈ្មោះសាន្ត សា រ៉ា រួចកាប់បណ្តាលឱ្យរងរបួសធ្ងន់តែម្តង ។ ហើយភ្លាមៗនោះប៉ូលិសបានឃាត់ខ្លួនជនជាប់ចោទ និងដកហូតយកកាំបិតប៉័ងតោទុកជាវត្ថុតាង ។/